ព្រះរាជបណ្ណាល័យកម្ពុជា

# កម្ពុជសុរិយា

## សៀវភៅចេញរាល់ខែ ពីព្រះរាជបណ្ណាល័យ

## ឆ្នាំគម្រប់ពីរ

ខ្សែ ៣




ក្រុមជំនុំទំនៀមទម្លាប់
COMMISSION DES MŒURS & COUTUMES

ក្រុងភ្នំពេញ

រោងពុម្ពរាជការ គូវែរណឺម៉ង់

គ្រិ. ឆ្នាំ ១៩២៧

ពុ. ស. ២៤៧០

អ្នកទទួលខុសត្រូវ ជុំ-មៅ

# បញ្ជីរឿង

# អំពីគុណធម៌របស់ព្រះមហាវិមលធម្ម ហោង

## លោកល្វីហ្វីណូត៍ អាចារ្យបង្រៀនឧត្តមវិជ្ជា

### សាលាកូឡែស ដឺហ្វ្រង្ស នៅក្រុងបារីស អធិប្បាយ

អកាលមរណៈរបស់ព្រះមហាវិមលធម្មថេរនេះ ជាសេចក្តីក្រៀមក្រំកាន់ទុក្ខដល់ព្រះសង្ឃខ្មែរ ដល់សិស្សានុសិស្ស ដែលនៅក្រោមសេចក្តីទូន្មានរបស់លោក និងដល់កល្យាណមិត្ររបស់លោកទាំងឡាយ ហើយក្នុងចំណោមមិត្តរបស់លោក ទាំងប៉ុន្មាននោះ ខ្ញុំស្មានថា ខ្ញុំអាចនឹងរាប់ខ្លួនខ្ញុំ ១ បញ្ចូលផងបាន ។

អស់លោកដែលធ្លាប់ស្និទ្ធស្នាលនិងព្រះថេរនេះ នឹងពោលពីពេះជាង ខ្ញុំអំពីប្រវត្តិរបស់លោក និងកិរិយារបស់លោក ដែលជាទីនាំឲ្យសាធារណជនស្រឡាញ់រាប់អានទូទៅ ឯកិរិយារបស់លោកនោះ គឺសេចក្តីសុភាព សេចក្តីគួរសមរាក់ទាក់ សេចក្តីដែលមិនប្រកាន់ខ្លួនប្រាណ និងសក្តិយស សេចក្តីដែលមានគំនិតយោះយល់ជ្រៅឆ្ងាយហើយឥតល្អៀង ៗ ដែលខ្ញុំមានប្រាថ្នា នឹងរំលឹកយកមក ដើម្បីជាទីគោរពបំផុតរបស់ខ្ញុំនោះ គឺសេចក្តីឧស្សាហ៍របស់លោក ដែលលោកខំខ្នះខ្នែង ដើម្បីជ្រោមជ្រែងឲ្យបានពុទ្ធសាសនិកជន មានសិល្បសាស្ត្រខ្ពស់ឡើង គឺថាលោកបានខំសិក្សាគម្ពីរដោយជ្រៅជ្រះ ហើយបានប្រាស្រ័យទៅនឹងវិជ្ជាសារពើរបស់ប្រទេសក្រុបខ្វះផង ៗ ដែលខ្ញុំពោលនេះ គឺពោលតាមដែលខ្ញុំបានឃើញកិច្ចការដែលខ្ញុំចាំបាននៅវេលាដែលខ្ញុំបានជួប បានប្រាស្រ័យទៅវិញទៅ

មកទឹងលោក គឺក្នុងពេលនោះហើយ ដែលខ្លួនខ្ញុំនិងខ្លួនលោកបានចងមេត្រីនឹងគ្នា ហើយចំណងមេត្រីនោះ មានតែសេចក្ដីមរណៈប៉ុណ្ណោះ ដែលអាចមកផ្ដាច់ទៅបាន សេចក្ដីស្នាគ្រះថ្លាដ៏ប្រសើរដែលលោកបានធ្វើឲ្យឃើញក្នុងការដ៏មានប្រយោជន៍នេះ ប៉ះពាល់ដល់ខ្ញុំជាទីបំផុត ហើយនាំឲ្យខ្ញុំនឹកឃើញដល់ព្រះមហាថេរ ១ អង្គទៀត ដែលខ្ញុំបានស្គាល់ គឺព្រះមហាសង្ឃរាជជាសង្ឃនាយក ដែលទិវង្គតទៅកាលពីឆ្នាំ ១៩១៣ ក្នុងវេលាដែលខ្ញុំបានស្គាល់នោះ ព្រះមហាថេរនេះលោកទ្រង់ព្រះជរាណាស់ទៅហើយ ទ្រង់ជាទីគោរពទូទៅនៃខេមរជាតិ ទ្រង់ប្រកបដោយតម្រិះវិជ្ជាយ៉ាងជ្រៅជ្រះ និងប្រកបដោយបរិសុទ្ធសីល ទ្រង់មានព្រះបន្ទូលរាងសុភាព ហើយផ្អែមល្ហែមគួរជាទីស្រឡាញ់រាប់អាននៃអ្នកផងទាំងពួង តែទ្រង់មានសន្ដានជាអ្នកប្រាជ្ញក្នុងជាន់បុរាណ ដែលកន្លងមកជាយូរអង្វែងហើយ ខ្ញុំស្មានថាសម្ដេចព្រះមហាសង្ឃរាជកាលគង់ព្រះជន្មនៅឡើយ នោះទ្រង់មិនបានក្នុកក្នុងព្រះហឫទ័យថា ទំនៀមទម្លាប់បុរាណនោះ និងមានកែសម្រួលខ្លះ ឲ្យបានស្រួលទៅតាមសម័យថ្មីឡើយ ឯចំណែកព្រះមហាវិមលធម្មថេរនេះ លោកពិចារណាផ្សេងទៅទៀតវិញ ខ្លួនលោកក៏ជាអ្នកកាន់ទំនៀមទម្លាប់បុរាណដូច្នោះដែរ ហើយលោកក៏មិនដែលគិតថានឹងបោះបង់ទំនៀមទម្លាប់ចោលឡើយ ប៉ុន្ដែលោកយល់ឃើញថា ការរៀនសូត្រតែ ១ ចុះ ១ ៗ នោះ មិនជួនសោះឡើយ ។ យល់ឃើញថាឯសាសនាទីមួយ ៗ ដែលមានប្រាជ្ញាចង់ឲ្យចម្រើននោះ ត្រូវឲ្យមានកម្លាំង

ទប់ទល់នឹងសន្ទុះរបស់មនុស្សជាតិទាំងឡាយ មិនត្រូវតាំងចិត្តប្រាថ្នាថែប យ៉ាងទូកចាស់គ្រាំគ្រា ដែលមិនហ៊ានចូលកាត់ឈូងសមុទ្រ ពីត្រើយម្ខាងទៅត្រើយម្ខាង ដោយឃើញធំទូលាយណាស់ ហើយក៏បណ្តោយឲ្យនៅលិចបន្តិចម្តង ៗ ដល់ទៅបាតសមុទ្រដែលគ្មានរលកនោះឡើយ ។

ប្រហែល ១០០ ឆ្នាំហើយ មានសព្វថ្ងៃនេះជាដើម ការសិក្សាព្រះពុទ្ធសាសនាបានសេចក្តីចម្រើនជាអនេក មិនត្រឹមតែបានផ្សាយធម៌អាថ៌ផ្សេង ៗ ដែលជាបាលីថែមទាំងបានគេឃើញ ហើយបានផ្សាយគោលដើមថែមទៀត បានគេឃើញគម្ពីរជាច្រើន ជាអក្សរចិន និងអក្សរស្រុកទីបេត៌ ហើយក្នុងតំបន់កណ្តាលទ្វីបអាស៊ី មានគោលចារឹកជាពុទ្ធសាសនាជាច្រើន អស់ទាំងគម្ពីរជាភាសាសំស្រ្កឹត និងចារឹកផ្សេង ៗក៏ផុសចេញមកពីក្នុងដីខ្សាច់ ដើម្បីធ្វើឲ្យឃើញជាក់ស្តែងថា ព្រះពុទ្ធសាសនាផ្សាយទូទៅ ជាអស្ចារ្យណាស់ក្នុងអាស៊ីទ្វីប បើដូច្នេះតើគួរឲ្យអ្នកដែលកាន់ពុទ្ធសាសនានៅធ្វើល្ងង់ មិនស្គាល់ពង្សាវតារសាសនាខ្លួន ដែលគន្លងមកយូរហើយ ៗ ដែលមានប្រយោជន៍មានសារគុណបំណាច់ជាធំ ក្នុងសេចក្តីស៊ីវិល្ស ក្នុងសតិបញ្ញា ឬ គំនិតដែលបានផ្សាយទូទៅក្នុងលោកនោះ ឬអ្វី? លោកគ្រូព្រះមហាវិមលធម្មថេរ ប្រហែលជាលោកបានចោទសួរខ្លួនលោកដូច្នេះមិនខាន ហើយលោកបានវិសជ្ជនា និង ពាក្យចោទលោកវិញ ថា ត្រូវតែដើរទៅកាន់ពន្លឺ ដែលដើរទៅកាន់ពន្លឺនោះ គឺលោកខំប្រព្រឹត្តតាមក្រិត្យវិន័យដែលជាពុទ្ធបញ្ញត្តិនោះឯង ព្រះពុទ្ធសាសនា ជាសាសនាដែល

មានប្រាជ្ញាយោបល់ដ៏ខ្ពង់ខ្ពស់ ព្រះសម្មាសម្ពុទ្ធដែលជាអ្នកបង្កើតសាសនា
នេះ ក៏បានកំណត់នូវកិរិយាឲ្យយើងបានដឹង នៅវេលាដែលព្រះអង្គបាន
បោះបង់ វែបប្រព្រឹត្តរបស់តាបសចេញ ហើយនៅវេលាដែលព្រះអង្គ
ជ្រាបច្បាស់ក្នុងព្រះអង្គ អំពីធម៌ដែលមានបច្ច័យត ៗ គ្នា ក្នុងពេលដែល
ព្រះអង្គតាំងសមាធិនោះ នៅវេលាដែលព្រះអង្គឃើញនូវសេចក្ដីពិតច្បាស់
ប្រាកដហើយ ព្រះអង្គមិនបាននៅស្ងៀមកន្តើយឡើយ គឺព្រះអង្គបាន
កាត់រកអាចារ្យដទៃ ៗ ដែលកាន់សាសនាវែបផ្សេង ៗ ដើម្បីប្រាស្រ័យ
ជាមួយ ហើយដើម្បីឲ្យបានជ្រាបអំពីវិធីអាចារ្យទាំងនោះ ហើយដើម្បី
និងដេញដោលមូលលក្ខណៈអាចារ្យទាំងនោះផង ព្រះពុទ្ធសាសនាមិន
ដែលមានខ្លាចសិល្បសាស្ត្រឡើយ ហើយមិនដែលគេច ឬ រួញក្នុង
អាថ៌ប្រស្នាទេ សម័យដែលព្រះពុទ្ធសាសនាចំរុងចំរើនជាទីបំផុតនោះ គឺ
សម័យដែលសាលានាលន្ទាបានប្រជុំអាចារ្យដែលពូកែៗ ពីសាលាផ្សេងៗ
មក ហើយដែលមានអ្នកសិក្សាកាត់ពីឆ្ងាយ ១ ទៅរករៀនវិជ្ជាផ្សេង ១
ក្នុងសម័យនេះសាលានាលន្ទាក៏បាត់បង់ទៅហើយ ប៉ុន្តែប្រទីបរបស់វិជ្ជា
នោះ មិនទាន់រលត់នៅឡើយទេ គឺនៅពន្លឺភ្លឺដល់មកសព្វថ្ងៃនេះ ក្នុង
សាលាធំ ១ នៅប្រទេសអឺរ៉ុប បើដូច្នេះតើត្រូវឲ្យជនជាតិក្នុងបូព៌ាប្រទេស
វៀសវាងឆ្ងាយ ចេញអំពីពន្លឺនោះឬអ្វី ឯព្រះមហាវិមលធម្មថោង នោះ
លោកមិនបានគិតដូច្នេះឡើយ គឺលោកមានព្រះហឫទ័យមុតចំពោះនឹង
វិជ្ជា ហើយបណ្ដាមនុស្សយល់ត្រូវប្រតិបត្តិតាមធម៌អាថ៌របស់លោកនោះ

មានជាច្រើន ៗ

ប៉ុន្តែដើម្បីឲ្យបានប្រាស្រ័យទៅនឹងនគរ ដែលមានអ្នកប្រាជ្ញជាច្រើននោះ លុះតែមានកិច្ចការផ្សេង ៗ ដោយឡែក ដោយហេតុនេះហើយ បានជាមានតាំងបង្កើតជាសាលាបរិយត្តិឡើង សាលានេះមានកិច្ចជាដំបូង ត្រូវផ្តល់វិជ្ជាព្រះត្រៃបិដក ដល់អ្នកបួសឲ្យបានស្គាល់ធម៌អាថ៌ក្រិត្យវិន័យផ្សេង ៗ ជាពុទ្ធបញ្ញត្តិ ប៉ុន្តែ តែប៉ុណ្ណោះនៅមិនទាន់ធួននៅឡើយ ត្រូវថែមវិជ្ជាផ្សេងបន្ទាប់បន្សំទៀត ដូចយ៉ាងវិធីពោត់ ភាសាបារាំង និងរៀនពង្សាវតារ ដើម្បីជាការបើកទ្វារនូវវិជ្ជាសម័យថ្មី ឲ្យបានឃើញគ្រប់គ្នា សាលានេះត្រូវការឲ្យមានអធិបតីម្នាក់ ប្រកបដោយសតិបញ្ញា មានគេរាប់អានខ្លួនទៅ ហើយឲ្យចេះកាន់កាប់ការដោយមានគំនិតមារយាទប៉ិនប្រសប់ មិនធ្វេសប្រហែស ហើយឲ្យមានអធ្យាស្រ័យល្អ ក្នុងវេលានោះគេរើសយកខ្លួន ព្រះមហាវិមលធម្មថេរ ដើម្បីកាន់កាប់ការយ៉ាងឧត្តមនេះ ឯចិត្តដែលស្មោះ សេចក្តីព្យាយាមនិងសេចក្តីខំប្រឹងដែលលោកបានបញ្ចេញ ដើម្បីកាន់កាប់សាលាយ៉ាងដូចម្តេចនោះ អស់លោកដែលបានឃើញការរបស់លោក អាចនឹងបញ្ជាក់ទៅបាន ព្រោះតែសេចក្តីខំប្រឹងរបស់លោកហើយ បានជាសព្វថ្ងៃសាលានេះបានចម្រើនឡើងឥតអាក់ ហើយមនុស្សចូលចិត្តគ្រប់គ្នា ប្រហែលជាមានមនុស្សខ្លះ នឹកថាសាលាបាលីនេះ មិនទាន់បានធ្វើការអ្វីឲ្យមានប្រយោជន៍ ដល់មនុស្សដែលត្រូវការនៅឡើយ ប៉ុន្តែការដែលទើបនឹងផ្តើមថ្មីហើយប្រសើរដូច្នេះ

ត្រូវតែឲ្យមានពេលទើបធ្វើបាន គោរពយើងមានសង្ឃឹម ជឿទុកចិត្តថាផ្លូវទៅអនាគតនោះគេបានធ្វើហើយ ។

ជំនុំសេចក្ដីចម្រើនដែលកើតឡើង ដោយការស្នាដៃរបស់ព្រះមហាវិមលធម្មនោះ មានសេចក្ដីចម្រើន ១ ដែលខ្ញុំមានសេចក្ដីអំណរ និងនឹករឭកឡើង ហើយដែលខ្លួនខ្ញុំបានចូលប្រាស្រ័យក្នុងរឿងនោះដែរ គឺអំពី ដែលបញ្ចូលវិជ្ជាសំស្ក្រឹតមកក្នុងសាលានោះ ឯសំស្ក្រឹតជាភាសា ១ ប្រើក្នុងគម្ពីរដីកាជាច្រើន ក្នុងពុទ្ធសាសនា ហើយម្យ៉ាងទៀតភាសានេះបានជាគោលចារឹក ១ យ៉ាងមាំ សម្រាប់ប្រៀបរៀបភាសាបាលី ដោយចំពូកខ្លះ ក្នុងការនេះ លោកបានបញ្ជូនលោកសង្ឃ ២ អង្គ ទៅស្រុកហាណូយ ២ ដង ដើម្បីសិក្សាសំស្ក្រឹត ហើយលុះត្រឡប់មកវិញបានបាត់ ១ អង្គឲ្យបង្រៀនកូនសិស្សក្នុងសាលាបាលី ដរាបដល់មកសព្វថ្ងៃនេះ ឃើញថាព្រះថេរនេះ បានធ្វើឲ្យចម្រើនយ៉ាងធំក្នុងស្រុកនេះក្នុងការរិះរកពុទ្ធសាសនា ហើយប្រយោជន៍នោះ នឹងឃើញឡើងមិនយូរឡើយ ។

ខ្ញុំមិនអាចនឹងភ្លេចនឹកឡើងបានឡើយ អំពីសេចក្ដីឧបត្ថម្ភដែលលោកបានជួយដល់មន្ទីរ ១ ទៀត ដែលមានគោលចារឹកជាមួយគ្នាគឺព្រះរាជបណ្ណាល័យនោះឯង ដែលមានកិច្ចត្រូវបើកឃ្លាំងវិជ្ជា ដល់ឧបាសកឧបាសិកាទាំងពួង ហើយដែលសាលាបាលីមិនបានផ្ដល់ទៅដោយហេតុសាលានេះ មានការៈជាសង្ឃនឹងលក់ដូរអ្វីមិនបាន ។

ក្នុងកិច្ចការអ្វី ។ ដែលលោកបានចូលធ្វើជាមួយនោះ គឺលោកជាអ្នក

ឲ្យគំនិត និងដំបូន្មានដ៏ប្រពៃ ដើម្បីសម្រួលការទាំងនោះលោកបានកំចាត់នូវគំនិតដែលនាំឲ្យមិនចម្រើន ហើយដែលនាំឲ្យទទឹងទាស់ដល់សេចក្ដីកែប្រែ ដ៏ប្រសើរនោះពោលចេញ លោកទ្រង់នៅសម្លៀកសង្ឃដ៏ឥតឆ្គង ត្រឹមត្រូវតាមក្រិត្យវិន័យ ហើយលោកមានវិជ្ជាដ៏ជ្រៅជ្រះក្នុងធម៌អាថ៌ ដែលរកឃើញថ្មី ៗ ហើយដែលនាំឲ្យខ្វល់ដល់មនុស្សដែលមានសន្តានចិត្តជាអ្នកខ្លាចបាប លោកតាំងចិត្តថានឹងធ្វើសេចក្ដីចម្រើន ឲ្យកើតឡើងហើយឲ្យនៅជានិច្ច តទៅក្នុងអនាគតកាល ។

តាមដែលមានសម្ដែងក្នុងគម្ពីរផ្សេង ៗ នោះ ឃើញថាលោកបានបំពេញកិច្ចរបស់លោកជួនហើយ ៗ បានភាំងផ្លូវបន្ទុកដែលធ្ងន់ចេញផង ប៉ុន្តែអំពើរបស់លោក មិនសាបសូន្យឡើយ គឺអំពើនោះនឹងនៅជាប់ទៅដោយអំណាចចិត្តរបស់លោក ដែលបានគិតទុក អំពើនោះនៅរស់ជានិច្ចក្នុងកិច្ចទាំងឡាយ ដែលខ្លួនលោកជាមេគំនិត សូមឲ្យលោកណាដែលទទួលកាន់កាប់ការជាខាងក្រោយប្រព្រឹត្តធ្វើតាមគន្លងនេះ ហើយយកតម្រាប់តទៅ ។

ល្វី ហ្វីណូត៍



# អំពីថ្មើមថ្ម ដែលឆ្លាក់ជារូបព្រះពុទ្ធបរិនិព្វាន និងរឿងរាមកេរ្តិ៍ ១ កន្លែង

ម៉ាដឹមូអាហ្សែល ការប៉ឺឡែស អធិប្បាយ

---

កាលពីក្នុងខែមួយ យើងបាននិយាយរៀបរាប់អំពីរូបសម្រិទ្ធ ១ ដែលគេបានរចនាតាំងពីកាលជាន់សាងប្រាសាទអង្គរ ហើយក្នុងថ្ងៃនេះយើងតាំងនិយាយអំពីរូបដែលឆ្លាក់ដោយថ្មើមថ្ម ១ ជាការរចនាសម័យថ្មី ដែលអាចារ្យ ខែត នៅបាត់តំបង បានធ្វើអំណោយមកព្រះរាជបណ្ណាល័យ កាលពីក្នុងខែ ឧបត្ថប ឆ្នាំ ១៩២៥ ។

ថ្មើមថ្មនេះគេហៅថាថ្មើមថ្មពោធិសាត់ ប្រវែងបណ្តោយចំនួន ១២ សង់ទីម៉ែត្រ ទទឹងចំនួន ៧ សង់ទីម៉ែត្រកន្លះ ពណ៌ទឹកដោះគោខាប់ សែមសម្បុរត្នោត និង សែម ខ្មៅ ហើយមានរូបចម្លាក់តាំងសង់ខាង ។

នៅចំហៀងទី ១ ឃើញរឿងខាងព្រះពុទ្ធសាសនា ត្រង់បរិនិព្វាន នៅខាងក្រោមព្រះពុទ្ធរូបនោះ ឃើញមានដិតខ្សែជាច្រើន ត្រង់ចុះពីលើមក ដើម្បីតំណាងធ្វើជាគ្រែ ហើយនិងខ្សែដិត ៣ ជាន់ជា ៣ ជ្រុង កង់មុខឮបៅតំណាងធ្វើជាខ្នើយ ព្រះពុទ្ធអង្គផ្ទំផ្អៀងទៅខាងស្តាំ យកព្រះហស្តស្តាំទ្រទ្រូវព្រះកេសា ឯព្រះហស្តឆ្វេងទ្រង់សណ្ដូកលើព្រះកាយដែលទ្រង់នូវត្រៃចីវរ ទម្លាក់រហូតមកដល់ត្រឹមពាក់កណ្ដាលស្មង ឯផ្នត់សង្ឃាដីនោះសម្គាល់ដោយខ្សែ ៣ ជាន់ ដែលឆ្លាក់បណ្ដោយវែងស្មើនឹងសង្ឃាដីនោះ ហើយនៅត្រង់បង្កេះមានខ្សែបន្ទាត់ ៣ ជាន់ធ្វើជាវត្ថពន្ធ ។

ស្នាមឆ្លាក់នៅព្រះភក្ត្រនោះ លេចបាត់អស់ហើយ ព្រះក្មាតាំងសងខាង មើលទៅដូចជាក្បាច់របនាអមព្រះកេសា ខាងលើព្រះកេសឃើញព្រះមូលីរចនាកងដូចចុងព្រួញ ។

នៅលើចីពរនិងព្រះហស្តស្តាំ ឃើញមានស្នាមទឹកមាសជាប់នៅ ៗ ឡើយ ចុងព្រះបាទតាំងសងខាង ក៏សឹករលុបបាត់អស់ ។

ជាងដែលឆ្លាក់ថ្មើមថ្មនេះ មិនមែនជាជាងមិនប្រសប់ឡើយ ប៉ុន្តែវេលាដែលទឹងឆ្លាក់យកជាសម្រេចនោះ ហាក់ដូចជាមានអ្វីមកកំងកមិនឲ្យធ្វើឲ្យហ្មត់ចត់បាន ។

ឯចំណែកខាងម្ខាងទៀតនៃថ្មនោះ ឃើញមានឆ្លាក់រឿងរាមកេរ្តិ៍ ១ កន្លែងត្រង់ចម្បាំងក្រុងពាលីជាស្តេចស្វា និងទូភី ជាក្របី ដែលមានស្នែងស្រួច ៗ ហាក់ដូចជាប្រុងនឹងស្ទុះស្គ្រប់ទៅលើស្តេចស្វា ។

រូបចម្លាក់នេះនាំឲ្យយើងជឿថាអ្នកដែលឆ្លាក់នោះ មិនសូវញញើតដៃនឹងឆ្លាក់រឿងក៏វ ដែលមិនមែនជារឿងពុទ្ធសាសនាឡើយ ។

ថ្មចម្លាក់នេះ មិនមែនជារបស់បុរាណទេ ប្រហែលជាគេធ្វើក្នុងរវាងពុទ្ធសករាជ ២៤០០ ប៉ុណ្ណោះ ថ្មចម្លាក់នេះ មានប្រយោជន៍ណាស់ ព្រោះធ្វើឲ្យយើងដឹងថារឿងរាមកេរ្តិ៍ ដែលជារឿងរបស់សាសនាព្រាហ្មណ៍កាលក្នុងជាន់នោះ នៅរាប់អានដល់អ្នកកាន់ពុទ្ធសាសនា ថាជារឿងក៏វពិតប្រាកដដែលមានសម្តែងក្នុងព្រះសូត្រតាំងឡាយជាពុទ្ធដីកាដែរ ។

ស៊ុយសាន ការប៉ុវ្យែល

# រឿងសរណាគមន៍

---

## ព្រះមហារាជធម្ម ឱក រាជាគណៈ វត្តធម្មនិមិត្រ បុប្ផារាម ខេត្តបាត់ដំបង តែង

គ្រានេះនឹងសំម្តែងរឿងសរណាគមន៍ ដែលជាទីពឹងរបស់មនុស្សសត្វទាំងឡាយ ព្រោះថាកើតមកក្នុងលោកនេះហើយ តែគ្មានរបស់ជាទីពឹងក្នុងសន្តានចិត្តទេ ហៅថារកសេចក្តីសុខគ្មាន ប្រៀបគណនាដូចជាសត្វ បើគ្មានម្ចាស់ហួងហែងរក្សាហើយតាមតែចិត្តមនុស្សទាំងពួង គេនឹងប្រមាទញាំញីបៀតបៀន លុះដល់សេចក្តីអន្តរាយនៃជីវិតដោយងាយជាតិជាមនុស្ស ដែលកើតមកក្នុងលោកនេះ តែគ្មានទីពឹងក៏មានឧបមាដូច្នោះ ហេតុនេះ ខ្ញុំសូមរៀបរៀងរឿងសរណាគមន៍ តាមបែបដែលមានក្នុងគម្ពីរសុត្តសង្គហខ្លះ ក្នុងគម្ពីរព្រះសូត្រដទៃខ្លះ និង អដ្ឋកថាខ្លះ ដោយបាលីថា: ឯត្ថ ច សរណាគមនេ កោសល្លត្ថំ សរណាគម-នំ គច្ឆតិ សរណាបភេទោ ផលំ សំកិលេសោ ភេទោ ចា-នានត្តំ អយំ បភេទោ វេទិតព្វោ ។

អធិប្បាយក្នុងរឿងសរណាគមន៍ថា មនុស្សដែលមានជាតិជាអ្នករស់នៅរមែងកន្លងបង់នូវអបាយភូមិ ៤ គប្បីដល់នូវទីពឹងរបស់ដែលប្រសើរ ទើបនឹងដល់នូវសេចក្តីក្សេម ហេតុនេះខ្ញុំនឹងចែកអានិសង្សនៃសរណាគមន៍

និងរបស់សៅហ្មងនៃសរណគមន៍តទៅ ឯសរណគមន៍នោះ ប្រែថាដល់នូវទីពឹងដ៏ក្សេម ទីពឹងមានប៉ុន្មានយ៉ាង? ឆ្លើយថាទីពឹងមានច្រើនយ៉ាង បុគ្គលខ្លះ មានភ័យ ទៅទីពឹងព្រៃ ពឹងភ្នំ ពឹងរូងចេតិយ ពឹងដុំថ្មសិលា ពឹងដើមឈើធំៗ ពឹងខ្មោចបិសាចអារក្ខទេវតា ខ្លះថាយកព្រះពុទ្ធ ព្រះធម៌ ព្រះសង្ឃសីលទានភាវនាជាទីពឹង ខ្លះក៏ថាយកចិត្តល្អបរិសុទ្ធជាទីពឹង ហេតុនេះឲ្យសប្បុរសពិចារណាមើលចុះ អ្នកដែលរកទីពឹងនោះផ្សេងៗគ្នាដូច្នោះ សួរថាច្រើនម៉្លេះ តើនឹងឲ្យយកឯណាជាទីពឹង ឆ្លើយថាយកវត្ថុដទៃៗក្រៅចាកព្រះត្រៃសរណគមន៍ ទាំង ៣ ជាទីពឹងហើយ ពុំប្រសើរ ពុំរួចចាកទុក្ខឡើយ ព្រោះព្រះត្រៃសរណគមន៍នេះ ជាទីពឹងរបស់បុគ្គលប្រុសស្រីក្នុងលោកនេះ នឹងដើរទៅកាន់បរលោកខាងមុខដោយពិត ប្រៀបគណនាដូចជាប្រាសាទ ឬផ្ទះនិងសម្បត្តិទ្រព្យនិងគ្រឿងមាសទាំងពួង ក៏ជាទីពឹងទីលំនៅការពារនូវសេចក្ដីលំបាក គឺភ្លៀងនិងកម្ដៅព្រះអាទិត្យជាដើម របស់បុគ្គលប្រុសស្រីយ៉ាងណា ឯព្រះត្រៃសរណគមន៍ ក៏ជាទីពឹងរបស់បុគ្គលប្រុសស្រី នឹងដើរទៅកាន់បរលោកដូច្នោះ ១ ទៀតព្រះត្រៃសរណគមន៍ ដែលឈ្មោះថាជាទីពឹងនោះមានបីប្រការ ព្រោះត្រៃនោះ ប្រែថា ៣, សរណគមន៍ ប្រែថាដល់នូវទីពឹង ឯត្រៃសរណគមន៍នោះ ថាឲ្យយកព្រះពុទ្ធ ព្រះធម៌ ព្រះសង្ឃជាទីពឹង ឯព្រះពុទ្ធនោះ គឺថាឲ្យយកព្រះដ៏មានបុណ្យ ដែលគង់ព្រះជន្មនៅឬបរិនិព្វានហើយ យកតែកិរិយាបញ្ញាញាក់ជាជាទីពឹង ព្រះធម៌នោះ គឺឲ្យយកសេចក្ដីបរិសុទ្ធ នូវសេចក្ដីសុចរិតជាទីពឹង

ឯព្រះសង្ឃនោះ ឲ្យយកព្រះអរិយសង្ឃ ឬ សម្មតិសង្ឃឲ្យយកពួកអ្នកបួស ដែលប្រតិបត្តិល្អ ប្រតិបត្តិត្រង់បរិសុទ្ធជាទីពឹង បើយកវត្ថុទាំង ៣ នេះជាទីពឹងហើយ ឈ្មោះថាជាទីរួចចាកទុក្ខទាំងពួង ហើយឈ្មោះថាជាឧបាសក ឧបាសិកាក្នុងព្រះពុទ្ធសាសនា គណនាដូចជាមនុស្សស្រុកថៃ គោរពពឹងម្ចាស់ផែនដី និង មាតាបិតាជាដើម ១ និង ទីពឹងសេចក្តីសុចរិត មិនប្រព្រឹត្តកន្លងលោកបញ្ញត្តិ ទីពឹងបញ្ញា និងសម្បត្តិទ្រព្យរបស់ខ្លួនដែលមាននៅ ១ ពឹងរបស់ ៣ យ៉ាងនេះ ទើបនឹងរួចចាកទុក្ខ សេចក្តីខុស សេចក្តីលំបាក មានជាប់គុក ជាប់ប្រាក់ជាដើម ក៏មិនមាន ឥតអ្នកដទៃបៀតបៀនដល់ខ្លួន តែមិនទីពឹងរបស់ទាំង ៣ យ៉ាងបន្តិចទាស់នឹងម្ចាស់ផែនដី ព្រោះយើងមើលងាយកន្លងព្រះច្បាប់សម្រាប់នគរ គេយកទៅធ្វើទុក្ខធ្វើទោសក៏មាន ដែលគ្មានបរិសុទ្ធដោយកាយនិងវាចា និងមនោនាំឲ្យអ្នកដទៃបៀតបៀន ព្រោះគំនិតរបស់ខ្លួន គ្មានសម្បត្តិ នឹងចាយក៏យកដូចរបស់ចលវត្ថុនិងអចលនវត្ថុ មានសេចក្តីប្រាថ្នារបស់ខ្លួនក្នុងថ្ងៃខែឆ្នាំនេះ ឬថ្ងៃខែឆ្នាំដែលកន្លងទៅ ១០ ឆ្នាំ ឬ ៩០ ឆ្នាំឡើងទៅក្តី ក៏នាំឲ្យដល់នូវសេចក្តីទុក្ខ សេចក្តីលំបាកឥតឧបមា តែគ្មានប្រកបដោយវត្ថុ ៣ យ៉ាងនេះហើយ នឹងដល់នូវសេចក្តីវិនាសធំ ក្នុងលោកនេះធម្មតាបុគ្គល តែគ្មានព្រះពុទ្ធព្រះធម៌ ព្រះសង្ឃជាទីពឹងក្នុងសន្តានចិត្តហើយ មានតែសេចក្តីទុក្ខលំបាក ក្នុងលោកនេះ និង បរលោក ដល់ធ្វើកាលកិរិយាអស់ជីវិតទៅកាន់លោកឯមុខ ក៏ទៅសោយទុក្ខវេទនាក្នុងនរក ព្រោះគ្មានវត្ថុដែលជាទីល្អជាប់តាមទៅផង

មិនអាចដើម្បីនឹងទប់ទល់អាត្មាបាន ដូចជាមនុស្សដែលគ្មានសម្បត្តិ មិនអាចដើម្បីនឹងការពារសេចក្តីទុក្ខលំបាកបានដូច្នោះ ហេតុនេះសប្បុរសដែលកើតមកក្នុងលោកនេះ គួរតែយក ព្រះពុទ្ធ ព្រះធម៌ ព្រះសង្ឃ ជាទីពឹងឲ្យប្រាកដ កុំឲ្យធ្វើដូចជាទំនៀមគេ ៗ ទទួលសីលគេសុំសរណគមន៍ ក៏ទទួលទៅ ។ ថាយកព្រះពុទ្ធ ព្រះធម៌ ព្រះសង្ឃ ជាទីពឹង ក៏ថាតាមគេទៅតែពុំដឹងជាព្រះពុទ្ធនោះដូចម្តេច? ព្រះធម៌នោះដូចម្តេច? ព្រះសង្ឃនោះដូចម្តេច? លុះដល់មានជម្ងឺឈឺជាទម្ងន់មកបៀតបៀនកាយមានសេចក្តីភ័យក៏បន្ទោសទៅខ្មោចដីដូនដីតាថាមកធ្វើ ឬ ខ្មោចបីសាចអារក្សទេវតាមកធ្វើឲ្យឈឺហើយក៏យកស្វាធម៌ ឬ បំណន់ទៅថ្វាយ ឬ អង្ករបាចគ្រាប់សទៅឲ្យ ឬ យកដើមចេកមកធ្វើជាពែរ មានស្ងួនរូបដោយផេះ ដាក់បាយស បាយក្រហមជូនឲ្យទៅ ថារួចបំណន់ហើយ សេចក្តីដែលល្ងង់ពាំងអណ្តាលនេះព្រោះមិនច្បាស់ ក្នុងព្រះត្រៃសរណគមន៍ប្រាកដ ប្រៀបដូចមនុស្សមិនស្គាល់មាស អ្នកណាយករបស់អ្វី ១ មកឲ្យថាតែមាស ក៏យកវត្ថុនោះទុករក្សាទៅដូចជាបុគ្គលសត្វថ្លៃខ្លះ ប្រតិបត្តិតាមតែពាក្យគេថា ១ អ្វីល្អក៏យករបស់នោះមកប្រតិបត្តិ មិនគិតរកប្រយោជន៍និងមិនប្រយោជន៍ ឲ្យប្រាកដឡើយ ទើបដល់វេលាក្រោយមានអ្នកដទៃដែលគេស្គាល់របស់ប្រយោជន៍និងមិនមែនប្រយោជន៍ជាប្រាកដ គេមកប្រាប់ក៏ពុំជឿឡើយ ដូចពាក្យលោកប្រៀបថា ខ្វាក់បានដៃ ធម្មតាមនុស្សខ្វាក់តែចាប់ពារលើវត្ថុអ្វី ១ ហើយក៏ប្រកាន់ខ្ជាប់ ដូចមនុស្សប្រកាន់ជាតិ ដែលកើតមកជាជាតិអ្វី

ក៏ប្រកាន់ជាតិនោះ ថាខ្ពស់ ថាប្រសើរ ជាជាងជាតិដទៃ ដូចជាមនុស្សធ្លាប់ឃើញទំនៀមតាំងអំពីតូច ៗ លុះដល់ចាស់ ៗ ហើយ ក៏ប្រកាន់តាមបែបមកអំពីដើមនោះ ដោយហេតុធ្លាប់ប្រកាន់ ធ្លាប់ឃើញមកហើយ ដូចជាព្រះពុទ្ធអង្គ ទ្រង់សម្តែងទុកក្នុងមង្គលសូត្រអដ្ឋកថាមង្គលទីបនីថាទិដ្ឋមង្គល និងសុតមង្គល និង មុតមង្គល ប្រកាន់នូវរបស់ធ្លាប់ឃើញនិងក្អែក របស់ធ្លាប់ឮនិងត្រចៀក ធ្លាប់ហិតជាតិរសជាដើមដូច្នេះ ។

សួរថាព្រះពុទ្ធនោះ ៗ នឹងធ្វើយ៉ាងដូចម្តេចទើបនឹងស្គាល់ច្បាស់ ។

ឆ្លើយថាឲ្យទន្ទេញឲ្យសូត្រហើយពិចារណា ទើបនឹងស្គាល់ច្បាស់នូវព្រះពុទ្ធនោះ ព្រោះព្រះពុទ្ធនោះ ព្រះអង្គមានរូបលក្ខណៈ ចិត្តធម៌របស់ប្រព្រឹត្ត និងមេត្តាដល់មនុស្សខុសអស់ទៅតាផងទាំងឡាយ ព្រះពុទ្ធនោះប្រៀបដូចបុគ្គលមានចិត្តគិតដល់ប្រយោជន៍ខ្លួននិងប្រយោជន៍អ្នកដទៃ ដូចជាជនដទៃគិតតែប្រយោជន៍ខ្លួន និងកូនប្រពន្ធ ញាតិមិត្រទាំងឡាយ មិនបានគិតឲ្យអ្នកដទៃចម្រើនផង គិតឲ្យចម្រើនតែខ្លួន ១ ឯព្រះពុទ្ធអង្គនោះទ្រង់មេត្តាគ្រប់សត្វមិនថាមនុស្សជាទោសនិងព្រះអង្គ ឬ មិត្រនិងព្រះអង្គនោះក៏ទេ ព្រះអង្គក៏ទ្រង់ញុំាងព្រះទ័យឲ្យស្មើ ១ ទៀតថា ឲ្យយកព្រះអង្គជាទីពឹងនោះ សូម្បីតែសុខក្នុងលោកនេះ អាស្រ័យព្រះនាមព្រះអង្គក៏មានកុំថាឡើយតែធ្វើឲ្យឃើញច្បាស់ក្នុងចិត្ត សូម្បីគ្រាន់តែចាំពាក្យព្រះអង្គឲ្យច្រើនទៅ ក៏បានប្រយោជន៍ច្រើនដូចជាអ្នកកាន់គេទបព្វជិត ជាភិក្ខុជាសាមណេរ គ្រាន់តែកាន់ច្បាប់ក្បួនពាក្យប្រដៅរបស់ព្រះពុទ្ធអង្គប៉ុណ្ណោះ ក៏

មានសេចក្តីសុខជាជាងអ្នកដទៃ  ទើធ្វើចិត្តនិងបញ្ញាឲ្យឃើញច្បាស់  ក្នុងព្រះអង្គផង  លាភសក្ការៈនិងសេចក្តីសរសើរ  និង សេចក្តីសុខកើតមានឡើង  ដល់អ្នកដែលឃើញព្រះពុទ្ធច្បាស់នោះឥតឧបមា  ហេតុនោះបានជាអ្នកជឿព្រះពុទ្ធច្បាស់ លះសម្បត្តិទ្រព្យ  និងមិនស្រឡាញ់រូបរាងកាយជាដើម  ហើយមិនប្រព្រឹត្តខុសបាកច្បាប់ព្រះពុទ្ធផង ។

១- ទៀតព្រះពុទ្ធនោះ  ជាអ្នកនាំដំណើរល្អហើយពិតផង  មិនបន្ទុំដូចជាគ្រូដទៃបើនឹងនាំដំណើរមែនក៏ខ្វះពិត  បើបានពិតខ្វះមែន  ព្រោះមិនបាំងទោសរបស់ខ្លួន សួរថាដំណើរមិនមែន ហើយពិតនោះយ៉ាងដូចម្តេច? កែថា មែននោះបានទឹងល្អកាយ និងវាចា ដូចជារបៀបរៀបរយនាំឲ្យដេកដើរឈរគង្គុយបរិភោគស្លៀកដណ្តប់មើល ឬ លិទ្ធហិតពាល់ត្រូវ និងពោលវាចានិយាយស្តីសូត្ររៀនរៀបរយតាមត្រូវត្រង់ដែលគ្មានទោសនេះ ចាត់ជារបស់មែន ។ នេះព្រះអង្គសម្តែងផ្លូវសីល  ក៏ប្រតិបត្តិឲ្យកាយ និងវាចារៀបរយល្អ  ដូចជារបៀបគតិលោក  បង្ហាត់បង្ហាញផ្លូវវិជ្ជាបំណោះ  នឹងសំលៀកបំពាក់ផ្ទះសម្បែង ផ្លូវថ្នល់ សួនច្បារ ឃើញល្អមែនគ្មានទាស់នោះ
១ របស់ពិតនោះបានខាងផ្លូវ មនោ ពោលគឺចិត្ត ។ នោះត្រង់តាមច្បាប់សម្រាប់ទៅព្រះនិព្វាន  គ្មានល្អៀងដូចជាអ្នករក្សាច្បាប់សម្រាប់ព្រះនគរបើមិនឲ្យភ្លាត់ល្អៀងហើយ  និង  បានរួចអំពីទុក្ខទោសជាប់គុកជាដើម និងបានសុខជានិច្ច  ព្រមទាំងបុត្រភរិយាផ្ទះគេហស្ថានរបស់ខ្លួន  របស់មែនហើយពិតផងនោះ គឺកាយ និងវាចា មិនបានភាន់ទឹងអ្នកដទៃ  ចិត្តក៏ស្ងប់

សៀមនិង ដោយប្រាកដច្បាស់ ទើបថាមែនហើយពិតផង ឯព្រះធម៌នេះសម្រាប់ឲ្យមនុស្សឃើញទុក្ខឃើញសុខ ដូចជាឃើញព្រះពុទ្ធ បើឃើញព្រះពុទ្ធគង់ឃើញព្រះធម៌ ហើយគង់ឃើញព្រះសង្ឃ ឃើញទុក្ខហើយ ក៏គង់ឃើញសុខ ឃើញល្អហើយក៏គង់ឃើញអាក្រក់ផង ព្រះធម៌នោះគឺធ្វើឲ្យត្រូវតាមព្រះសូត្រព្រះបរមត្ថដែលជារបស់ព្រះពុទ្ធអង្គទ្រង់សម្តែងទុកមក ព្រះធម៌បើនឹងពោលដោយពិត ថាធំជាងព្រះពុទ្ធនិងព្រះសង្ឃ ព្រះធម៌មិនចេះស្លាប់ ជារបស់ឋិតនៅសម្រាប់ទ្រទ្រង់មនុស្សសត្វផង ឲ្យចេញរួចចាកទុក្ខ និព្វាន តែព្រះពុទ្ធ និង ព្រះសង្ឃ ព្រះធម៌នោះបើអ្នកចង់ដឹងចង់ឃើញឲ្យទន្ទេញឲ្យចាំ លះបង់ទុច្ចរិតបន្តិចម្តង ១ គង់នឹងឃើញគុណ ហើយបានសេចក្តីសុខ ក្នុងលោកិយនិងបរលោកពុំលែងឡើយ ហេតុនោះអ្នកដែលឃើញព្រះធម៌ប្រាកដ មិនមានស្តាយជីវិតសម្បត្តិទ្រព្យជាដើម ហើយបណ្តាលឲ្យអស្ចារ្យផង ឯព្រះសង្ឃនោះយកតែភេទអ្នកបួស ហើយប្រតិបត្តិឲ្យល្អត្រូវត្រង់នឹងចេញចាកទុក្ខ និងសមគួរដល់ព្រះនិព្វាន ព្រះសង្ឃមាន ២ ពួក គឺ អរិយសង្ឃ ១, សម្មតិសង្ឃ ១, ឯ សម្មតិសង្ឃនោះអាស្រ័យភេទអ្នកបួស ប្រតិបត្តិជាប់ចូលដោយពូជវង្ស ពីព្រះអរិយជាដើម មិនដាច់ទៅដោយពូជវង្ស គលដ្ឋីពួកវិធីបុគ្គលយកតែអ្នកប្រកបដោយអង្គ ៤ ដូចក្នុងគម្ពីរបរិវារថា បរាហុទាលេ អង្គេហិ សមណ្ណាគតោ ភិក្ខុ ថាម្នាលឧបាលិ ភិក្ខុប្រកបដោយអង្គ ៤ ទើបឡើងជាភិក្ខុ ភិក្ខុ ៤ អង្គឡើងទៅហៅថាសម្មតិសង្ឃ សរណគមន៍មាន ២ គឺជាលោកុត្តរ

១, ជាលោកិយ ១, សរណគមន៍ ជាលោកិយមាន ៤ គឺ អត្តនិយ្យាតន ប្រគល់កាយថ្វាយជីវិតដល់ព្រះរតនត្រៃ ១, សិស្សភាវូបគមន ថ្វាយខ្លួនជាសិស្សដល់ព្រះរតនត្រៃ ១, តប្បរាយណ រមែងកប់អានព្រះរតនត្រៃជាដំបូង ១, បាណិបាត មិនសំពះគ្រូដទៃក្រៅចាកព្រះរតនត្រៃ ១, យកព្រះពុទ្ធ ព្រះធម៌ ព្រះសង្ឃ ជាទីពឹង គោរពថ្វាយខ្លួនចំពោះមុខព្រះភិក្ខុសង្ឃតាំងតែពី ៤ អង្គឡើងទៅ ដោយបាលីថាដូច្នេះ អច្ចយោ មំ ភន្តេ អច្ចគមា យថាពាលំ យថាមូឡ្ហំ យថាអកុសលំ យោ អហំ ភន្តេ ជាតិតោបដ្ឋាយ បមាទំភរកម្ម កាយេនវា វាចាយវា មនសាវា ពុទ្ធេវា ធម្មេវា សំឃេវា អគារវំ អការឹ សម្មុខាបិ បរម្មុខាបិ សាធុមេ ភន្តេ សំឃោ-អច្ចយំ អច្ចយតោ បដិគណ្ហាតុ អាយតឹ សំវរាយ ប្រែថាបពិត្រព្រះសង្ឃដ៏ចម្រើនអើយ រីទោសខុសដែលខ្ញុំបានប្រព្រឹត្តលើសលោះកន្លងហួសទៅហើយ តែខ្ញុំព្រះករុណានេះជាមនុស្សពាលដូចម្តេច ជាមនុស្សវង្វេងដូចម្តេច ជាមនុស្សមិនឆ្លាស់ដូចម្តេច ចាប់ដើមតាំងអំពីកើតមកក្នុងជាតិនេះ ដោយសេចក្តីប្រមាទ សេចក្តីពុំបានគោរពក្នុងព្រះពុទ្ធខ្លះ ក្នុងព្រះធម៌ខ្លះ ក្នុងព្រះសង្ឃខ្លះ ដោយកាយខ្លះ ដោយវាចាខ្លះ ដោយចិត្តខ្លះ ចំពោះមុខខ្លះ កំបាំងមុខខ្លះ ឥឡូវនេះខ្ញុំព្រះករុណាដឹងនូវទោសខ្លួន ជាខុសប្រាកដ ហើយទើបមកសម្តែងទោសចំពោះមុខព្រះភិក្ខុសង្ឃ សូមព្រះ

សង្ឃប្រទទួលគឺអត់ទោសនោះដល់ខ្ញុំព្រះករុណា ដើម្បីនឹងសង្រួមតទៅក្នុងឯមុខនោះហោង លោកទទួលថាសាធុ ហើយសូត្របាលីតទៅទៀតថា ឯតេមយំភន្តេ សុចិរបរិនិព្វុតម្បិ បពិត្រព្រះសង្ឃដ៏ចម្រើនអើយ យើងខ្ញុំទាំងឡាយនេះ សូមដល់ព្រះដ៏មានបុណ្យ ដែលព្រះអង្គបរិនិព្វានកន្លងទៅហើយអស់កាលដ៏យូរ តំភគវន្តំសរណំគច្ឆាមិ ខ្លួនខ្ញុំទាំងឡាយ ក៏សូមដល់ព្រះអង្គថាជាទីពឹង ទីរឭកកំចាត់ភ័យមែនពិត ធម្មញ្ចភិក្ខុសំឃញ្ច ព្រមទាំងព្រះសទ្ធម្មនូវព្រះសង្ឃសាវកនៃព្រះដ៏មានបុណ្យផង ឧបាសកេ នោ សំឃោ ធារេតុ សូមព្រះសង្ឃបូលចាំទុក ថាខ្ញុំព្រះករុណាទាំងឡាយជាឧបាសក អជ្ជតគ្គេ បាណុបេតេ សរណំគតេ ខ្លួនខ្ញុំព្រះករុណាទាំងឡាយសូមដល់នូវព្រះរតនត្រៃទាំង ៣ ថាជាទីពឹង ទីរឭកស្មើដោយជីវិត ដរាបតាំងអំពីថ្ងៃនេះទៅហោង លោកទទួលថា សាធុ ហើយសុំសីលតាមថ្ងៃឧបោសថជានិច្ច បើឧបាសកឧបាសិកាមានសទ្ធាខ្លាំង នឹងរក្សាអតិរេកសីលតទៅ ក៏គួរសមាទានអំពីភិក្ខុ ឯអតិរេកសីលគឺថាឲ្យវៀរសម្លាប់សត្វ ១ លួចទ្រព្យគេ ១, សេពមេថុន ១, និយាយកុហកមុសាវាទ ១, ផឹកសុរា ១, បរិភោគក្នុងវិកាល ១, មើលរាំស្តាប់ច្រៀង ១, តែងគ្រឿងក្រអូប ១, ដេកលើពូកគ្រែតាំងជើងខ្ពស់ ១, ទទួលមាសប្រាក់ដោយខ្លួនឯង ១ រួមជា ១០ នឹងរក្សានូវភេទជាគ្រហស្ថ មិនបាច់បួសនៅតែក្នុងភូមិជាសាមណេរ ។

# រឿងសរណាគមន៍បប់

១- ទៀតខ្ញុំសូមជម្រាប អ្នកដែលបានចូលធ្វើសៀវភៅកម្ពុជសុរិយា ក្នុងព្រះរាជបណ្ណាល័យ សូមឲ្យមើលឲ្យចប់សេចក្ដី ទើបនឹងឃើញប្រយោជន៍ច្រើន ហើយកើតជាអ្នកប្រាជ្ញពុំលែងឡើយ ហើយថាកម្ពុជឧបត្ថម្ភកទំនុកបម្រុង នៃជាតិនិងស្រុកឲ្យរុងរឿងផង ។

ព្រះមហារាជធម្ម ឱត



# អំពី អវិជ្ជា និង វិជ្ជា

## មហាវារសំយុត្តខ្សែ ១៦ និង បដិសម្ភិទាខ្សែ ៥

ព្រះញាណបវរវិជ្ជា អែម

ចាងហ្វាងសាលាបាលីជាន់ខ្ពស់ អធិប្បាយ

---

មហាវារសំយុត្តខ្សែ ១៦ សម្ដែងថាមានភិក្ខុ ១ អង្គ មាននាមនិង គោត្រមិនប្រាកដ ទូលសួរព្រះដ៏មានព្រះភាគ កាលដែលព្រះអង្គគង់នៅវិហារព្រះជេតពន នគរសាវត្ថី ដោយបាលីថា ៖

អវិជ្ជា អវិជ្ជាតិ ភន្តេ វុច្ចតិ កតមា នុ ខោ ភន្តេ អវិជ្ជា
កិត្តាវតា ច អវិជ្ជាគតោ ហោតិ ។

ប្រែថា បពិត្រព្រះដ៏មានបុណ្យដ៏ចម្រើន ការល្ងង់ខ្លៅមិនដឹង ព្រះអង្គពោលឲ្យឈ្មោះថាអវិជ្ជា បពិត្រព្រះដ៏មានបុណ្យដ៏ចម្រើន អវិជ្ជានោះតើដូចម្ដេច ? បុគ្គលដែលលុះក្នុងអំណាចនៃអវិជ្ជា មានដោយហេតុប៉ុន្មានយ៉ាង ? ។

ព្រះដ៏មានព្រះភាគព្រះអង្គសម្ដែងវិសជ្ជនាថា :

យំ ខោ ភិក្ខុ ទុក្ខេ អញ្ញាណំ ទុក្ខសមុទយេ អញ្ញាណំ ទុក្ខនិរោធេ អញ្ញាណំ ទុក្ខនិរោធគាមិនិបដិបទាយ-អញ្ញាណំ អយំ វុច្ចតិ ភិក្ខុ អវិជ្ជា ឯត្តាវតា ច អវិជ្ជាគតោ ហោតិ ។

ប្រែថា : ម្នាលភិក្ខុ សេចក្ដីល្ងង់ពុំដឹងច្បាស់ក្នុងកងទុក្ខឯណាមែនពិត សេចក្ដីល្ងង់ពុំដឹងច្បាស់ក្នុងសភាវៈគឺតណ្ហា ជាទីប្រជុំបណ្ដាលឲ្យកើតឡើងនូវកងទុក្ខឯណាមែនពិត សេចក្ដីល្ងង់ពុំដឹងច្បាស់ក្នុងឧបាយជាទីរំលត់នូវកងទុក្ខឯណាមែនពិត សេចក្ដីល្ងង់ពុំដឹងច្បាស់ក្នុងបដិបទាជាផ្លូវទៅកាន់ទីរំលត់នូវកងទុក្ខឯណាមែនពិត ម្នាលភិក្ខុ សេចក្ដីល្ងង់ពុំដឹងច្បាស់ ៤ យ៉ាងនេះព្រះតថាគតពោលឲ្យឈ្មោះថាអវិជ្ជា បុគ្គលដែលលុះអំណាចនៃអវិជ្ជាដោយហេតុមានប្រមាណប៉ុណ្ណោះឯង ។ ភិក្ខុនោះ ទូលសួរនូវវិជ្ជាតទៅទៀត ដោយបាលីថា ៖

វិជ្ជា វិជ្ជាតិ ភន្តេ វុច្ចតិ កតមា នុ ខោ ភន្តេ វិជ្ជា
កិតាវតា ច វិជាគតោ ហោតិ ។

ប្រែថា : បពិត្រព្រះដ៏មានបុណ្យដ៏ចម្រើន កិរិយាដែលចេះដឹងច្បាស់ ព្រះអង្គពោលឲ្យឈ្មោះថាវិជ្ជា បពិត្រព្រះដ៏មានបុណ្យដ៏ចម្រើន វិជ្ជានោះតើដូចម្ដេច ? បុគ្គលដែលលុះក្នុងអំណាចនៃវិជ្ជា កើតមានដោយហេតុប៉ុន្មាន ? ព្រះដ៏មានព្រះភាគព្រះអង្គសម្ដែងវិសជ្ជនាថា ៖

យំ ខោ ភិក្ខុ ទុក្ខេ ញាណំ ទុក្ខសមុទយេ ញាណំ
ទុក្ខនិរោធេ ញាណំ ទុក្ខនិរោធគាមិនិបដិបទា
យ ញាណំ អយំ វុច្ចតិ ភិក្ខុ វិជ្ជា ឯតាវតា ច វិជ្ជាគតោ
ហោតិ ។

ប្រែថា : ម្នាលភិក្ខុ សេចក្តីចេះដឹងច្បាស់ក្នុងកងទុក្ខឯណាមែនពិត សេចក្តីចេះដឹងច្បាស់ក្នុងសមការៈ គឺតណ្ហាជាទីប្រជុំបណ្តាលឲ្យកើតឡើងនូវកងទុក្ខឯណាមែនពិត សេចក្តីដឹងច្បាស់ក្នុងឧបាយជាទីរំលត់នូវកងទុក្ខឯណាមែនពិត សេចក្តីដឹងច្បាស់នូវផ្លូវប្រព្រឹត្តទៅកាន់ទីរំលត់ទុក្ខឯណាមែនពិត ម្នាលភិក្ខុសេចក្តីចេះដឹងច្បាស់ទាំង ៤ យ៉ាងនេះ ព្រះតថាគតពោលឲ្យឈ្មោះថាវិជ្ជា បុគ្គលដែលដល់នូវវិជ្ជា កើតមានដោយហេតុមានប្រមាណប៉ុណ្ណោះឯង ។

មួយវិញទៀត ក្នុងគម្ពីរ បដិសម្ភិទា ខ្ស ៩ ព្រះសម្មាសម្ពុទ្ធ ព្រះអង្គសម្តែងនូវទោសនៃអវិជ្ជាមាន ៥ ដោយបាលីថា ៖

បញ្ចហាការេហិ អវិជ្ជាយ អាទីនវោ ហោតិ

ប្រែថា : ទោសរបស់អវិជ្ជា កើតមានដល់សត្វ ដោយអាការទាំងឡាយ ៥ យ៉ាង ។

កតមេហិ បញ្ចហាការេហិ អវិជ្ជាយ អាទីនវោ ហោតិ
អនិច្ចដ្ឋេន អវិជ្ជាយ អាទីនវោ ហោតិ ទុក្ខដ្ឋេន អវិជ្ជា-
យ អាទីនវោ ហោតិ អនត្តដ្ឋេន អវិជ្ជាយ អាទីនវោ
ហោតិ សន្តាបដ្ឋេន អវិជ្ជាយ អាទីនវោ ហោតិ វិប-
រិណាមណាដ្ឋេន អវិជ្ជាយ អាទីនវោ ហោតិ ឥមេហិ
បញ្ចហិ អាការេហិ អវិជ្ជាយ អាទីនវោ ហោតិ ។

ប្រែថា : ទោសរបស់អវិជ្ជាកើតមានដល់សត្វ ដោយអាការតាំងឡាយ ៤ យ៉ាងដូចម្តេចខ្លះ? វិសជ្ជនាថា ទោសរបស់អវិជ្ជាកើតមានដល់សត្វ ដោយអត្ថថាញុំាងសត្វមិនឲ្យតាំងនៅជានិច្ចមួយ ទោសរបស់អវិជ្ជាកើតមានដល់សត្វ ដោយអត្ថថា ញុំាងសត្វឲ្យដល់នូវសេចក្តីទុក្ខ ប្រព្រឹត្តទៅក្នុងកាយនិងចិត្តមួយ ទោសរបស់អវិជ្ជាកើតមានដល់សត្វដោយអត្ថថា ញុំាងសត្វឲ្យមានតែស្រាយៗ មិនឲ្យមានខ្លឹមសារមួយ ទោសរបស់អវិជ្ជាកើតមានដល់សត្វ ដោយអត្ថថា ញុំាងសត្វឲ្យក្តៅក្រហាយសព្វប្រព្រឹត្តទៅក្នុងកាយនិងចិត្តជានិច្ចមួយ, ទោសរបស់អវិជ្ជាកើតមានដល់សត្វដោយអត្ថថា ញុំាងសត្វឲ្យទ្រុឌទ្រោមពាស់ដកគ្រាំគ្រាប្រែប្រួលទៅជាប្រក្រតីមួយ, ទោសរបស់អវិជ្ជាកើតមានដល់សត្វដោយអាការតាំងឡាយ ៤ យ៉ាងនេះឯង ។

អវិជ្ជាដែលនឹងរំលត់សូន្យទៅដោយអាការ ៨ យ៉ាងដោយបាលីថា៖

កតមេហិ អដ្ឋហិ អាការេហិ អវិជ្ជា និរុជ្ឈតិ និទាននិរោធេន អវិជ្ជា និរុជ្ឈតិ សមុទយនិរោធេន អវិជ្ជា និរុជ្ឈតិ ជាតិនិរោធេន អវិជ្ជា និរុជ្ឈតិ ហេតុនិរោធេន អវិជ្ជា និរុជ្ឈតិ បច្ចយនិរោធេន អវិជ្ជា និរុជ្ឈតិ ញាណុប្បាទេន អវិជ្ជា និរុជ្ឈតិ

និរោធុបដ្ឋានេន អវិជ្ជា និរុជ្ឈតិ ឥមេហិ អដ្ឋហិ-
អាការេហិ អវិជ្ជា និរុជ្ឈតិ ។

ប្រែថា អវិជ្ជារលត់សូន្យទៅ ដោយអាការទាំងឡាយ ៨ យ៉ាងដូចម្តេច? វិសជ្ជនាថា អវិជ្ជារលត់សូន្យទៅ ដោយកិរិយារលត់នូវនាមនិងរូប ដែលជាទីតាំងកើតឡើងនៃកងទុក្ខ ១ អវិជ្ជារលត់សូន្យទៅ ដោយកិរិយារលត់នូវសភាវៈគឺតណ្ហា ដែលជាទីប្រជុំកើតឡើងនៃកងទុក្ខ១ អវិជ្ជារលត់សូន្យទៅ ដោយកិរិយារលត់នូវជាតិ ១ អវិជ្ជារលត់សូន្យទៅ ដោយកិរិយារលត់នូវបច្ច័យ គឺអាហារ និង ផស្ស និង នាមរូប ១ អវិជ្ជារលត់សូន្យទៅ ដោយកិរិយាកើតឡើងនៃញាណគឺប្រាជ្ញដ៏ច្បាស់ ១ អវិជ្ជារលត់សូន្យទៅ ដោយកិរិយាបង្កើតឡើងប្រាកដនៃនិរោធ ១ ថែមអវិជ្ជា ១ ទៀតដែលជាមេដើមរលត់សូន្យទៅដោយធម៌ទាំង ៧ ខាងដើមនេះត្រូវជា ៨ អវិជ្ជារលត់សូន្យទៅ ដោយអាការទាំងឡាយ ៨ នេះ ។

## សម្តែងអំពីអវិជ្ជា និង វិជ្ជាចប់សេចក្តីជាសង្ខេបប៉ុណ្ណោះ



# អំពីដើមកំណើតប្រាសាទអង្គរ

---

លោក ល្វី ហ្វ៊ីណូត៍

អាចារ្យបង្រៀនឧត្តមវិជ្ជាសាល កូឡែសដឺហ្វ្រង់ស្សនៅក្រុងបារីស

ជាអ្នកអធិប្បាយ

ក្រមការ ជុំ-ម៉ៅ

ធ្វើរាជការនៅព្រះរាជបណ្ណាល័យ ប្រែចេញជាភាសាខ្មែរ

១

ដែលតាមគេជឿដរាបដល់មកសព្វថ្ងៃនេះ ថាអង្គរធំនិងបាយ័ននោះ ព្រះបាទយសោវរ្ម័ន ទ្រង់នាមថា បរមសិវលោកដែលគ្រងរាជ្យពីសករាជ ៨១១ ទៅដល់៨៣២ បានសាង ត្រូវនឹងគ្រិស្តសករាជ ៨៨៩ ទៅ ៩១០ ។

## តើបានអ្វីនឹងបញ្ជាក់ក្នុងរឿងនេះ

កាលដើម ឈ្មោះចាស់របស់ទីក្រុង ហៅថាយសោធរបុរ គឺក្រុងនៃយសោធរ មានប្រាសាទជាច្រើនក្នុងដំបន់អង្គរដែលមានឈ្មោះបូលក្នុងបែបតែមួយដូចយ៉ាងឈ្មោះ យសោធរតដាក ប្រែថាត្រពាំងនៃសោធរ ឯត្រពាំងនោះគឺបារាយណ៍ខាងកើត យសោធរេស្វរ ប្រែថាឥសូរនៃយសោ

ធរ គឺភ្នំបាខែង យសោធរាស្រម គឺអាស្រមនៃយសោធរ ឈ្មោះត្រង់នេះ មិនប្រាកដទៅលើភ្នំឡើយ ខាងក្រោយនេះមានយសោធរគិរី ប្រែថាភ្នំនៃយសោធរ គឺជាភ្នំបាយ័ននោះឯង ពាក្យដែលថា យសោធរនេះ ប្រែថាកាន់នៅជ័យជម្នះ ជាពាក្យបំបែករបស់ស្តេចយសោវរ្ម័ន អំពីកប៉ាល់ជ័យមក ឯពាក្យដែលថា សោធរបុរ នោះ គឺជាឈ្មោះទីក្រុងរបស់ យសោវរ្ម័ន នោះឯង ។

ម្យ៉ាងវិញទៀត ដូចជាប្រាសាទជាច្រើនផ្សេង ៗ ដែលមាន ឈ្មោះប្តូលក្នុងពាក្យ យសោធរ នោះជារបស់ដែលយសោវរ្ម័ន បានសាងក៏គួរតែសន្និដ្ឋានឲ្យសេចក្តីថា ពាក្យដែលថាទីក្រុងរបស់យសោវរ្ម័ននោះជាក្រុងដែលយសោវរ្ម័នបានសាងវិញ ។

មកដល់ស្តេចនេះ យើងត្រូវឈប់បន្តិចសិន ព្រោះរឿងរ៉ាវស្តេចនេះ មិនមែនជាឥតប្រយោជន៍ យើងបានដឹងខ្លួនល្មមអំពីពង្សាវតាររបស់ស្តេចនេះ គឺជាបុត្រឥន្ទ្រវរ្ម័ន បានកសាងប្រាសាទបាគោ និង បាគង ទ្រង់បានឡើងគ្រងរាជ្យតាំងពីកុមារ ហើយគ្រងរាជសម្បត្តិបាន ២០ ឆ្នាំគិតតាំងពីសករាជ ៨១៩ បើតាមសង្កេតពិចារណាទូវចារឹក ដែលមានជាច្រើនហើយវែង ៗ របស់ស្តេចនេះ ឃើញថាស្តេចនេះ ប្រកបទៅដោយសេចក្តីអស្ចារ្យដ៏ខ្លាំង ស្តេចស្រុកខ្មែរ និងស្តេចស្រុកឥណ្ឌា មិនដែលឃើញមានគរិយោស្កាតដល់ម្តងសោះ បានជា អស់តាំងរឿងរ៉ាវដែល

មានគេ ៗ មក ឃើញតែមាននិយាយសរសើរម្ចាស់ផែនដីជាប្រមាណ គន្ធ
សិលាចារឹកណា ៗ ក៏ដោយឃើញមាននិយាយតែសរសើរចូលជាដែចមិន
ទំនង់ជាភាពមនុស្ស ដូចជាសរសើរថាស្ដេចនោះដូចព្រះអាទិត្យមានរស្មី
ហើយមានអានុភាពដូចព្រះចន្ទពេញបូណ៌មី រូបល្អដូចជាទេវតា ព្រះ
ក្លោះសរនោះ អាចនឹងគ្រប់គ្រងចក្រវាឡបាន ក្រចកព្រះបាទដូចជា
កញ្ចក់ ឆ្ពោះមុខស្ដេចទាំងឡាយដែលប្រណម្យគាល់ ៗល ៗ ពាក្យទាំងនេះ
គង់មានក្នុងរឿងកាំ នឹងយកជាពិតពុំបានត្បិតជាពាក្យបញ្ចើចសរសើរ
ម្ចាស់ផែនដីរៀងរៀងដរាបមក ប៉ុន្ដែស្ដេចយសោវរ្ម័ននេះ ទុកជាពួកស្ដេច
ដែលមានឥទ្ធិឫទ្ធិខាងផ្លូវចម្បាំងបាន ត្បិតមានល្បីថាទ្រង់ប្រសប់ខាងធ្នូ
និងបាញ់ព្រួញដៃខាងណាក៏បាន ទ្រង់មានកម្លាំងអាចនឹងទប់ទល់ដំរីសារ
សាហាវហើយសម្លាប់តែ ១ ព្រះអង្គដោយព្រះហស្ដទទេផង ទ្រង់អាចនឹង
តយុទ្ធជាមួយនឹងអ្នកចំបាំង១០ នាក់ ហើយផ្តួលបានទាំងអស់ដោយស្រួល
គេជានុភាពរបស់ស្ដេចនេះ បណ្ដាលឲ្យអ្នកសរសើរហាក់ប្រដូចថាទ្រង់
កាប់ដែកម្ពូល ៤ ដៃធំ ហើយនឹងតែ ១ ព្រះអង្គដាច់ជា ៣ កំណាត់ហាក់
ដូចជាផ្ទាំងដែកនោះមិនឲ្យមកប្រកួតប្រឡងនឹងព្រះចេស្ដា ត្រង់នេះលោក
អេមូនីយល់ថា បែបដែលនិយាយនេះជាល្បែង ដែលជាតិខ្មែរសព្វថ្ងៃ
ធ្លាប់លេងជាញឹកញាប់ គឺយកដើមកំពោតមកបង្កាន់ទៅលើដី ហើយកាប់
កំពោតនោះជា ៣ កំណាត់ អំពោតនេះហើយដែលគេថាទៅជាដែកវិញ

មិនតែប៉ុណ្ណោះសោត មានសេចក្ដីសរសើរដល់ស្ដេចអង្គនេះ និយាយថា ទ្រង់ចេះវិជ្ជាតខាងឯភ្លេង ជាគ្រូបាំ ជាអ្នកប្រាជ្ញខាងបរមត្ថនិងជាអ្នកតែងវេយ្យាករណ៍ និងសេចក្ដីអធិប្បាយ អំពីមហាភាស្សរបស់បតញ្ជលី ត្រង់នេះយើងបានពិនិត្យមើលហើយ ឯមហាភាស្សនៅមានសព្វថ្ងៃនេះ គឺជាសេចក្ដីធំពិបាក ជាងអស់ទាំងសាស្ត្រាសំស្ក្រឹតទាំងពួង ក្នុងសម័យនោះបើថាមានសាស្ត្រាជាអក្សរសំស្ក្រឹត ហើយដាក់ព្រះនាមស្ដេចជាអ្នកតែងក៏ជាបាន ប៉ុន្តែក្នុងព្រះវង្សក្សត្រិយ៍ពុំសូវដែលឃើញមានប្រាជ្ញខាងឯអក្សរ ហើយ ១ វិញទៀត អ្នកប្រាជ្ញខាងអក្សរក៏ពុំសូវដែលឃើញចិត្តកំណាញ់ នឹងដាក់ព្រះនាមស្ដេចដែលជាចៅហ្វាយខ្លួនថាជាអ្នកតែងឡើយ ហេតុនេះបានជាយើងគប្បីជឿច្បាស់ថា អ្នកដែលតែងសេចក្ដីអធិប្បាយ នៃមហាភាស្សរបស់បតញ្ជលីនេះ មិនមានពាក់ម្ពុជហើយមិនមែនឈ្មោះយសោវរ្ម័ននោះទេ ។

ចុះបើក្សត្រនេះហ៊ានដល់ទៅ យករបស់គេ មកថាជារបស់ខ្លួនបាន ថ្វីហើយក៏មិនហ៊ានអួតថាបានសាងអង្គរធំ ដែលជារបស់ក្សត្រដទៃ យើងមានសេចក្ដីសង្ស័យមកយូរណាស់ហើយ បើយសោវរ្ម័នមានតែនាមជាបន្ទាល់ថាបានសាងក្រុងនោះ នាមនោះ ក៏មិនជាប៉ុន្មាន តែថាកសិណា ១ ទៀតដែលជារបស់អាង យ៉ាងមាំអាចនឹងនាំឲ្យក្លីជាប្រាកដ គឺសិលាបារីនៅស្តុកកក់ធំ ។

គេបានឃើញចម្ងាយ ២៥ គីឡូម៉ែត្រ ខាងទិសពាយ័ព្យស្រុកស៊ីសុផុន នៅក្នុងហៅស្តុកកក់ធំ គោលថ្ម១ ចារឹកជាពាក្យខ្មែរសំស្ក្រឹត ដែលមានសេចក្តីប្លែកពីចារឹកទាំងឡាយ ក្នុងស្រុកខ្មែរ ហើយមានសេចក្តីល្អៗ ជាច្រើន គោលនេះបានចាប់ធ្វើក្រោយសកកាល ៩៧៤ បន្តិច គឺក្នុងគ្រិស្តសកកាល ១០៥២ មានឈ្មោះសទាសិវជាបុរោហិតរបស់ស្តេចជាអ្នកសរសេរ បុរោហិតនេះជាជំនាន់មកពីបុរោហិតមុខ ហើយដែលកាន់កាប់ការតាមដំណែលមុខក្រសួង ពីអាពុកម្តាយ គឺជាពង្សាវតារនៃពួកបុរោហិតក្នុង ២៥០ ឆ្នាំ ពីសកកាល ៧២៤ ទៅដល់ ៩៧៤ ត្រូវនឹងគ្រិស្តសកកាល ៨០២ ទៅដល់ ១០៥២ ពង្សាវតារនេះ មានឈ្មោះបុរោហិតធំៗ ទាំងអស់ ដែលបានគោរពប្រតិបត្តិក្នុងការងារ មាននាមស្តេចដែលបុរោហិតណានៅធ្វើការងារ និងការទិញទ្រព្យរបស់ដែលបានទទួល ភូមិទិង ប្រាសាទដែលបានកសាង សេចក្តីទាំងនេះ សុទ្ធតែជាការពិត មិនគួរសង្ស័យថាក្រែងធ្វើតែតាមពង្សាវតារខ្លួនទេ ពង្សាវតារនេះមានភ័ស្តុតាង មានតម្លៃណាស់ នេះហើយដែលយើងមើលក្នុងសព្វខ្មែរ អំពីរឿងយសោវរ្ម័ន ដែលមាននាមក្រោយ បរមសិវលោក ។

សព្វនេះមិនមែនធ្វើត្រាប់ឲ្យផ្ទិចទេ គ្រាន់តែជាការជួយណែនាំអ្នកប្រែចារឹកនោះចេញពីថ្ម :

មន ព្រះបាទ បរមសិវលោក ចតនគរស្រី យសោធរបុរ នាំគម្រ តេង ជគត គពជ អំរី ហារិហារាលយ យកទុក នគរនោះ មនព្រះបាទ

បរមសិវលោក ស្ថាបនា ក្នុន្ដាល គម្រតេង សិវស្រម ស្ថាបនា ព្រះ-លិង្គស្យ កន្ដាល ។

ប្រែថាព្រះបាទបរមសិវលោកសាង(បត) ក្រុងយសោធរបុរៈហើយនាំនូវស្ដេចទេវតា (កម្រតេង ជគត តរាជ) ចេញពី ហរិហរាលយ ទៅតម្កល់ទុកក្នុងក្រុងនោះ រួចពីនោះព្រះបាទបរមសិវលោក បានសាងភ្នំកណ្ដាល ( វ៉ិកណ្ដាល ) គឺប្រះតម្លែងសិវស្រម យកព្រះលិង្គទៅដាក់ដាក់កណ្ដាល ។

ឯភ្នំកណ្ដាលដែលពាក្យសំស្រ្កឹតហៅយសោធរគិរី គឺភ្នំយសោធរនោះ គ្មានឯណាក្រៅពីប្រាសាទបាយ័ននោះឡើយ គេឲ្យឈ្មោះថាភ្នំប្រា-សាទឯណាដែលសាងនៅជាកណ្ដាលភូមិ ឬកណ្ដាលទីក្រុង ដើម្បីជាតំណាងភ្នំមេរុ ដែលជាភ្នំនៅជាកណ្ដាលទ្វីបមានទិសាយក្នុងក្បួនវិជ្ជាផ្សេងៗ ក្នុងស្រុកឥណ្ឌា គឺប្រាកដជាកន្លែងដែលមានប្រាសាទបាយ័ននៅសព្វថ្ងៃនេះហើយ នៅត្រង់ខ្សែបន្ទាត់ដែលដឹកខ្សែដើងក្អែក ពីជ្រុងតាំង ៤ មកដូចគ្នា ។

បើប្រែតាមភាសាមានបែបយ៉ាងសព្វថ្ងៃ ហាក់នៅស្ដុកកក់ធំបានសេចក្ដីថាដូច្នេះ យសោវរ្ម័នបានកសាងអង្គរធំនិងបាយ័ន ។

សួរថាចុះព្រះ ដែលអយ្យកោអយ្យិកា សព្វសាវធ្លាប់គោរពប្រតិបត្តិនៅប្រាសាទបាយ័ននោះតើជាព្រះអ្វី ? ឆ្លើយថាគឺជារូបលិង្គ ត្រង់នេះ

យើងមិនបាច់ទៅរកដើមឫសឯណា ដែលនឹងនាំឲ្យងងឹតនោះទេ ព្រោះលឹង្គនេះ ឃើញមានគំរូជាច្រើនណាស់ក្នុងស្រុកចម្ប៉ា និង ស្រុកខ្មែរ យើងត្រូវតែចាំថា កាលពីយូរមកហើយនោះ មានកាន់សាសនាគោរពប្រតិបត្តិលឹង្គដរាបដល់មកវេលានេះ មិនឃើញមានអ្វីជាទីតាស់ទីងសំអាងទាំងនេះឡើយ នៅមានស្ពាន ១ បើមិននាំឲ្យសង្ស័យ ក៏ហាក់ដូចជាប្លែកបន្ទោះដែរ គឺថានៅលើសសរថៃរបាយ័នឃើញមានរូបព្រះពុទ្ធហើយមានថែមពុកចង្ការស្រួចដូចជាឥសី សេចក្តីត្រង់នេះ គេនឹងជឿបានថាក្នុងវេលានោះស្តេចដែលសាងប្រាសាទបាយ័ន បានយកជាងដែលជាពួកកាន់ពុទ្ធសាសនាឲ្យចូលធ្វើផង ថាជាងទាំងនេះ បានរចនានៅទីបន្ទាប់បន្ទៃប្រាសាទនោះ ជាបែបដែលខ្លួនកប់អាន ដូចជាស្តេចដែលកប់អានតុបតែងតាមបែប ដែលកាន់នោះដែរ លុះយូរក្រោយមកចិត្តរបស់ស្តេចយសោវរ្ម័ន ដែលធ្លាប់អធ្យាស្រ័យផ្លាស់ទៅជាចិត្តចង់បំផ្លាញវិញ ដោយកាន់យកជាប្រាកដនូវសាសនាដែលមានរូបជាទីតាំង ហើយមើលទៅរូបព្រះពុទ្ធដែលជាប់ស្រាប់នៅនោះមិនបាន ក៏តាំងចាប់ធ្វើបំបាត់រូបទាំងនោះចេញ ស្ពានត្រង់នេះហាក់ដូចជាពិតត្រាន់បើ ។

ប៉ុន្តែក្នុងឆ្នាំ ១៩២៣ មានរឿង ១ ថ្មីទៀត ថែមទម្ងន់ទៅលើសេចក្តីសង្ស័យនោះ ដើម្បីនឹងឲ្យយល់បាននោះជាការប្រយោជន៍ត្រូវតែបរិយាយបន្តិចអំពីផែនទីប្រាសាទបាយ័ន ។

( មានតទៅក្នុងខ្សែក្រោយទៀត )

សេចក្ដីអធិប្បាយពីសេចក្ដីចម្រើនក្នុងក្រុងកម្ពុជា

របស់លោក **ហង់រី គួរដុង**

*ចាងហ្វាងចាស់ធំបំផុតក្នុងក្រសួងសិក្សាធិការជាសាធារណៈ*

នៅប្រទេសឥណ្ឌូចិន

*ក្រុមការ ជុំ-មៅ ធ្វើរាជការនៅព្រះរាជបណ្ណាល័យ*

*ប្រែជាភាសាខ្មែរ*

អំពីលោក ហាង់រី គួរ ដុង អញ្ជើញមកលេង នៅព្រះរាជបណ្ណាល័យកាលពីថ្ងៃ ៦ អ៊ូត ឆ្នាំ ១៩៦៧ ។

ឈ្មោះរបស់លោក ហាង់រី គួរដុង នេះមិនមែនជាឈ្មោះដែលមិនដែលឮ មិនដែលស្គាល់ដល់អ្នកស្រុកភ្នំពេញ ដែលមានអាយុច្រើន ៗ ឡើយ អ្នកស្រុកភ្នំពេញ នឹងនឹកឃើញដោយជាក់ច្បាស់អំពីដែលលោក គួរដុង អញ្ជើញមកលេងនៅក្រុងភ្នំពេញ កាលក្នុងព្រះពុទ្ធសករាជ ២៤៨៧ ។ ក្នុងកាលនោះ ខ្លួនលោកនៅកំពុងពេញស្វាហាប់ ធ្វើជាចាងហ្វាងសាលាធំបំផុត ក្នុងក្រសួងសិក្សាធិការ ជាសាធារណៈនៅប្រទេសឥណ្ឌូស៊ីន ប្រកបដោយសតិបញ្ញាជ្រៅជ្រះ ហើយមានអាការពងកាយនោះពេញជាបុរសភាព លោកមានសេចក្ដីស្រឡាញ់រាប់អានជាតិខ្មែរពន់ពេកណាស់ ហើយលោកបានធ្វើការជាប្រយោជន៍ ដល់ការសិក្សារបស់ជាតិខ្មែរក្នុងជាន់នោះជាច្រើន ។

លោកបានចូលទៅថ្វាយបង្គំ សម្ដេចព្រះមហាសង្ឃរាជា សង្ឃនាយក ហើយប្រារព្ធប្រាស្រ័យ អំពីការរៀនសូត្រសម្រាប់សាលាវត្ត ដោយយកតាមទំនៀមទម្លាប់សាសនា និងទម្លាប់ស្រុក ហើយថែមវិជ្ជាខ្លះ ដែលនាំឲ្យងាយស្រួលក្នុងការប្រើប្រាស់ជាធម្មតា ។

លោក គួរដុង និងសម្ដេចព្រះមហាសង្ឃរាជ បានចាប់ផ្ដើមតែងសេចក្ដីធ្វើជាក្បួនសម្រាប់ក្មេង ៗ សិក្សា ប៉ុន្តែដោយនគរបាកកំពិសេស

កើតសង្គ្រាម ក៏លោក ក្លូរដុង ចូលទៅឯស្រុកបារាំងសេសវិញ ពាក់សក្តិឧហ្វីស្យេរ មេទាហាន ត្រួតកងទ័ពទៅច្បាំង ក្នុងវេលានោះគ្រាប់បែកខ្មាំងធ្លាក់មកត្រូវដាច់ដៃស្តាំលោកនិងខ្វាក់ភ្នែកម្ខាង ប៉ុន្តែដោយសតិបញ្ញានិងស្មារតីរបស់លោកដ៏ក្លៀវក្លាណាស់ នោះលោកក៏អាចទប់ទល់កំចាត់បង់នូវសេចក្តីឈឺចាប់ទុក្ខសោកចេញ ហើយក៏រស់នៅក្នុងជាតិ ជាអ្នកធ្វើប្រយោជន៍ឲ្យមានដល់ប្រទេសជាច្រើន លោកបានខំប្រឹងធ្វើឲ្យនគរបារាំងសែស ស្គាល់ប្រទេសឥណ្ឌូស៊ីនជាងពីដើមទៅទៀត ហើយតាំងពីចាប់ផ្តើមថ្លែង នូវសេចក្តីអធិប្បាយអំពីប្រយោជន៍ផ្សេង ៗ របស់ប្រទេសឥណ្ឌូស៊ីនជាច្រើន ហើយសេចក្តីដែលថ្លែងនោះ សុទ្ធតែជាសេចក្តីយ៉ាងឯកលេខ ១ ។

ក្នុងវេលានោះ ក្រុងកម្ពុជាខាតយ៉ាងធំ ព្រោះសម្តេចព្រះសង្ឃរាជក៏ទិវង្គតទៅហើយ ឯគំនិតដែលផ្តើមគិតអំពីរៀបចំរបៀបសាលាវត្តនិងបោះពុម្ពសៀវភៅគ្រឿងរៀនជាបឋម ក៏គេភ្លាំងភ្លេចសូន្យឈឹងទៅ ។

នៅវេលាដែលបានឃើញលោក ក្លូរដុង មានដំណើរមកក្រុងភ្នំពេញ ក៏ក្រុមជំនុំប្រឹក្សាការក្នុងព្រះរាជបណ្ណាល័យ ដែលមិនបានភ្លេចគំនិតប្រសើររបស់លោក បានអញ្ជើញលោកចូលមកក្នុងព្រះរាជបណ្ណាល័យ ជាកន្លែងដែលមិត្តចាស់របស់លោកប៉ុន្មានជួបជុំក្នុងទីនោះ អ្នកអង្គម្ចាស់វឌ្ឍនាយាវង្ស ដែលបានជួបនឹងលោកម្តងនៅក្រុងប៉ារីស បាន

ឲ្យពរសព្ទសាធុការដល់លោក ហើយបានអញ្ជើញលោកឲ្យថ្លែងសេចក្ដីអំពីដែលលោកទៅបាត់ពីស្រុកខ្មែរជាយូរឆ្នាំ ហើយត្រឡប់មកវិញសម្គាល់ឃើញសេចក្ដីដែលប្លែកដូចម្ដេចខ្លះ វេលានោះលោកសម្ដែងសេចក្ដីដូចមានខាងក្រោយនេះនៅកណ្ដាលជំនុំពួកមិត្តទាំងឡាយ ។

វេលាណាតែគេចេញពីក្រុងកម្ពុជា ទៅបាត់ជាច្រើនឆ្នាំហើយត្រឡប់ចូលមកវិញដូចយ៉ាងខ្ញុំនេះ នោះគេនឹងប្រទះឃើញសេចក្ដីដែលប្លែកនឹងភ្នែកជាច្រើន នឹងគណនាពុំបាន កន្លែងដែលកាលពីដើមដេរដាសពាសពេញទៅដោយស្មៅនឹងដោយព្រៃនោះ ឥឡូវនេះទៅជាផ្លូវថ្នល់ ព័ទ្ធខ្វាត់ខ្វែងក្នុងទីក្រុង ទៅជាមានរុក្ខជាតិយ៉ាងល្អ ដែលគេដាំជាលំអរ ឬសម្រាប់យកផលបរិភោគវិញ កន្លែងដែលកាលពីដើមជាភូមិរប៉ុចរប៉ោចនោះ ឥឡូវនេះទៅជាផ្លូវថ្នល់ទីក្រុងយ៉ាងធំ ហើយមានគេហស្ថានរចនាដ៏វិចិត្រធ្វើឲ្យទីក្រុងនេះ មានតម្លៃស្មើនឹងទីក្រុងនានា ក្នុងប្រទេសឥណ្ឌូស៊ីន សេចក្ដីដែលបានចម្រើននេះមិនមែនត្រឹមតែឡើយ ឯសតិបញ្ញាក៏បានជឿនលឿនទៅមុខដែរ សាលាសម្រាប់សិក្សាក៏បានបង្កើតឡើងជាច្រើន ហើយបណ្ដាសិស្សឆើតៗក៏ចេញពីសាលាកូឡែសស៊ីសុវត្ថិជាអនេក រីសេចក្ដីចម្រើនទាំងឡាយនេះមានឫសគល់នៅឆ្ងាយណាស់ ហើយឫសគល់ទាំងនោះក៏កើតមកអំពីសេចក្ដីតុបតែងរបស់រាជការប្រតិភូក៏ ដែលបានតាំងបង្កើតឲ្យមានជាយូរអង្វែងណាស់ហើយ

ប៉ុន្តែសេចក្តីដែលប៉ះពាល់ដល់ខ្ញុំក្នុងថ្ងៃនេះជាខ្លាំង  គឺជាសេចក្តីចម្រើន
នេះមិននាំឲ្យខានចម្រើនឬសាបសូន្យវិជ្ជាខ្មែរសុទ្ធឡើយ  ប្រហែល ៣០
ឆ្នាំមកហើយ  នៅក្នុងស្រុកអ្នកសេចក្តីចម្រើននាំឲ្យទទួលយកគំនិតយក
ថែប  យកទម្លាប់របស់បច្ចិមប្រទេសមកវិញ  បោះបង់ទំនៀមទម្លាប់ក្នុង
ស្រុកអស់អ្នកដែលមានពីដើមរៀងមក  ភ្លេចគិតថាតែកាលណាផ្លាស់ភាព
គេទទួលនោះមុខជាផ្លាស់ទាំងចិត្តគំនិតនោះដែរ  ហើយភ្លេចគិតថាដែល
បោះបង់ភាសាខ្លួនទឹងសេចក្តីជំនឿរបស់ខ្លួន  ទៅកាន់យកភាសាផ្សេង
ទឹងគំនិតផ្សេងក្នុងសេចក្តីស៊ីវិល្យដទៃនោះ  មានសណ្ឋានដូចជាដើមឈើ
ដែលរលើងឫសពីដីជាកន្លែងធ្លាប់ដុះ  ហើយដែលមិនអាចនឹងរស់នៅបាន
ក្នុងទីថ្មី  ដែលគេយកទៅដាំឡើយ ។

ខ្ញុំទើបតែនឹងដើរគ្រប់សព្វ  ក្នុងស្រុកជាច្រើននៅចុងបូព៌ាប្រទេស
គឺស្រុកជប៉ុន  ស្រុកចិន  ស្រុកយួន  ក្នុងស្រុកទាំងអស់នេះ  ខ្ញុំសម្គាល់
ឃើញថាគេបោះបង់ទំនៀមទម្លាប់ជាច្រើន  ដោយហេតុថា  បោះបង់
ទំនៀមទម្លាប់របស់អ្នកប្រាជ្ញបុរាណពេលពេញ  មនុស្សទាំងអស់ក៏បាន
សេចក្តីវេទនា  ព្រួយលំបាកជាខ្លាំង  សេចក្តីដែលបោះបង់ទំនៀមទម្លាប់
នេះហើយ  នាំឲ្យកើតបដិបក្ខក្នុងគ្រួសារ  នាំឲ្យកើតសេចក្តីក្រវល់ក្រវាយ
មិនរៀបរយក្នុងនគរ  នាំឲ្យកើតចលាចលក្នុងស្រុក  មនុស្សទាំងពួង
យល់ឃើញថា  ធម៌អាថិក្ស្រខ្ញាតក្នុងបច្ចិមប្រទេស  អាចនឹងធ្វើឲ្យមាន

របៀបរៀបរយ ជួនល្មមដល់វង្សត្រកូល ដល់ស្រុកកំណើតខ្លួនបាន ប៉ុន្តែឯវង្សត្រកូលនិងស្រុកកំណើត ដែលកកើតឡើងក្នុងបូព៌ាប្រទេស នោះ មិនមែនមានភាពសណ្ឋាន ឬលក្ខណៈដូចជាក្នុងបច្ចិមប្រទេសឡើយ ហើយមិនអាចនឹងព្រមព្រៀងធ្វើតាមច្បាប់ ឬការគ្រួតត្រាស្រុកដែលតម្រូវ លើជនជាតិដែលនៅក្នុងបច្ចិមប្រទេសឡើយ ដោយហេតុថាច្បាប់ឬការ គ្រួតត្រាស្រុក ក្នុងមជ្ឈិមប្រទេសនេះ និយមយកតាមទំនៀមទម្លាប់ បុរាណក្នុងសាសនានេះនឹងក្នុងលោកសន្និវាស ។

សេចក្តីដែលពោលមកនេះ មិនមែនជាថាមជ្ឈិមប្រទេស មិនបាន រៀនអ្វី មិនបានយកបែបអ្វីពីបច្ចិមប្រទេសឡើយ ព្រោះថាសេចក្តីបេះ ដឹងប្រាជ្ញាចូលគ្នា កើតឡើងជាសេចក្តីផ្លាស់ប្តូរគ្នាទៅវិញទៅមក ត្រូវ តែឲ្យចំណែកទាំង ២ របស់មនុស្ស ស្គាល់គ្នាទៅវិញទៅមក ហើយកប់ អានគ្នាទៅវិញទៅមក គឺថាឯមជ្ឈិមប្រទេសដែលអាក់ខានជាយូរអង្វែង ក្នុងការរិះរកវិជ្ជាផ្សេងៗនោះ ត្រូវការដល់វិជ្ជាទាំងឡាយ ដែលបច្ចិម ប្រទេសបានរកឃើញ ដើម្បីនឹងធ្វើឲ្យបានជឿនដំណើរទៅខាងមុខ ឯ បច្ចិមប្រទេស ដែលបានស្រូបចូលទៅជាអង្វែងឆ្នាំក្នុងសេចក្តីចំរើនដោយ របស់មានរូបនោះ ត្រូវទទួលអំពីមជ្ឈិមប្រទេសទៅវិញ មេរៀនដ៏ ប្រសើរអំពីធម៌អាថ៌និងក្បួនខ្នាត ត្រូវឲ្យអស់អ្នក យកចិត្តទុកដាក់ចំរៀន សូត្រសិល្បសាស្ត្រនិងក្បួនថ្លៃងសារពើក្នុងទាលោកិយរបស់យើង ដូច

យ៉ាងអ្នកប្រាជ្ញរបស់យើង ខំព្យាយាមដើម្បីឲ្យយល់សាសនាអ្នក ពង្សាវតាររបស់អ្នក និងក្បាច់អលង្ការរបស់អ្នក ។

ប៉ុន្តែដែលអ្នករៀនសិល្បសាស្ត្រទាំងឡាយ របស់យើងនោះ ត្រូវកុំបោះបង់ចោលការរៀនសូត្រ ក្នុងក្បួនខ្នាតសម្រាប់សាសនាអ្នកឡើយ ។

ខ្ញុំមានសេចក្តីសោមនស្សណាស់ ដែលខ្ញុំបានសង្កេតឃើញថាមានអស់លោក ដែលជាអ្នកចេះដឹងច្រើន ក្នុងចំណោមនេះ ហើយលោកបានសិក្សាវិជ្ជាក្នុងបច្ចិមប្រទេស ដោយជ្រៅជ្រះផង បានចូលជួយជ្រោមជ្រែង ដើម្បីធ្វើឲ្យបានចំណេះវិជ្ជាខ្មែរមានជីវិតរស់រួចឡើងវិញផង ។ ការបេទាខ្មែរដែលកប់បាត់ទៅ គេក្បួចសូន្យឈឹងគ្មានទឹកនា នោះឥឡូវនេះមានជីវិតចម្រើនឡើងវិញហើយៗ ប្រទេសអឺរ៉ុបក៏ត្រូវការ ដល់សេចក្តីចម្រើននេះដែរ ឯភាសាសម្រាប់សាសនា និងសម្រាប់សេចក្តីចេះដឹងរបស់អ្នក គឺភាសាបាលីនោះ ក៏បានចម្រើនឡើងវិញដែរ ដោយអំណាចសេចក្តីឧហាតខំប្រឹង នៃព្រះសង្ឃទាំងឡាយ ដែលចេះដឹងជ្រៅជ្រះ ហើយដែលមានយសសក្តិធំ ៗ មានសេចក្តីខំប្រឹងរបស់លោកគ្រូព្រះមហាវិមលធម្មជាដើម ដែលខ្ញុំបានស្គាល់លោកជាប្រាកដ ហើយដែលខ្ញុំស្តាយលោកជាទីបំផុត សេចក្តីខំប្រឹងរបស់លោក នាំឲ្យសាលាបាលីចម្រើនជាច្រើន ចំនួនលោកសង្ឃដែលចូលសិក្សា ក្នុងសាលានោះ ចេះតែបន្ថែមឡើងឥតអាក់ ដើម្បីសិក្សានូវគោលចារិកពិតប្រាកដ

នៃធម៌ជាតិ ហើយខាងក្រោយនេះ ដោយអំណាចសេចក្តីឧស្សាហ៍ របស់ស្ត្រីម្នាក់ ដែលមានសតិបញ្ញានិងចិត្តថ្មីមជ្រៅទូលាយ ព្រមទាំងវិជ្ជានិងសេចក្តីស្រឡាញ់ពេញអស់ដល់ជាតិ និងដល់ទំនៀមទម្លាប់របស់អ្នក ទើបព្រះរាជបណ្ណាល័យដែលស្ត្រីនេះ ទើបនឹងតាំងផ្តើមបង្កើតឡើង ដោយសេចក្តីឧបត្ថម្ភនៃ ព្រះករុណាព្រះបាទសម្តេចព្រះស៊ីសុវត្ថិ មិនទាន់បានយូរប៉ុន្មានក៏ទៅជាតូចណាស់ទៅហើយ ស្ទើរតែនឹងគ្មានកន្លែងតម្កល់គម្ពីរសាស្ត្រា និងវត្ថុផ្សេងៗ សម្រាប់សាសនា ដែលជារបស់បុរាណ ដែលបណ្តាស្រុកក្នុងស្រុកខ្មែរនាំមកដម្កល់ ដើម្បីថែរក្សាកុំឲ្យអន្តរាយ ។

ក្នុងគ្រាឯឡូវមានទាំងទស្សនាវដ្តីខ្មែរ ផ្សាយដំណឹងទៅក្នុងកម្ពុជប្រទេស ឲ្យបានដឹងនូវពង្សាវតារនិងធម៌ជាតិផ្សេងៗ ដែលធ្លាប់ជឿក្នុងស្រុក និងរឿងក៏ ឬ ដំណឹងអ្វីៗ ដែលមានក្នុងបច្ចិមប្រទេសផង ដូច្នេះឃើញថាបណ្តាស្ត្រីខ្មែរមានសេចក្តីសោមនស្សនឹងអតីតកាលរបស់ស្រុកខ្លួន ហើយនឹងបានច្រើនពេញមុខមាត់កល់តែថ្ងៃ ដោយអំណាចជ័យជំនះរបស់ស្រុកខ្លួនក្នុងជាន់ដើម ហើយក៏នឹងបានច្បាស់នូវសេចក្តីខ្ពង់ខ្ពស់ឧត្តុងឧត្តមនៃតលំគោត្ររបស់ខ្លួន ឃើញថាខេមរជាតិខំយកចិត្តទុកដាក់ធ្វើតាមទំនៀមទម្លាប់ក្នុងបច្ចិមប្រទេសផង ហើយទម្លាប់ខ្លួនបន្តិចម្តងៗ ដើម្បីលើកយកទំនៀមទម្លាប់បុរាណរបស់ស្រុកមកតម្កើងផង ហើយចំណែកខាងខ្លួនខ្ញុំ ក៏ច្រើនមុខមាត់ជាអនេក ដែលបានឃើញ

ក្រុមហ៊ុនកំពង់សេស បានចូលជួយឧបត្ថម្ភដោយពេញទី ដើម្បីធ្វើឲ្យ ទំនៀមទម្លាប់សម្រាប់ស្រុកនេះ មានជីវិតឡើងវិញ ។

**ហាជី - គួរផុង**

ចាងហ្វាងចាស់ធំបំផុតក្នុងក្រសួងសិក្សានៅប្រទេសឥណ្ឌូស៊ីន



# គតិលោក

ឧកញ៉ាសុត្តន្តប្រីជា ឥន្ទ រៀបរៀង

( តពីខ្សែ ១ )

ន័យមួយវិញទៀត មានពួកខ្លះជឿសំពះរូបយាយទេពបន់ស្រន់យាយទេពដោយក្តីប្រាថ្នា អ្នកកាន់សំពះយាយទេពនេះក៏ពុំដឹងដើមហេតុរឿងប្រវត្តិនៃយាយទេពនោះជាអ្វី ? រូបយាយទេពនោះកាលរស់នៅ តើគាត់ជាទេវតា ឬជាមនុស្សយើងនេះ គាត់ជាប្រពន្ធតាណា ? តានោះឈ្មោះអ្វី ? កាលរស់នៅតើមានបុណ្យបារមីអាចជួយដោះទុក្ខខ្មែរយ៉ាងណាខ្លះ? ឬបានជួយប្រាបសត្រូវខ្មែរយ៉ាងណាខ្លះ ? ជួយការពារសព្វគេគយ៉ាងណាខ្លះ ? មានគុណទឹងផែនដីយើងនេះដូចម្តេចខ្លះ ? តម្រារឿងប្រវត្តិយាយទេពនោះតើមាននៅក្នុងតម្រាពង្សាវតារ ឬក្នុងគម្ពីរសាស្ត្រាបាលីឯណាបានជាពួកនេះទៅជឿ ទៅបូជាអ្នតជាតួកែនោះ តើបើដូចជារូបនាងសាណ្តក៍រ មានក្នុងពង្សាវតារបារាំងសែស នោះទើបគួរដល់លោកអ្នកជាតិបារាំងសែសគេគោរពបូជា ព្រោះនាងកាលរស់នៅនោះ បានជួយអាសាមហាក្សត្រិយ៍ចេញជានាយទាហាន លើកពលយោធា ច្បាំងនឹងពួកបច្ចាមិត្រ វាយយកខេត្តដែនរបស់ជាតិខ្លួនបានមកវិញ ដល់ក្រោយនាងអស់បុណ្យដោយ ដែលពួកបច្ចាមិត្រចាប់ទៅដុតភ្លើងទាំងរស់

ពួកអ្នកនគរគេនឹកដល់គុណនាង ដែលជួយយកអាសាផែនដីនោះ ទើបគេនាំគ្នាសិតសាងរូបនាងទុក គឺជាស្រីអស្ចារ្យតម្កល់ឲ្យពួកជាតិដូចគ្នាគោរពបូជារបស់គេ លុះត្រាដល់មកសម័យឥឡូវនេះ ។

ឯយាយទេពនោះ តើកាលគាត់រស់នៅ បានជួយដោះទុក្ខជាតិខ្មែរយើងយ៉ាងណា ? ទើបបានបុរាណចាស់គេសាងរូបយាយទេពនេះទុកឲ្យពួកខ្មែរយើងគោរពបូជារូបគាត់ ត្រាដល់មកឥឡូវនេះ ។

មួយទៀតពាក្យទិព្វ សព្វនេះជាភាសាប្រែថាខ្មោចយក្ស តើរឿងខ្មោចយក្សនោះ សឹងជាសត្រូវនឹងជាតិមនុស្សយើងនេះទេ ហេតុម្តេចក៏គេទៅជឿទៅបូជាវានោះទៀត ឬពាក្យទេពសព្វនោះពុំមែនជាទេពនោះទេ គឺជាសព្វទេពហៅថានាងទេវធីតា សំដៅយករូបនាងឧមាភោគវតី ជាអគ្គមហេសីនៃព្រះឥសូរនោះទេដឹង ព្រោះមនុស្សជាន់ដើមកាន់សាសនាព្រះឥស្សរាធិបតី កប់អាននាង ឧមាភោគវតី ព្រោះនាងជាមហេសីនៃព្រះឥសូរនោះ ទើបគេសិតសាងរូបនាងតាំងទុកមក ហៅថាយាយទេព ។ នោះដល់យូរមកយារពាក្យហៅថាយាយទេពយ៉ាងនេះទេដឹង តើបើទុកជារូបនាង ឧមាភោគវតី ក្តីយើងជាឧបាសកឧបាសិកាកប់អានព្រះពុទ្ធសាសនានេះ មិនត្រូវទៅគោរពសំពះបូជារូបយាយទេពនោះទេ ធ្វើឲ្យសៅហ្មងខាតបង់ត្រៃសរណគមន៍របស់ខ្លួន សោះទទេយ៉ាងនេះ ។

មួយទៀតមានអ្នកខ្លះទៅជឿពាក្យព្រេង និយាយកុហកកូនក្មេងតមកថា ភ្នំក្រោមនៅខែត្រស្រុកសៀមរាប ១ ភ្នំត្រនិលនៅខែត្រស្រុកដើមព្រៃ ១ ភ្នំទាំង ២ នេះពុំមានឈើដុះលើច្រើនប្រាន់ដូចយ៉ាងភ្នំឯទៀតៗ គឺភ្នំនេះកាលព្រះរាមចង់ថ្នល់ លើកពលពួកវានរ ទៅយុទ្ធនាទីនក្រុងរាព-ណាសូរនៅកោះលង្កា បានប្រើឲ្យកំហែងហនុមានជញ្ជូនថ្មភ្នំចង់ថ្នល់ហនុ-មានមានរិទ្ធិខ្លាំងចង់ភ្នំតូចធំ នឹងសរសៃរោមហើយហោះមក ឯភ្នំពីរនេះដាច់ចាករោមហនុមានធ្លាក់សំយុងចុះក្រោមបានឡើងលើ ទើបឈើមិនដុះបាន កូនក្មេងឥតសតិបញ្ញាក៏ជឿតាមប្រកាន់មាំថាមែន ដល់ខ្លួនចាស់ក៏នៅតែជឿ ព្រោះពុំមានសតិសម្បជញ្ញនឹងពិចារណាមើលហេតុមើលបច្ច័យធម្មតា លោកឡើយ ដូចនិទានរឿងតា ហ្លួ-ឡាង មានកូនប្រសា ២ នាក់ ឯចៅបងជាមនុស្សឥតសតិបញ្ញា ឮតែពាក្យឪពុកក្មេកថាដូចម្ដេចក៏ធ្វើតាម ឯតាហ្លួ-ឡាង ក៏ស្រឡាញ់រាប់អានចៅបងនោះ ឯចៅប្អូនពុំគាប់ចិត្តឪពុកក្មេក ព្រោះជាអ្នកមានសតិបញ្ញា មិនធ្វើមិនប្រចតាមការខុសការមិនគួរជឿ ៗ

ថ្ងៃ ១ តាហ្លួ ឡាងនាំចៅកូនប្រសាទាំង ២ ចុះទូកចែវទៅព្រៃ ដើម្បីទៅកាប់ឈើ លុះចែវទៅដល់ទីកល ១ ឮសម្លេងគ្រៀលរាយំគងឡើង ឪពុកក្មេកក៏សួរទៅកូនប្រសាថា អើ៎ សត្វគ្រៀល សត្វក្រយងនោះម្ដេចក៏វាមានសម្លេងឮខ្លាំងម៉្លេះ ៗ

កូនប្រសាបងឆ្លើយថា : បាទ បានជាវាមានសម្លេងឮអោះព្រោះកវាវែង ទើបបានជាវាមានសម្លេងឮ ឯចៅកូនប្រសាប្អូនថែរកនៃឲ្យបានឮពាក្យអ្នកទាំង ២ និយាយត្រូវគ្នាដូច្នោះ ក៏ខាត់ចិត្តណាស់ ទើបឆ្លើយគាត់ឡើងថា សត្វហ៊ីងកូនក្អាត់នោះ តើកវាវែងកាលណា ម្ដេចវាមានសម្លេងដែរ ៗ

ឯចៅអាពុកក្មេកកូនប្រសាបង ក៏ទាល់បញ្ញាពុំអាចឆ្លើយតប ទើបនាំគ្នាស្ងៀមទៅ លុះដើរទៅដល់ទីគោកទួល ១ ទួលនោះលើងពុំមានស្មៅដុះ ទើបឪពុកក្មេកសួរទៀតថា អើទីទួលនេះម្ដេចពុំមានស្មៅដុះ ឯចៅកូនប្រសាបងឆ្លើយថា កាលដើមតាព្រហ្មគាត់មកដាំបាយ ហើយគាត់ចាត់ទឹកបាយទៅលើទួលនេះ ហេតុនោះទើបស្មៅដុះពុំបាន ព្រោះទឹកក្ដៅត្រូវស្មៅស្លាប់អស់ ។

ចៅឪពុកក្មេកក៏ទូលថា អើមែន ទឹកបាយតាព្រហ្មគាត់ចាត់ចាក់ទៅលើទីនេះ ស្មៅឯងដុះឯណាបាន ។

ឯចៅកូនប្រសាប្អូនក៏ឆ្លើយគាត់ឡើងថា មនុស្សក្បាលទំពែកសក់វាមិនដុះនោះ តើតាព្រាហ្ម គាត់ចាត់ទឹកបាយចាក់លើដែរឬម្ដេច អ្នកទាំង ២ ក៏ទាល់ស្ងៀមទៅ លុះដើរទៅដល់ទីជ្រុងភ្នំ បានឃើញថ្មបែកប្រេះ ឪពុកក្មេកក៏សួរថា អើហេតុអ្វីថ្មនេះក៏បែកដូច្នេះ ចៅកូនប្រសាបងឆ្លើយថា កាលព្រះរាមព្រះលក្ខណ៍ លោកយួសព្រះខ័នមកត្រង់នេះ ថ្មនេះត្រូវមឹងចុងព្រះខ័ន ទើបវាបែកយ៉ាងនេះ ឯឪពុកក្មេកក៏តបថា អើព្រះខ័នព្រះ

កមនោះមុតណាស់ តែលោកអ្នកទៅត្រូវឆ្អឹង ហើយ គង់បែកគង់ដាច់មិនខាន ។

ចៅកូនប្រសាប្អូនក៏ឆ្លើយគាត់ឡើងថា ចង្អែកក្តិតមនុស្សយើងនោះ តើព្រះកមអ្នកព្រះខ័នដែរឬ បានជាបែកយ៉ាងនេះ ។

ឯអ្នកទាំង ២ ក៏ចាល់បញ្ញាមិនអាចហើបហាថាអ្វីតទៅទៀតឡើយ ទើបដើរទៅដល់ព្រៃឈើ នាំគ្នាកាប់បានក៏វិលមកផ្ទះវិញ ។

ឯងស្តាប់មើលចុះមនុស្សយើងនេះ សឹងឥតបញ្ញាទឹងពិចារណាឲ្យឃើញហេតុឃើញធម្មតាលោកិយ ទៅជឿតែសម្តីព្រេងនិយាយបញ្ឆោតកូនក្មេងលេងត ៗ មក ដូចតា ហ្វូ ឡាង ចាញ់សម្តីចៅកូនប្រសាប្អូន ដូចពណ៌នាមកនេះ ។

មួយទៀតជាតិមនុស្សប្រុសយើង ទោះជាខ្លៅល្ងង់ឆោតយ៉ាងណា ៗ ក្តី ក៏ពុំទទួលខ្លួនថាឆោតជាដុំបេះនោះឡើយ សឹងអួតថាខ្លួនចេះដឹងថាខ្លួនមិនឆោតទាំងអស់ ។

ដូចនិទានចៅឆោតម្នាក់ជិះក្របីទៅស្រែយកស្រូវ ១ ល្អីទៅសាបផង ចៅនោះគិតថាអញជិះក្របីនេះវាធ្ងន់វាហើយ បើឯងដាក់ស្រូវ ១ ល្អីនេះ លើខ្នងវាទៀតវារឹតតែធ្ងន់វាណាស់ គួរតែជួយទូលវាកុំឲ្យគ្នាធ្ងន់ពេក ចៅនោះគិតដូច្នោះហើយ ទើបជិះក្របីទូលស្រូវបរទៅកាន់ស្រែនៃអាត្មា ។

កាលណោះមានមហាក្សត្រាធិបតី ប្រើរាជអមាត្យឲ្យដើររកមើលមនុស្សឆោតក្នុងព្រះនគរក្រៅព្រះនគរ ថាបើមានមនុស្សនោះចូលទៅគាល់ ទីងព្រះរាជទានរង្វាន់ឲ្យរាជអមាត្យតាមក្ដីគាប់ ឯអមាត្យក៏ដើរត្រួចមើលមនុស្សទាំងឡាយតាមដំបន់ ពុំឃើញមានមនុស្សឆោត ១ ឡើយ លុះដើរមកដល់វាលស្រែ បែរទៅឃើញចៅជិះក្របីទូលល្អីស្រូវដូច្នោះ ក៏សម្គាល់ថាចៅនេះឆោតពិតប្រាកដ ទើបសួរទៅថា ចៅឯងនេះជិះលើខ្នងក្របីហើយ ស្រូវ ១ ល្អីនោះម្ដេចមិនដាក់លើខ្នងក្របីទៅ ម្ដេចចាំទូលផង ចៅឯងម្ដេចឆោតម្ល៉េះ ចៅឯងឆោតប្លុកយ៉ាងណា ឯចៅនោះពុំទទួលខ្លួនជាឆោតល្ងង់ ទើបតបទៅថា ខ្ញុំបាទទីងឆោតល្ងង់កាលណា គឺខ្ញុំបាទនេះ ចេះគិតឃើញថាខ្លួនជិះលើខ្នងគ្នា ១ ធ្ងន់ ១ សាហើយ សមដាក់ស្រូវ ១ ល្អីថែមលើខ្នងគ្នាទៀតធ្ងន់គ្នាក៏រឹងទ្វេឡើង ៗ ហេតុនោះខ្ញុំបាទមេត្តាក្របីខ្ញុំបាទ ទើបជួយទូលវាយ៉ាងនេះ ហេតុដូចម្ដេចក៏លោកមកពោលថាខ្ញុំបាទឆោតល្ងង់នោះ ៗ

ឯរាជអមាត្យនិយាយពន្យល់ទៀត ចៅនេះក៏មិនទទួលតាមថាខ្លួនចៅឆោតឡើយ រាជអមាត្យអស់ប្រាជ្ញា ទើបគិតថាមែនហើយ មនុស្សយើងនេះប្រតិបត្តិការខុសឆោតល្ងង់ជាប់នៅប្រកាន់ខ្ជាប់ហើយ ទោះបេះនិយាយពន្យល់យ៉ាងណា ៗ ក៏មិនតាម នៅរឹងទទឹងដោយទិដ្ឋិខ្លាំង រាជអមាត្យនោះរកមនុស្សឆោតល្ងង់ទទួលខ្លួនជាចៅល្ងង់ពុំបានឡើយ ហើយ

ក៏ចូលទៅព្រះនគរ ក្រាបទូលស្តេច ដោយសេចក្តីរកពុំបានមនុស្ស ទទួលខ្លួនទោសដូចពណ៌នាមកនេះ ។

មានរឿងតម្រាឃ្លានស្រឡាញ់ចុះទោស ដូចសត្វសិង្ហតោ ១ បាន ឃើញកូនក្រមុំចៅនាយដ្ខៅម្នាក់ ក៏កើតចិត្តស្រឡាញ់ចង់បានជាភរិយា បើចូលទៅនិយាយនឹងដ្ខៅ ជាមាតាបិតានៃនាងថា ខ្ញុំស្រឡាញ់កូនក្រមុំលោក សូមលោកមេត្តាដល់ខ្ញុំ ឯរឿងតែងការហាមង្គលនោះសូមឲ្យលោកបង្គាប់មកចុះ ខ្ញុំនឹងរៀបមកជូនឲ្យពេញចិត្ត កុំឲ្យលោកកោតញញើតឡើយ ។

ឯដ្ខៅនោះ ឮសិង្ហតោមកពោលពាក្យ ចង់បានកូនខ្លួនជាប្រពន្ធដូច្នោះ ក៏គិតថាសិង្ហតោនេះ ជាជាតិថយថោក មិនគួរនឹងលើកកូនក្រមុំឲ្យជាភរិយាឲ្យខូចវង្សកូនអញ បើនឹងមិនឲ្យវា ១ ជាសត្វអង់អាចកាចឃោរឃៅ វាកាន់ចង្កូមនឹងក្រចកជើងវាជាអាវុធ វានឹងយាយីឯងឲ្យដល់នូវក្តីវិនាសទៅផ្សេងៗ បើដូច្នេះ មានតែគិតនិយាយលួងកាត់អាវុធវាចេញ ទើបកែខៃយកខ្លួនសុខបាន គិតហើយនាយដ្ខៅនិយាយទៅថា អើសិង្ហតោអ្នកឯងមកចង់បាន កូនយើងជាភរិយានេះ យើងក៏គាប់ចិត្តណាស់ចង់បានបាឯងជាកូនជាទៅពិតៗ ព្រោះយើងឥតឫទ្ធិអំណាចនឹងរក្សាវង្សត្រកូលឲ្យមាំមួនតទៅ តែខាងចិត្តកូនក្រមុំយើងនេះ ជាវស្ត្រីព្រាក់ព្រមស្រឡាញ់បាឯងប្តីយ៉ាងម្តេច នោះយើងពុំទាន់ដឹង បើដូច្នោះ

ចូរបាឯង នៅនេះសិនចុះចាំយើងចូលទៅនិយាយនឹងវាមើលសិន ថា ហើយទើបចូលទៅក្នុងផ្ទះបន្តិចក៏ចេញមកវិញ ហើយនិយាយថា យើងបាននិយាយនឹងកូនយើងស្រេចហើយ វាព្រមស្ម័គ្រនឹងអ្នកឯងដែរ តែវាថាអ្នកឯងមានក្របីកវែងស្រួចណាស់ ក្រែងបានគ្នាទៅ អ្នកឯង លូកប្រឡែងលេង បិចថ្ពាល់ បិចដោះក្តី វាខ្លាចក្រែងមុតថ្ពាល់ មុតដោះ មួយទៀតក្រែងអ្នកឯង ថើប ឱប ផញ្ជក់ថ្ពាល់ ឬមុខមាត់ទៅប៉ះត្រូវចង្កូមនឹងមុត ហេតុនេះ បើអ្នកឯង ឲ្យយើងកាត់ចង្កូមកាត់ក្របីចេញខ្លះ នោះទើបកូនយើងវាព្រម ។

ឯសិង្ហតោលុះអំណាចក្តីឃ្លានស្រឡាញ់ គ្រប់សង្កត់ក៏ឆោតទើបថា អញ្ជើញលោករកគេមកកាត់ក្របីកាត់ចង្កូមខ្ញុំចុះ ថាហើយក៏ដេកហាមាត់លាត់ក្របីឲ្យនាយដេស្នៅកាត់ នាយដេស្នៅក៏ហៅកូនក្មួយជួយគ្នាកាត់ គ្រឿងអាវុធនៃសិង្ហតោនោះ ឯសិង្ហតោនោះ ក៏លុះត្រូវគេកាត់ក្របីដកចង្កូមអស់ហើយ ក៏ស្បើយកម្លាំងស្បើយឫទ្ធិចុះ ឯនាយដេស្នៅនោះដឹងថាសិង្ហតោ អស់ឫទ្ធិហើយក៏ហៅពួកកូនក្មួយជួយគ្នាដេញវាយសិង្ហតោ អ្នកខ្លះបានដំបង ខ្លះបានដាវលំពែង តាំងដេញតាក់ ដេញប្រហារសិង្ហតោ ។ អស់ឫទ្ធិនឹងតស៊ូ ក៏រត់ចូលព្រៃទៅ បានសេចក្តីវេទនាផ្សេង ៗ ហោង ៗ

រឿងនេះឯងស្តាប់មើលចុះ ហើយប្រៀបដោយមនុស្សយើងសព្វថ្ងៃនេះ មានលោកចៅអធិការ ឬលោកអ្នកឯណា ៗ មានសម្បត្តិ ត្រូវ

មេស្រីអ្នកលេងកបញ្ឆោតដោយកលកាមកន ថាក់ដោយ ហើយលើក សម្បត្តិឲ្យទៅក៏មុខអស់ ដល់ខ្លួនសឹកទៅក៏គេបជាមិនស្នេហាវិញ នឹង តាយកទ្រព្យសម្បត្តិវិញ ក៏គេបកែប្រែជាពុំបានទទួល មិនបានដឹងឮទ្រព្យ នោះ នឹងយកវិញពុំបាន ដូចយ៉ាងសត្វសិង្ហគោ ឲ្យគេកាត់ក្របកជក បង្ហមអស់ គួរគិតមើលទៅទៀតចុះ តាមរឿងឃ្លានស្រឡាញ់ពោត នេះឯង ៗ

និទានកណ្ឌទសជាតក៍ ថាកាលណាមហោសថបណ្ឌិតតែតោលនាង អមរាទេវី ភៀសកាត្ត ជាមនុស្សសាមញ្ញ ទៅនៅអាស្រ័យនឹងពួកស្មូន ឆ្នាំនោះ ក្រោយនោះអាចារ្យទាំង ៤ នាក់ គឺអាចារ្យ សេនកា ១, អាចារ្យបុក្កុស ១, អាចារ្យកាមិន្ទ ១, អាចារ្យទេវិន្ទ ១, អាចារ្យ ទាំង ៤ នោះ ដឹងថាព្រះមហោសថបណ្ឌិតតែចេញចាកលំនៅ ដោយ កលឧបាយរបស់ខ្លួន ដែលទូលញុះញង់ឲ្យព្រះបាទវិទេហរាជ កើត ស្អប់ទៅមហោសថនោះ សមក្តីប្រាថ្នាខ្លួនហើយ ក៏មានចិត្តត្រេកអរក្រៃ. ពេក កើតចិត្តប្រមាថនាងអមរាទេវី ជាភរិយានៃពោធិសត្វ ចង់បាន នាងជាភរិយាទៃ ៗ តែកាលអាចារ្យទាំង ៤ គឺទៅចង់នាងអមរា នោះ សឹងគិតគំនិតរៀងខ្លួននឹងបានដឹងគ្នាក៏ទេ ៗ

ថ្ងៃ ១ អាចារ្យទាំង ៤ ប្រើមេអណ្តើក ឲ្យនាំយកមាសប្រាក់ទៅ ជូន នាង ហើយនិយាយផ្សំលោកិយផ្កាស្រីមេម៉ាយប្តីចង់ពាល ៗ

ឯនាងអមរា កាលណាបើដឹងថាអាចារ្យទាំង ៤ ចង់បាននាងដូច្នោះហើយ ក៏និយាយប្រាប់ទៅមេអណ្តើកទាំង ៤ នាក់នោះថា ខ្លួននាងជាស្រីមេម៉ាយប្តីតែចោលនៅកណ្តាលឯកាឥតទីពឹង ឥឡូវបើលោកអាចារ្យមេត្តាប្រោសនាងឲ្យបានទីពឹងនោះ នាងក៏សែនត្រេកអរនឹងគុណលោកអាចារ្យណាស់ហើយ នាងក៏ព្រមតាមអធ្យាស្រ័យ តែឯងទៅប្រាប់នាយទីទៃ ៗ ថាបើលោកចង់មកផ្ទះនាងនោះ ឲ្យអញ្ជើញមកវេលាយប់ស្អែកនេះ ថាហើយទើបសរសេរជាសំបុត្រ កំណត់សញ្ញាពេលឲ្យមក ស្រេចហើយប្រគល់ឲ្យមកមេអណ្តើកទាំង ៤ ឲ្យនាំទៅឲ្យនាយខ្លួនទីទៃ ៗ ក្រោយនោះនាងអមរាចាត់ប្រើទាសាទាសី ឲ្យជីករណ្តៅ ១ ជម្រៅលិចក្បាល ហើយឲ្យយកលាមកចាក់ទឹកឲ្យលាយ ចំនួនត្រឹមចង្កាមាត់ ហើយឲ្យធ្វើជាយន្តគន្លឹះបិទបាំងតាំងនៅពាងទឹក ហើយទាសីចាំនៅក្បានាងឲ្យសញ្ញាដល់ទាសីទាំងឡាយតាមឧបាយនាងគិតនោះឯង ។

ឯអាចារ្យសេនកា លុះបានទទួលសំបុត្រនាង បានអានមើលដឹងសេចក្តី ហើយក៏ត្រេកអរក្រៃពេក លុះដល់ពេលយប់ម៉ោង ៨ អាចារ្យក៏រៀបខ្លួនចាត់ចែងតែងកាយស្លៀកពាក់សមគួរហើយ ក៏ចេញចាកគ្រឹះ-ស្ថាន ដើរឆ្ពោះទៅកាន់ផ្ទះនាងអមរា ដល់ហើយ ក៏ឈរនៅមាត់ទ្វារគោះទ្វារជាសញ្ញា ។

ឯពួកទាសីទាសានាង អមរា ឃើញអាចារ្យ សេនកា មក ដល់ក៏នាំគ្នាចេញទៅទទួល ហើយនាំចូលទៅក្នុងបន្ទប់ទឹកនិយាយប្រលោមថា លោកនាយខ្ញុំម្ចាស់ផ្តាំថា បើលោកតាមកដល់ សូមឲ្យលោកងូតទឹកជម្រះសរីរកាយ បំព្រំប្រស់ទឹកអប់សិន សូមអញ្ជើញឡើងដំណាក់ព្រះនាង ។

ឯអាចារ្យ សេនកា ត្រូវមេទាសីរប្រលោម ក៏ព្រមផ្លាស់សំពត់អាវចិញ្ចៀនពេជ្រឲ្យមេទាសីរកាន់ឲ្យ មេខ្លះនាំចូលទៅក្នុងល្វែងបន្ទប់ឲ្យអង្គុយលើក្តារយន្ត មេខ្លះយកផ្តិលប្រាក់ដងទឹកស្រោច មេខ្លះធ្វើជាជួយដុសក្អែលឲ្យ លុះងូតបានគិតមេអស់នោះទាញយន្តឡើង ឯក្តារនោះក៏ក្តាត់ចាកទីបះឡើង អាចារ្យ សេនកា ក៏ធ្លាក់ចុះទៅក្នុងរណ្តៅអាចម៍នោះ ងើបតែកឡើងឲ្យផុតអំពីលាមក នៅរង់ទុក្ខដូចសត្វនៅក្នុងគូថ នរកនោះឯង ។

ថ្ងៃឯអាចារ្យ បក្កុស នោះលុះដល់យប់ម៉ោង ៩ ក៏ចាត់ចែងតែងខ្លួនទៅផ្ទះនាង អមរា ឯពួកមេទាសីរក៏ប្រលោមដូចបទអាចារ្យ សេនកា ហើយក៏ទាញយន្តទម្លាក់អាចារ្យ បក្កុស នោះទៅក្នុងរណ្តៅគូថជាមួយនឹងអាចារ្យ សេនកា នោះឯង ។

លុះដល់ពេលម៉ោង ១០ អាចារ្យ កាវិន្ទ ទៅចុះកលដូចអាចារ្យទាំង ២ ជាន់មុន ។

លុះដល់ពេលម៉ោង ១១ អាចារ្យ ធេរិទ្ធ ទៅចុះកលដូចអាចារ្យទាំងអស់ អាចារ្យទាំង ៤ នៅក្នុងរណ្ដៅគូថរន្ធទ្វារខេមា ដោយលាមកដោរពោរឡើងដល់ត្រឹមចង្កាមាត់ បានដឹងគ្នាថាចុះកលនាង អមរា ទេវី នៅរន្ធទ្វារអស់ ១ រាត្រី លុះព្រឹកឡើងនាង អមរា ប្រើពួកទាសីទាសា យករនែកទាក់ករអាចារ្យទាំង ៤ ទាញឡើងពីរណ្ដៅ ហើយឲ្យយកទឹកតាក់លាងសព្វសារពាង្គកាយនៃអាចារ្យឲ្យយកដុំឥដ្ឋដុសក្បាលអាចារ្យទាំង ៤ ។

ឯអាចារ្យទាំង ៤ បាទៈសេចក្ដីឈឺចាប់ ដោយមេទាសីរ៉ូសគោសដុសដោយដុំឥដ្ឋនោះឯង លុះជម្រះលាងកាយអាចារ្យទាំង ៤ ហើយនាង អមរា ឲ្យយកកន្ទេលយ៉ាងធំរុំអាចារ្យភ្ជាប់គ្នា ហើយឲ្យអ្នកបម្រើសែងអាចារ្យដូចគេសែងខ្មោច នាងក៏យាងចូលទៅក្នុងព្រះរាជវាំង នាំយកអាចារ្យទាំងនោះទៅថ្វាយដល់ព្រះបាទវិទេហរាជ ស្ដេចឲ្យស្រាយសំណុំកន្ទេលមើល ស្រាប់តែឃើញអាចារ្យទាំង ៤ នៅក្នុងនោះ ទើបទ្រង់ត្រាស់សួរនាង អមរា ៗ ក៏ក្រាបទូលតាមដំណើរអាចារ្យទៅកំហែងប្រមាថនាងតាំងអំពីដើមដល់ចប់សព្វប្រការ ។

ព្រះបរមរាជាបានទ្រង់ស្ដាប់ដូច្នោះ ក៏ទ្រង់ព្រះពិរោធខ្ញាល់នឹងអាចារ្យទាំង ៤ ហើយទ្រង់ត្រះតិះដៀលដោយពាក្យអាក្រក់ផ្សេងៗទ្រង់បណ្ដេញឲ្យទៅផ្ទះរៀងខ្លួនទីទៃៗ ។

ឯអាចារ្យទាំង ៤ បានសេចក្ដីអាប់យស ខ្មាសអស់បណ្ដាមហាជនទាំងឡាយ ពុំអាចនឹងទៅកាន់ទីជំនុំប្រជុំជនានុជនផង បានខានចូលព្រះរាជវាំងអំពីថ្ងៃនោះមក ។

ឯនាង អមរាទេវី លុះសម្រេចកិច្ចខ្លួនហើយក៏ក្រាបថ្វាយបង្គំលាស្ដេច នាំពួកបរិវារនាងវិលទៅកាន់គ្រឹះស្ថាននាង វិញហោង ។

រឿងនិទាននេះ មានសេចក្ដីពិស្ដារក្នុងគម្ពីរទសជាតក៍ឯណោះ មានសេចក្ដីតទៅទៀត យើងទាញយកតែបទត្រង់ណោះមកសម្ដែង ដើម្បីឲ្យឃើញសេចក្ដីត្រង់តម្រាធោត កើតដោយសេចក្ដីឃ្លានស្រឡាញ់ នេះឯង ។

## ចប់តម្រាឃ្លានស្រឡាញ់ធោត

អាចារ្យបាំងឈើ ក្មេៗទៅលើ ខ្លួននាងអមរា ជាកល្យាណី ស្ត្រីមានបញ្ញា បំពោតឲ្យអា-ចារ្យធ្លាក់រណ្ដៅ ទោសគឺក្ដីស្នេហ៍ ត្រោតលុះទាល់តែ បង់ប្រាណបានទូវ ក្ដីធ្លាក់ថយយស ខុសនឹងព្រះទៅ តម្រានេះហៅ ធោតនៅព្រោះស្ត្រី ។



# រឿងមហាភារត

## ព្រះស្នេហាវសាទេព ក្រសេម

ជាអ្នកនាំផ្លូវទៅកាន់ប្រាសាទអង្គរ បានរៀបរៀង

១

## អារម្ភកថា

រឿងមហាភារតនេះ ជារឿងចំបាំងដ៏ធំ ១ ប្រហែលគ្នានឹងរឿងរាមកេរ្តិ៍ ជារឿងបុរាណកើតឡើងក្នុងប្រទេសឥណ្ឌា មុនរឿងរាមកេរ្តិ៍ទៅទៀត ពួកឥណ្ឌាចូលចិត្តនិយាយចែកគ្នាស្ដាប់ជាងរឿងរាមកេរ្តិ៍ តែរឿងនេះរាប់ថាជារឿងកំបាំងបាត់ទៅជាយូរហើយ ព្រោះក្នុងប្រទេសកម្ពុជាយើងក្នុងសម័យនេះ មិនសូវមានអ្នកណាចេះដឹង អំពីដើមខ្មែរយើងដឹងរឿងនេះជាប្រាកដទើបឆ្លាក់ជារូបភាពចម្លាំងរឿងនេះ នៅប្រាសាទនគរវត្តនាព្រះរបៀងទី ១ ដានខាងលិចភាគខាងត្បូង កាលយើងខ្ញុំទៅធ្វើជា គីត ឬ អ្នកនាំផ្លូវ បានជ្រាវរករឿងនេះទាល់តែបានចេះដឹង ដូចដែលបាននាំមកសម្ដែងក្នុងទីនេះស្រាប់ហើយ ។

កាលពុទ្ធសករាជ ២៤៧០ អ្នកស្រី ការប៉ុឡែស ជាបណ្ណារក្សនៃព្រះរាជបណ្ណាល័យកម្ពុជា ជាចៅហ្វាយរបស់យើងខ្ញុំ បានអញ្ជើញទៅមើលប្រាសាទនគរ ឲ្យយើងខ្ញុំជាអ្នកនាំមើល ហើយបរិយាយរឿងនោះៗ

ឲ្យស្តាប់ផង ដល់មកត្រង់រឿងនេះ អ្នកស្រីឃើញថាជារឿងគួរតែដឹងរាល់គ្នា ទើបបង្គាប់ឲ្យយើងខ្ញុំរចនាឡើង ដើម្បីយកទៅបោះពុម្ពផ្សាយឲ្យបានជ្រួតជ្រាបទូទៅ តែរឿងនេះដើមជាភាសាសំស្ក្រឹត អ្នកប្រែ ៗ មក ក៏ចូលចិត្តប្រើភាសានោះច្រើន សូម្បីយើងខ្ញុំរចនាឡើងគ្រានេះ ក៏តោងប្រើភាសានេះច្រើន ហើយប្រើពាក្យប្លែក ៗ អំពីដែលធ្លាប់ប្រើច្រើន ដោយបំណងដើម្បីឲ្យអ្នកមើលរឿងនេះជ្រាបពាក្យនោះ ៗ ជាប្រយោជន៍សម្រាប់ខ្លួន ក្នុងទីនេះយើងខ្ញុំសូមអភ័យដល់អ្នកមើល អ្នកអានទាំងឡាយ បើទើសទាល់ឆ្ងល់ត្រង់ណា សូមឲ្យសួរអ្នកចេះដឹងតទៅ កុំគប្បីនិន្ទាហើយឈប់ស្ងៀមនៅ បើធ្វើដូច្នោះនឹងបានផលត្រឹមតែជាអ្នកមិនចេះប៉ុណ្ណោះ ។

យើងខ្ញុំសូមឧទ្ទិសរឿងនេះ ជូនអ្នកស្រី ការប៉ឺឡែស ដែលផ្ដើមបង្កើតរឿងនេះ ហើយនឹងជា ទីគាប់អានដ៏ខ្ពស់នៃយើងខ្ញុំ ។

ព្រះស្នេហាសាទេព ក្រសេម



# មហាភារតយុទ្ធ

## ភាគ ១

## សេចក្ដីឫស្យានៃញាតិ

ក្នុងយុគជាដំបូង នៃប្រជាវតាររបស់លោក ក្នុងប្រទេសឥណ្ឌាភាគលើ មានក្សត្រិយ៍ទ្រង់ព្រះនាមថា សាន្តនុ ជាពូជពង្សវង្សព្រះចៅភារត ដែលជាឱរសរបស់ព្រះចៅ ទុស្សយន្ត និងនាង សកុន្តលា ជាបរមក្សត្រិយ៍ ដែលល្បីល្បាញព្រះកិត្តិនាម ជាងព្រះចៅ សាន្តនុ ក្សត្រិយ៍អង្គនេះ ទ្រង់រក្សាពជប្រវេណី នៃប្រយូរវង្សរបស់ព្រះអង្គទុកដោយប្រពៃ យកព្រះហឫទ័យទុកដាក់ពេចពិលរមិលមើល សុខទុក្ខរបស់ប្រជារាស្ត្រ ដោយការុណ្យចិត្តជាយ៉ាងក្រៃពេក អ្នកនគរស្មោះសារស្រឡាញ់ព្រះអង្គ ហាក់បីដូចជាដួងហឫទ័យរបស់គេ រាប់អានតម្កុំតម្កើងលើកឡើងបូជាព្រះអង្គ បីដូចទេពតាក្នុងសួគ៌ាល័យ រាជសត្រូវស្ញប់ស្ញែងក្រែងព្រះតេជបារមី ដូចកលខ្លាចស្ដេចខ្មោចក៏ប្រហែលគ្នា ព្រះចរិយាវត្តដែលប្រព្រឹត្តទៅជាប្រក្រតីយ៉ាងរាស្ត្រអ្នកជា មិនបានប្រកាន់ព្រះអង្គ កាន់យកតែយុត្តិធម៌ គឺសេចក្ដីជាអ្នកបរិសុទ្ធប្រាសចាកមន្ទិល និងពាក្យដំនៀលនិន្ទាព្រះអាណាសោតក៏រីងរៃខ្ទុងរៀងបីដូចស្បូវរង្សី ។

សេចក្ដីស្ងប់ក្នុងប្រទេស និរាសភ័យអរិរាជសត្រូវ និរាសសេចក្ដីរន្ធត់នេះឯង ជាអាការដ៏សំខាន់នៃការតាំងនៅបាននៃជាតិ និងពាណិជ្ជកម្មសព្វសារពើដែលជាលានធំ សម្រាប់ធ្វើឲ្យធនសម្បត្តិក្នុងប្រទេសដំណើរ

ឡើងទៅកាន់សេចក្ដីចម្រើន ព្រះអង្គជាអ្នកគ្រងរាជ្យនេះ ក៏បានយកព្រះហឫទ័យទុកដាក់ត្រួតត្រាមើលរាល់វេលា ទ្រព្យសម្បត្តិក៏សម្បូណ៌ឡើងក្នុងព្រះនគរ ទ្រង់ជ្រះថ្លាក្នុងសាសនកិច្ច សម្បូណ៌ដោយទស្សនៈ និងមតិ ទ្រង់ប្រើសេចក្ដីគិតអានកាញ់គ្នេ ដោយយោបល់តាមមតិរបស់ជាតិផ្សេង ៗ ឬរបស់គណៈ របស់បុគ្គលឯកជន ទ្រង់ចាត់តាំងរបៀបសមាគម និងទំនៀមជាប្រវេណីគតិទុករៀបរយ របស់អំបាលនេះជាធម្មតាប្រចាំនៅក្នុងរាជអាណាចក្រដ៏ធំនេះទូទៅ គ្មានអ្នកណា ១ ស្គាល់ឡើយថាគ្រប់គ្រងដូច្នេះ ៗ ខុសគន្លងធម៌ ទាំងទារុណកម្មក្ដី អធម្មិករាជក្ដី អយុត្តិធម៌ក្ដី គ្មានអ្នកណាស្គាល់ថាមុខមាត់រ៉ាយ៉ាងម្ដេច ប្រជារាស្ត្ររាល់គ្នា មានសេចក្ដីភក្ដី និងពេញចិត្តណាស់ដែលបានម្ចាស់សមគួរ ជាប្រមុខមកសោយរាជ្យដូច្នេះ ៗ

ព្រះចៅ សាន្ដនុ ស្ថិតនៅក្នុងរាជសម្បត្តិ ទាល់តែជរាភាពហើយ ក៏ស្ដេចទិវង្គតទៅតាមយថាកម្ម វិចិត្រវិរិយ ជា អគ្គកុមាររជ្ជទាយាទ បានឡើងសោយរាជសម្បត្តិតមក ក្សត្រិយ៍នេះ មានឱរសពីរអង្គ នាម ធូតរាស្ត្រ (ធតរដ្ឋ) ១, បណ្ឌុ ១, កាលព្រះអង្គទិវង្គតបង់ទៅហើយ ក៏កើតជាបញ្ហាចោទគ្នាឡើងថា នឹងលើកលោកអង្គណាសោយរាជ្យ នេះជារឿងដ៏ជ្រៅសុខុម កម្រនិងទំលុះទម្លាយទៅបាន ព្រោះថា ធូតរាស្ត្រ ជារាជបុត្រច្បង បើតាមព្រះវេណីត្រូវបានរាជសម្បត្តិ តែខ្វាក់បង់អំពីកំណើត ហេតុដូច្នោះរាជសម្បត្តិ ទើប

ធ្លាក់ទៅលើ បណ្ឌុ ជាអនុជវិញ ព្រមគ្នាអញ្ជើញ បណ្ឌុ ឡើងគ្រង
ពិភព ។

កាល បណ្ឌុ ឡើងសោយរាជ្យមក មិនយូរប៉ុន្មានក៏ទ្រង់រាជតម្រិះ នឹងស្តេចចេញទៅនៅព្រៃ សព្វព្រះហឫទ័យគ្រងជីវិតនៅដោយសេចក្តីវិវេកវិញប្រសើរ តែមិនមានបន្ទូលឲ្យអ្នកឯណានិមួយដឹង ព្រោះក្រែងរាជបរិពារភាំងខ្លាយមិនយល់ព្រម តែក្នុងព្រះហឫទ័យក៏នៅតែបំណងដូរប្ដូរខ្ជាប់មិនបេះអស់ មិនបេះហើយ ក្នុងទីបំផុត ក៏ឲ្យកើតនឿយណាយដោយគូវស្ត្រី ដែលចោមរោមជុំវិញរាជបល្ល័ង្កគ្រប់វេលា ទើបស្តេចដាក់រាជសម្បត្តិចេញចាកព្រះនគរ ពានចរទៅនៅព្រៃ នាំយកទាំងមហេសីសម្លាញ់ទៅផង លុះកាលកន្លងយូរមក ព្រះរាជា បណ្ឌុ ក៏ទិវង្គតក្នុងដំណាក់ព្រៃ ឬ អាស្រមនោះឯង មានទុរស ៥ អង្គ ទ្រង់នាម យុធិស្ធិរ ល្បីនាមជាអ្នកខ្ជួនក្នុងសច្ចៈនិងសច្ចាជ្រះថ្លា ភីម ល្បីនាមថាទ្រង់នៅព្រះកាយ ពលមហិមា ខ្ពស់និងមនុស្សធម្មតា មនុស្សញ-ញើតខ្លួនទៅ អរជុន ល្បីនាមថា មានថ្វីដៃក្នុងយុទ្ធវិធី និងការប្រើអាវុធ នកុល និងសហទេព មួយគូនេះជាកូនភ្លោះប្អូនបន្ទាប់និង អរជុន ។

កាលដំណឹងទិវង្គតនៃព្រះចៅ បណ្ឌុ ឮ ទៅដល់ព្រះនគរ អ្នកនគរបាននាំគ្រឿងកាន់ទុក្ខថ្វាយតាមប្រពៃណី និងនាំគ្នាយំសោកសម្តែងអា-ការស្តាយព្រះអង្គ ហាក់បីដូចជាញាតិរបស់គេម្នាក់ស្លាប់ទៅដូច្នោះ ព្រះញាតិវង្សព្រមដោយរាជបរិពារបាននាំគ្នាទៅអញ្ជើញព្រះនាងជាវិធវា និង

បាណ្ឌពកុមារ ទាំង ៤ អង្គ ត្រឡប់ចូលមកកាន់ក្រុងហស្តិនបុរវិញ ឲ្យសំណាក់នៅក្នុងវាំងព្រះចៅ ធ្ឫតរាស្ត្រ (ក្សត្រិយ៍ខ្វាក់) ចំណែកឯឱរសទាំង ៤ របស់ព្រះនាង ព្រះចៅ ធ្ឫតរាស្ត្រ ជាបិតុលា ក៏ទ្រង់ឧបត្ថម្ភឲ្យរៀនសូត្រសិល្បសាស្ត្រផ្សេង ៗ ជាមួយនឹងឱរសរបស់ព្រះអង្គ មាន ទុរយោធន៍ ជាដើម ។

កាលរាជកុមារបងប្អូនទាំង ៤ អង្គ ចម្រើនវ័យធំឡើង រូបរាងសក្តិសម ទ្រង់សាយ អវៈយវៈ ទាំងពួងបានលក្ខណៈគ្រប់យ៉ាងទាំងដំណើរយាត្រា និងកិរិយាមារយាទក៏ល្អមានរាសី ជាហេតុធ្វើឲ្យអ្នកនគរនឹកសង្ឃឹមក្នុងព្រះរាជកុមារទាំង ៤ ទ្រង់ចំនួនច្រើនឡើងដោយលំដាប់ គុណសម្បត្តិជាទីនិយមនៃប្រជុំអនេកនិករជន ក្នុងព្រះរាជបិតា បានធ្លាក់មកជាមត៌កដល់ព្រះរាជកុមារទាំង ៤ ពេញបន្ទុក យ៉ាងព្រះវររាជបិតា តែគុណសម្បត្តិទាំងនេះត្រឡប់ទៅជារបស់ស្មែង ធ្វើឲ្យ ទុរយោធន៍ព្រមទាំងបងប្អូន និងបក្សពួករបស់ ទុរយោធន៍ នាំគ្នាឫស្យាក្នុង បាណ្ឌពកុមារ ដែលជាបងប្អូនជីដូនមួយផងគ្នាជាយ៉ាងក្រៃពេក ។

ព្រះកុមារទាំង ៤ បានសិក្សាការប្រើអាវុធផ្សេង ៗ រាល់ថ្ងៃក្នុងរាជសេដ្ឋាវិជ្ជា គឺការប្រើធ្នូសរ ការប្រើរថសឹក ការកាប់ដាវនិងដាវ ពួយលំពែង គុន ដាល់ និងហាត់វិជ្ជាយ៉ាងដទៃទៀតជាច្រើនយ៉ាង ដែលជាភាគនៃរាជវត្ត ឬការហាត់សម្រាប់ ក្សត្រិយ៍ជាតិអ្នកចម្បាំងក្នុងសម័យនោះយ៉ាងស្ទាត់ គ្រូអ្នកបង្ហឹកបង្ហាត់រាជកុមារ អំពាលនេះ ជាព្រាហ្មណ៍

មានត្រកូលនាម ទ្រោណ អាចារ្យជាព្រាហ្មណ៍មានគុណគួររាប់អាន មានមុខងារជាអ្នកប្រិតប្រៀនវិជ្ជាទាហាន ដល់ក្សត្រិយ៍គ្រប់អង្គក្នុងត្រកូលនោះ ។

ទ្រោណអាចារ្យ បានទូលស្នើព្រះភីស្ម ឱរសព្រះចៅ សាន្តនុ និងនាង គង្គា ត្រូវជាមាព្រះ ធ្ឫតរាស្ត្រ កំណត់ទុកថា កាលពជកុមារ អំបាល នេះ រៀនយុទ្ធវិទ្យាចេះស្ទាត់ហើយ នឹងបានជាកម្លាំងជួយធ្វើសង្គ្រាមនឹងព្រះចៅ ទ្រុបទ ព្រះចៅផែនដីបញ្ចាលនគរ ដែលជាពជសត្រូវនឹងព្រះអង្គមកអំពីថ្ងៃមុន ។

ទ្រោណអាចារ្យ យកចិត្តទុកដាក់ប្រៀនប្រដៅ ហើយស្រឡាញ់ប្រណី បាណ្ឌពកុមារ ទាំង ៥ ជាសិស្សច្រើន ការរៀនគ្រានោះ អរជុនមានចំរើនលឿនទៅមុខបងប្អូនពោះមួយ និងបងប្អូនជីដូនមួយទាំងអស់ ក្នុងផ្លូវវិទ្យាអ្នកចម្បាំង មានសតិបញ្ញាស្រួចជាងគេ ហើយជាអ្នកធ្ងន់ក្នុងហិរិឱត្តប្ប ប្រដៅជឿស្តាប់ងាយជាងបងប្អូនទាំងពួង ការុណ្យចិត្តដែល ទ្រោណអាចារ្យ សម្តែងចេញមកខាងក្រៅដូច្នេះ ធ្វើឲ្យ ទុរយោធន៍ ទ្វេសចក្តីឫស្យាក្នុងកុមារទាំង ៥ ថែមឡើងទៀតជាច្រើនហើយនិងឫស្យាស្អប់ អរជុន ដែលមានថ្វីដៃពូកែជាបំផុត ។

លុះកុមារ អំបាល នោះ រៀនវិជ្ជាទាហាន ចេះចប់បរិបូណ៌ហើយ បានមានការប្រឡងថ្វីដៃកុមារអ្នកចម្បាំងអំបាលនោះ មានបណ្តាជនជាច្រើននាំគ្នាមកកាន់ទីប្រជុំ ដើម្បីមើលការប្រឡង បានទះដៃសម្តែងសេចក្តី

គ្រេកអរ ព្រុស សូរសព្ទទ្រហឹងអឹងកង ពួកអ្នកប្រឡង ក៏ចូលប្រឡង តាំងចិត្តប្រឹងប្រែងសម្តែងថ្វីដៃយ៉ាងពេញកម្លាំង តែមិនយូរប៉ុន្មានការប្រឡងនោះមិនត្រឹមតែសាកបំណោះវិជ្ជា ឬសម្តែងឲ្យល្អមើល តាំងសងខាងបណ្តាលទោសខ្លាំងឡើង ក៏ស៊ូគ្នាតែមែនទែន ទុរយោធន៍ ចាប់តស៊ូគ្នានឹងភិម គូបដិបក្សទាំងពីរនេះ ម្នះចូលប្រឡុកតយុទ្ធគ្នា យ៉ាងពេញថ្វីដៃទាំងសងខាងក៏តែតែបណ្តាលទោសខ្លាំងឡើង ៗ ស្ទើរតែនឹងហុតឈាមទៅវិញទៅមក គ្រានោះមានមនុស្សចូលទៅ ឃាត់ដោយទទួលបញ្ជាអំពីព្រះកផា និង ទោណាចារ្យ ជាគ្រូធំ ទើបគ្រាកចេញទៅ វេលារសៀលថ្ងៃនោះ មានអ្នកចម្បាំងប្លែកមុខ ចូលមកក្នុងទីប្រឡងម្នាក់ទៀតឈ្មោះថា ករណ៍ តែជាត្រកូលដូចម្តេចគ្មានអ្នកណាដឹងស្គាល់ បានចូលមកចាប់គូរតស៊ូគ្នានឹងអរជុនដែលជាអ្នកក្លៀវក្លាសំខាន់ សម្តែងស្នាដៃឲ្យអ្នកមើលទាំងឡាយឃើញថា ខ្លួនគេជាគូគ្នានឹង អរជុន ទុរយោធន៍ ឃើញកម្លាំងស្នាដៃ ករណ៍ ហើយក៏សព្វព្រះហឫទ័យណាស់ ឲ្យនាំខ្លួនចូលទៅគាល់ឯវាំង ប្រទានរង្វាន់ជាច្រើន ហើយទ្រង់ជប់លៀងទុកជាទាហានរបស់ព្រះអង្គ ។

ការប្រឡងថ្វីដៃគ្រានេះជាហេតុរុករាន ទុរយោធន៍ ឲ្យកើតសេចក្តីឫស្យាកុន ចំពោះបាណ្ឌពកុមារ ណាស់ឡើង ដោយហេតុដែលទាក់ទងមនុស្សមានជាតិដ៏ថោកទាប ដូចយ៉ាង ករណ៍ នេះក៏ស្មើដូច

ជាយកឲ្យមកបង់ចុះក្នុងគំនរភ្លើង ប៉ុន្តែចំណីឲ្យភ្លើងក៏ប្រហែលគ្នា រមែង
ពោលអ្នកខ្លួន ហើយញុះញង់បងប្អូន ឬ មិត្តសម្លាញ់របស់គេឲ្យបែកគ្នា ៗ

កុមារទាំង ៤ បងប្អូនជាអ្នកកំព្រាបិតា បានសេចក្តីបង្អៀតបង្អល់
ក្តៅក្រហាយជារាល់ថ្ងៃ តែក៏ទ្រាំអត់សង្កត់សេចក្តីប្រមាទ និងសេចក្តីមើល
ងាយគ្រប់ប្រការ ទាំងក្នុងព្រះរាជដ្ឋាន ទាំងក្នុងទីប្រជុំ មានកណ្តាលថ្នល់
ជាដើមមិនតតបវិញ មើលទៅមិនខុសអីនឹងឆ្កែ ឬ ឆ្មា ដែលជាសត្វតិរច្ឆាន
នោះឡើយ ធ្ឫតរាស្ត្រ ទ្រង់ជ្រាបការប្រមាទព្យាបាទ មើលងាយ
របស់ ទុរយោធន៍ ដោយប្រាជ្ញាញាណ ដ៏ជាអ្នកឆ្លាសក្នុងរដ្ឋប្រ-
សាសនោបាយហើយទ្រង់ក៏ឲ្យបន្ទូលបានក្មួយទាំង ៤ ឲ្យទៅនៅឯវារណា
វត ទោះបើម្ល៉េះហើយ ទុរយោធន៍ ជាមនុស្សប្រកបដោយ ប្រទុស្ត
ចិត្តជាប្រក្រតី ក៏មិនបណ្តោយឲ្យកុមារទាំង ៤ នៅជាសុខបានឡើយ
នៅតាមទៅបៀតបៀនទៀត គឺទ្រង់ឲ្យសាងវាំង ១ ធំ ប្រកបដោយ
ក្រមួនជ័រស្រល់ ជ័រទឹក និងវត្ថុដទៃទៀតដ៏ជាចំណីភ្លើង ហើយយកកំបោរ
បូកពីក្រៅយ៉ាងស្អិត ឲ្យមើលឃើញដូចយ៉ាងឥដ្ឋនិងសិលា ដើម្បីអញ្ជើញ
កុមារទាំង ៤ ឲ្យទៅនៅ ដែលសាងឡើងដូច្នេះ ដោយចេតនាបំណង
និងបំផ្លាញ បាណ្ឌពកុមារ ដោយអគ្គិនី តែនូវមានអ្នកអាណិត
គឺវិទូរ ( ជាឱរសនៃគុរុ ) ជាអ្នកមានសតិបញ្ញាវាងវៃ បានឲ្យប្រាប់
ដំណឹងនេះឲ្យកុមារទាំង ៤ ដឹងខ្លួនជាមុន លុះសាងមន្ទីរស្រេច
ទុរយោធន៍ ក៏អញ្ជើញកុមារទាំង ៤ ភាតា ឲ្យទៅអាស្រ័យនៅក្នុង

វាំងថ្មីនោះ ដោយអាងហេតុថា ក្នុងព្រះមហាពជវាំងគ្មានដំណាក់ទីងនៅឲ្យគ្រប់គ្នា ។

វេលាគ្រោះអាក្រក់មកដល់ ក្នុងរាត្រីកាល ១ នោះយប់ងងឹតពពកខ្មៅមីរងើរងោស បិទបាំងអាកាសមើលមិនយល់អ្វី អ្នកស្រុកកំពុងដេកលក់សព្វាល់ផ្ទះសម្បែងស្ងាត់ច្រៀប គ្មានមនុស្សដើរទៅមក តាមថ្នល់ហ្លួងដល់ម្នាក់ឡើយ ខណៈនោះវាំងធំដែលសាងឡើងថ្មី ក៏ស្រាប់តែលេចអណ្តាតភ្លើងភ្លឺសន្ធោឡើង ព្រួ សន្ធឹកផ្លូងផាំង ៗ មួយស្របក់ វាំងថ្មីនោះក៏ទ្រោមទៅជាផេះអស់ ទាណ្ឌពកុមារ ក៏មិនឥតគំនិត ឬ ធ្វេសប្រហែសក្នុងរឿងនេះ បានទ្រង់ជ្រាបរហស្សកម្មមកយូរថ្ងៃជាមុនហើយទើបបលាយនាការគេចវេះ អំពីអគ្គីភ័យទៅតាមផ្លូវក្នុងដី ផុតភ្នែកទុរយោធន៍ និងអ្នកដទៃ គ្មានអ្នកណាដឹងយល់គ្រានោះទុរយោធន៍ក៏រីករាយសប្បាយក្នុងចិត្តណាស់ ដែលបានទំលាយគូសត្រូវបានសម្រេចដូចប្រាថ្នា ទំនងដូចគ្នានឹងពាលរាជា ១ អង្គទៀត ក្នុងបុរាណសម័យបានទ្រង់ខ្លុយឆ្ងេកៗក្រសាលលេងជាទីរីករាយកោមលហឫទ័យក្នុង ខណៈដែលភ្លើងកំពុងឆេះផ្លូងផាំងនោះឯង ។

កមិ មុខគួរស្ញែង ដែរ ទុរយោធន៍ បានធ្វើទៅដោយប្រទុស្ត-ចិត្តគ្រានេះ ជាគ្រឿងសម្តែងបំភ្លឺឲ្យបណ្តាកស្រ្តទូទៅដឹងបានយ៉ាងច្បាស់ថា គិតនឹងដុត កាណ្ឌពកុមារ ប្អូន គឺ យុធិស្ធិរ ដើម្បីយករាជ

សម្បត្តិជាសិទ្ធិដាច់ខាត មកជារបស់ខ្លួនទាំងមូល ឱរយោជន៍បានគិតបិទបាំងរហស្សកម្ម ការសម្ងាត់នេះទុកយ៉ាងសំខាន់ តែបុរាណលោកតែងថា សេចក្ដីសម្ងាត់ដែលប្រឹងបិទបាំងណាស់ រមែងលេចចេញបាន សូម្បីកំបាំងនៅក្នុងដួងហឫទ័យរបស់បរមក្សត្រិយ៍ ព្រោះធម្មតាអណ្ដាតមិនចេះស្ងៀម រមែងរលាស់បញ្ចេញសូរសព្ទជាដំណឹងទៅខាងក្រៅជាអាចិនដំបូង ក៏គ្រាន់តែខ្សិបខ្សៀវគ្នា លុះកន្លងទៅបន្តិចមិនយូរប៉ុន្មាន ក៏លាន់ឮចេញមកខ្លាំង ៗ យ៉ាងដែលសន្ទនាគ្នាធម្មតា គ្រប់ផ្ទះសម្បែង គ្រប់កន្លែងជួលផ្សារ ឥតមានកោតក្រែងស្ដេច ឬ ចៅហ្វាយនាយណាឡើយ ហេតុដែលកើតមកទាំងនេះ ជារឿងមុខគួរខ្ពើមរអើមណាស់ ហេតុនោះកាលកន្លងមកមិនយូរប៉ុន្មាន រហស្សកម្មនោះ ក៏លេចជ្រួតជ្រាបទូទៅ សម្លេងនិន្ទានិងផរុសវាចក៏ធ្លាក់មកត្រូវ ឱរយោជន៍គលបីដូចជាគ្រាប់ភ្លៀងដែលធ្លាក់អំពីនភាកាស ។

ចំណែកឯកុមារទាំង ៤ កាតា ព្រមដោយព្រះជននីក៏នាំគ្នាលីលាចេញចាកព្រះនគរ បែរមុខឆ្ពោះសំដៅអារញ្ញប្រទេស យកព្រៃប្រឹក្សាជាទីពឹង ក្នុងវេលាដែលពនេចរទៅ បានត្រូវកំដៅថ្ងៃ ត្រូវភ្លៀងនិងសេចក្ដីទឿយលំបាកស្រេកឃ្លានសព្វទិវារាត្រី មានតែសេចក្ដីអំណត់អត់ធន់ គឺអធិវាសនខន្តីនេះឯង ជាគ្រឿងការពារក្ដៅរងារ និងសេចក្ដីស្រេកឃ្លាន ជួនកាលម្ដាយនិងកូនអស់កម្លាំងណាស់ ក៏នាំគ្នាឈប់សម្រាកកាយខាងមាគ៌ា កាលល្ហៃហើយក៏នាំគ្នា ត្រេចពនេចរតទៅ ជួនកាលក៏ត្រូវចូង

គង្គា នាំគ្នាព្យាយាមហែលទៅកាន់ត្រើយនាយ ខ្សែទឹកដាក់ផាយផ្កាប់ផ្ងារ ទំរាំតែដល់ត្រើយផលសា ដែលឆ្ងាយលន្ទឹមលន្ទោច ក៏អស់កម្លាំងទៀប ដាច់ខ្យល់ បានរួចអំពីគ្រោះថ្នាក់ទៅម្តង ៗ ហាក់ដូចបានកើតឡើងជាថ្មី កាលរួចទៅហើយនឹងរកទីសំណាក់ក័កអាស្រ័យក៏មិនបាន គោងនាំគ្នាដើរ កាត់ភូមិប្រទេសដ៏ដាច់សង្វែងនោះសន្សឹម ៗ ទៅ ទាល់តែមាតាស្ងួតក ស្រេកទឹកខ្លាំងណាស់ ក៏ប្រេះប្រាណលើប្រថពី ភីម អាណិតម្តាយក៏ខំ ត្រេចស្វែងរកវារិ តែក៏គ្មានអ្វីនឹងដួសដង ទើបដោះសំពត់ឆ្នូតមកជ្រលក់ ទឹក ឲ្យជោកហើយ ក៏ម្ចីម្ចាយកមកពូតបន្តក់សម្រក់ចូលក្នុងមាត់ មាតា ជួយជីវិតមាតាឲ្យរួចទៅបាន ១ គ្រាតែទឹកក្នុងសំពត់នោះតិច មិនល្មម នឹងរំលេមបំពង់កបងប្អូន ៤ នាក់ទៀតដែលនឿយលំបាកបកជាមួយគ្នា ទាំងឃ្លានអាហារក៏សែនឃ្លាន គ្មានប្រទះផលាផលឯណាទីមួយ ដែល គួរនឹងបរិភោគក្នុងថ្ងៃនោះ ម្តាយនិងកូនមិនអាចនឹងដើរផ្លូវទៅបាន ក៏ឈប់ សម្រាកកាយនៅក្រោមដើមព្រៃព្រឹក្សា តែកាយនិងចិត្ត ភីម មិនបាន សម្រាកសម្រាន្តឡើយ ដោយអំណាចឈឺចាប់ក្តួលក្តៅក្នុងចិត្ត និយាយរអ៊ូ តែម្នាក់ឯងថា អ្នកណាមួយ នឹងជៀសវាងលិខិតព្រះជាម្ចាស់លើស្ថានសួគ៌ បាន ឱកម្មអើយកម្ម កម្មដែលបងប្អូនយើង មកត្រាំងវេទនាគ្រានេះ ចិត្តយើងក្តៅរ៉ើក្តៅម៉្លេះ ទៅខាងមុខគ្រោះកាច នឹងមានមកដល់យើងជា ច្រើនទៀត ឬ យុធិស្ឋិរ ជាអ្នកគួរបានរាជសម្បត្តិ ក្នុងប្រទេសកុរុរដ្ឋ ឥឡូវនេះមកដេក នៅកណ្តាលដី កណ្តាលខ្ចប់ នឹងរកកម្រាលក្រាល

រេកប៉ុនបាតដៃក៏គ្មាន ចំណែកឯ ទុរយោធន៍ អ្នកដណ្ដើមរាជសម្បត្តិ គេដេកអង្គុយលើកម្រាល ក្រាលលាតស្អាតព្រមពាសពេញដោយគ្រឿងតម្កើងកិត្តិយសនិងអានុភាព ព្រះរៀមរបស់យើង ជាមនុស្សចិត្តទន់ មិនសូវចេះប្រកាន់ទោស ក្រោធខឹងនឹងអ្នកឯណា ចេះតែឲ្យអភ័យដល់គេងាយ ៗ កុំអី ..... ម៉េះគេសោយសុខសម្បត្តិត្រេកត្រអាលចិត្តគេរីករាយស្ទើរនឹងអណ្ដែតទៅជាប់នឹងស្ថានសួគ៌ ។

## ភាគពីរ

## ការស្វយម្ពរ ឬការរើសគូ នៃនាងទ្រោបទី

សុំឲ្យនឹកមើលចុះថា ម្ដាយនិងកូនដែលត្រូវនិរទេសចាកនិវេសន៍រាជស្ថានទៅក្នុងយប់នោះ រមែងល្ហិតល្ហៃយ៉ាងម្ដេច តែទោះបីម៉្លឹង ជាតិខត្តិយអ្នកចម្បាំងរមែងមានមានះជាធម្មតា នាំគ្នាដើរកាត់ព្រៃទៅដោយប្រមាណស្មានក្នុងចិត្ត មិនដឹងជាគ្រោះកម្មវានឹងនាំទៅដល់ណា ១ ទៀតនឹកបារម្ភណ៍ក្រែងពួកសត្រូវដិតដោយតាមមកយាយី ទើបដោះគ្រឿងទ្រង់ចេញអស់ យកផង់ធូលីខ្មៅមកប្រឡាក់លាបកាយ ផ្លាស់ផ្ទៃតែងខ្លួនជាយោគី ដើម្បីសុំទៅបន្តិចប៉ុណ្ណោះ ឯព្រះជននីសោត ក៏តោងបួមព្រះអង្គជាស្រីអនាថា ។

ខណៈដែលដើរផ្លូវមកក្នុងថ្ងៃ ១ នោះ ម្ដាយនិងកូនបានជួបនឹងព្រាហ្មណ៍ ១ ពួក គេប្រាប់ថា គេនឹងទៅក្នុងការ ស្វយម្ពរធិតា

ព្រះចៅ បញ្ចាលរាជ ការស្វយម្ពរ គ្រានេះ ជាការធំអឹកធឹក ក្នុង មនុស្សនានា នឹងប្រទះឃើញបាន ក៏តែមួយដង មួយគ្រា ប៉ុណ្ណោះ បាណ្ឌពកុមារ បានឮដូច្នោះ ក៏រៀបចំខ្លួននឹងដើរផ្លូវទៅកាន់ដែន បញ្ចាល ដើម្បីនឹងជៀសចាកភយន្តរាយ ផងដែលមានចំណង់នឹងទៅ មើលការស្វយម្ពរ ។

មកដល់បញ្ចាលរាជធានី ជាប្រទេសបដិបក្សខ្មាំងមកអំពីដើម ត ត ទ្រង់ទើបធ្វើសង្គ្រាមនឹងគ្នាមកមិនយូរប៉ុន្មាន ដោយបញ្ញការនៃ ទោណ អាចារ្យ តែទោណអាចារ្យ ឲ្យលើកទោសព្រះចៅបញ្ចាលរាជ ដ៏ជាបច្ចាមិត្តទុកជីវិតឲ្យម្តង ទាំងបានប្រគល់ផែនដីដែលមានជ័យជំនះ ឲ្យត្រឡប់ទៅវិញ តាំងអំពីនោះ ព្រះចៅទ្រុបទ ព្រះចៅផែនដីបញ្ចាល រដ្ឋឃើញសេចក្តីក្លាហានក្នុងពិជ័យសង្គ្រាមនៃ បាណ្ឌពកុមារ ទាំង៥ អង្គ ក៏ទ្រង់សព្វព្រះរាជហឫទ័យ មានចំណង់នឹងចង់លើករាជធីតាឲ្យជា បាទបរិចារិកា នៃ បាណ្ឌពកុមារ គឺនឹងទ្រង់លើកឲ្យ អរជុន តែរឿងនេះទ្រង់ទុកតែក្នុងព្រះរាជហឫទ័យ មិនបានបញ្ចេញព្រះវាចា ឬប្រាប់ ព្រះរាជតម្រិះនេះដល់អ្នកឯណា ព្រោះសិទ្ធិនៃការរើសគូ មិនមែននៅក្នុង អំណាចព្រះអង្គជាបិតា គឺស្រេចហើយតែនាងទ្រៅបទីដែលជាធីតា ស្មោះ ស្ម័គ្រ ឬ មិនស្មោះស្ម័គ្រ តែដើម្បីនឹងបដិបត្តិការឲ្យសមព្រះរាជហឫទ័យ ក្នុងរឿងនេះ ទើបទ្រង់ឲ្យបាត់ការ ១ យ៉ាង ដែលទ្រង់ជឿមាំក្នុងព្រះ

ហប្រិយថា នឹងធ្វើបានក៏តែអាជុំនមួយនាក់ប៉ុណ្ណោះ គឺទ្រង់ឲ្យធ្វើមហាធនូ ១ ធំ និងរូបត្រីមាស ១ ឲ្យយកទៅព្យួរលើសសរខ្ពស់ មានចក្រវិលធាល់អំពីក្រោម ក្នុងរឿងនេះមានខសន្យាថា អ្នកដែលជាគូព្រេងរបស់ព្រះរាជធីតា គោងជាអ្នកអាចយិតមហាធនូនោះ បានដោយកម្លាំងដាក់ព្រួញផ្គងបាញ់ចេញទៅ ឲ្យព្រួញរត់ទៅតាមចន្លោះស្លាបចក្រ កុំឲ្យប៉ះពាល់ស្លាបចក្រ រហូតទៅត្រូវភ្នែកត្រីមាស ដែលព្យួរខាងលើ ឲ្យត្រីនោះធ្លាក់ចុះដល់ដី អនុញ្ញាតឲ្យអ្នកធ្វើការប្រឡង ដណ្តើមយកនាងរាល់ ៗ គ្នា បាញ់តែប្រាំព្រួញប៉ុណ្ណោះ ព្រោះហេតុនោះបណ្ដាអ្នកបាញ់ទាំងប៉ុន្មាន ទ្រង់ជឿថា មានតែអាជុំនប៉ុណ្ណោះ អាចបាញ់ត្រូវវង់សម្គាល់បាន ។

សម្រាប់ក្នុងការ ស្វយម្ពរនេះព្រះចៅ បញ្ចាលរាជ មានព្រះរាជរាជបញ្ជាឲ្យបួលចាំងជម្រះទីកន្លែងដ៏ធំហើយឲ្យសង់ព្រះពន្លាជាសសំពត់សមានកំពូលយ៉ាងមណ្ឌបបិទមាស ប្រដាប់មណីផ្សេង ៗ ប្រាលន្លោលមានការលៀងភោជនាហារ និងល្បែងលេងនានាក្នុងព្រះរាជវាំង ក្នុងវេលាមុនប្រឡងធនូសិល្បប្រមាណជាងពីរសប្តាហ៍ (ជាងពីរអាទិត្យ) លុះដល់ថ្ងៃប្រឡងក្សត្រិយ៍ទាំងឡាយ ដែលប្រាថ្នាព្រះរាជធីតាជាបំណាច់ថ្លៃដៃ ក៏នាំគ្នាមកសន្និបាតអង្គុយចាំត្រៀបត្រាតាមទីកន្លែងរបស់ខ្លួន ក្នុងរោងទងមុខព្រះពន្លាហ្វូងអង្គុយជុំកង់ជារង់ ដូចជារូបព្រះច័ន្ទពាក់កណ្ដាលដួងបែរមុខទៅព្រះពន្លា ។

លុះក្សត្រិយ៍ទាំងឡាយអង្គុយរៀបរយស្រួលហើយ នាងទ្រោបទី ក៏ស្តេចយាត្រាចូលមកស្ថានទីប្រជុំ ព្រះហស្តដ៏ទន់ភ្លន់ ដូចប្រមោយ ព្វារណ៍ ក៏កាន់ភួងមាល័យមួយមកផង ភួងមាល័យនេះប្រៀបដូចព្រះ វលញ្ចករ (ត្រា) ដែលនាងទឹងគប្បីប្រថាប់ក្នុងការរើសគូរស្ទួនរបស់នាងឲ្យ ដាច់ខាតទៅ ។

បណ្តាក្សត្រិយ៍ដែលប្រជុំក្នុងការស្វយម្ពរគ្រានោះ មានទុរយោធន៍ ករណ៍ ទាណ្ឌពកុមារបងប្អូន ៥ អង្គ ក្រិស្ណ ពលរាម ជាអនុជ ក្រិស្ណ ក្សត្រិយ៍យាទពច្រើនអង្គ ព្រះរាជាសិន្ធុ ព្រម ទាំងនុរស (មិនប្រាកដថាប៉ុន្មានអង្គ) ព្រះរាជាចេតិ ព្រះរាជាកោសល ព្រះរាជាម័ទ្រ នៅមានក្សត្រិយ៍ក្រៅ អំពីដែលចេញព្រះនាមមកហើយ ជាច្រើនអង្គ តែ ទាណ្ឌពកុមារ ទាំង ៥ មិនបានចូលទៅអង្គុយ ក្នុងចំណោម ក្សត្រិយ៍អម្បាលណោះទេ ទៅអង្គុយក្នុងចំណោមពួក ព្រាហ្មណ៍មួយពួកផ្សេង ព្រោះទ្រង់ប្លមជាព្រាហ្មណ៍មកក្នុងវេលានោះ ភ្នែក មនុស្សទាំងអស់ក្នុងវេលានោះសម្លឹងមើលតែឆោមលំអនៃនាង ទ្រោបទី ទីសន្និបាតនោះ សូម្បីមានមនុស្សច្រើនជ្រៀតជៀតញៀតញាត់គ្នាទាំងម៉ឺន ក៏ស្ងាត់សម្ងំឈឹងក្រាម ក្នុងខណៈដែលធូស្តទយុម័ន ជាអនុជរបស់នាង ទ្រោបទី សូត្រប្រកាសតាមប្រវេណីដូច្នេះ ។

ព្រះអង្គម្ចាស់ក្សត្រី ទ្រោបទី ទ្រង់នៅឆោមឆើតឆាយ មកឈរនៅ

ទីនេះៗ អ្នកណាអាចយិតធ្នូនេះបានហើយ បាញ់ហ្វូតកង់ចក្រដែលកំពុងវិលទៅប្រហារក្អែកត្រីខាងលើឯណោះ បើអ្នកនោះឯងជាថៅអ្នកនេះសោតនិងបាននាងជាបាទបរិចារិកា ។

សូត្រប្រកាសស្រេចហើយ ក៏ទ្រង់សូត្របញ្ជីរាយនាមវង្ស និងប្រវត្តិដោយសង្ខេប ពណ៌នាគុណសម្បត្តិនៃក្សត្រិយ៍អំបាលនោះឲ្យនាងស្តាប់ ហើយឲ្យនាងយកភួងមាល័យទៅបំពាក់កអ្នកនោះដែលបាញ់ត្រូវវង់ តាមដែលប្រកាសមកហើយ ។

លំដាប់នោះ ក៏ចាប់ផ្តើមប្រឡងធ្នូសិល្បរើសស្នាដៃពូកែ ក្សត្រិយ៍អំបាលនោះ ខ្លះក៏នឹកកក្កុះព្រះហឫទ័យ ដែលមើលទៅឃើញមហាធ្នូដ៏សម្បើមនិងវែងដែលចាំតែគេចព្រួញធ្នូ គិតថាម្តេចក៏បាញ់មិនត្រូវឲ្យគ្រាន់តែយិតធ្នូបានក៏ពិបាកវិសេសណាស់ទៅហើយ ក្សត្រិយ៍ទាំងឡាយចូលទៅប្រឡង ម្តង ១ អង្គ ៗ រួចហើយក៏ត្រឡប់មកអង្គុយតាមដើមវិញ ដោយមិនវិសេសប្លែកអ្វី ធ្វើឲ្យតែអ្នកអង្គុយចាំមើល លបគស់សំណើចលេង តែសាមីខ្លួន មានតែសេចក្តីអាមនស្ស តូចចិត្តពន់ប្រមាណ ដែលខុសគំនិតគិតទុកមកនោះបែរជាមិនសមប្រាថ្នា ព្រះភក្ត្រមិនស្រួលតែពលអង្គ ពួកអ្នកចម្បាំងដែលល្បីឈ្មោះទាំងប៉ុន្មាន កាលដើរទៅជិតមហាធ្នូ ក៏ឲ្យស្លុតមុខស្លេកស្លាំង មិនអាចនឹងលើកមហាធ្នូនោះរួចឡើយ ខ្លះដើរចូលទៅខែងរែងជាងគេ ដោយអំណាចមានះចង់ធ្វើបុកឡើង តែក៏គង់ត្រឡប់មកអង្គុយដដែលវិញ មិនប្លែកទៅជាងអ្នកមុនៗ ទាំងពួង អ្នក

ដែលធ្វើការមិនសម្រេចអំបាលនោះ ខ្លះក៏ក្លែងធ្វើទឹកមុខឲ្យរីករាយ តែសេចក្ដីអៀនខ្មាសក្នុងចិត្ត ខ្លះក៏ធ្វើជាញញឹមបែបស្ងួត ៗ ។

លំដាប់នោះ កណ៌ ជាមនុស្សខ្លាំងពូកែយ៉ាងចំណាប់ ដើរចូលទៅកាន់មហាធនូ ចាប់យកតម្លោះធនូមកបានភ្លាម ព្រះចៅ ទ្រុបទ និងឱរស ក៏ស្ញើបក្នុងព្រះហឫទ័យ ក្រែងកណ៌ជាមនុស្សដែរព្រះអង្គមិនស្គាល់ជាតិកំណើតជាដូចម្ដេច ធ្វើការសម្រេច តែមុននឹងបាញ់ចេញទៅ នាង ទ្រោបទី បានស្រែកប្រកាសសេចក្ដីបំណងរបស់នាងថា នាងមិនសព្វព្រះហឫទ័យនឹង កណ៌ ដ៏ជាបុត្រនាយសារថី កណ៌ ចេញស្លុតទឹកមុខ មានក្រសែឈាមគោសឡើងព្រាល ៗ ទម្លាក់ធនូចុះ ហើយក៏ត្រឡប់មកអង្គុយតាមដើម ។

នៅមានអ្នកចូលទៅប្រឡងក្រោយ កណ៌ ទៀតជាច្រើនបាន ប្រឹងប្រែងក្លែងធ្វើមានះនែងរែង តែក៏មិនសម្រេចដូចប្រាថ្នា ខ្លះខិតខំហួសកម្លាំង ភ្លាត់ចំណាប់ដួលដេកប្រទែងលើផែនពសុធា បណ្ដាអ្នកអង្គុយមើលទាំងប៉ុន្មាន ក៏នាំគ្នាសើចលាន់ ដោយឃើញថាជារឿងគួរអស់សំណើចពួកបាណ្ឌពកុមារ ដែលអង្គុយនៅក្នុងកំឡុងពួកព្រាហ្មណ៍ ឃ្លាតអំពីពួកក្សត្រិយ៍ទៅបន្តិច អង្គុយមើលការគេព្រងើយ ហាក់បីដូចជាគ្មានកិច្ចការអ្វីជាមួយនឹងគេក្នុងថ្ងៃនោះទេ ខណៈនោះ មាណពគោមស្រស់ប្រិមប្រិយ៍មួយនាក់ ក្រោកដើរចេញមកអំពីពួកព្រាហ្មណ៍អម្បាល នោះ បណ្ដា

អ្នកប្រជុំនៅទីនោះ ក៏នាំគ្នាសើចយីក ៗ ទូទៅទាំងព្រះលាន ព្រោះមក
នឹកអស់សំណើចក្នុងចិត្តថា ព្រះ (១) អ្នករៀនតែធម្មធម្មោ ម្ដេចក៏ក្លាមក
ប្រកួតអួតថ្វីដៃនឹងក្សត្រិយ៍ជាតិអ្នកចម្បាំងដែរ ៗ

អាស្រ័យហេតុនោះព្រាហ្មណ៍ខ្លះដែលអង្គុយនៅទីនោះ ទើបនិយាយឃាត់ព្រាហ្មណ៍កម្លោះអ្នករួមភេទជាមួយគ្នានោះថា កុំទៅប្រឡងនឹងគេអី អ្នកខ្លះនិយាយថា ជាតិព្រាហ្មណ៍មែនមានថ្វីដៃគ្រប់យ៉ាង ទាំងការគិតអាន ទាំងការប្រើអាវុធផ្សេងៗមិនមែនចេះតែរៀនសីលតបុណ្ណោះទេ អ្នកខ្លះ គ្រាន់តែសម្លឹងមើលព្រាហ្មណ៍កម្លោះនោះ ដោយសេចក្ដីអស្ចារ្យ ឥតមានស្រដីថាអ្វី ព្រាហ្មណ៍កម្លោះដោះគ្រឿងយោគី ដំឡើងដោយស្បែកម្រឹគចេញគរទុកក្នុងទីម្ខាង ហើយដើរចូលទៅកណ្ដាលស្នាមយ៉ាងរាជសីហ មើលទៅទ្រូងទិងស្នាសាយចង្កេះមូលយ៉ាងរាំសុទេវិន ដើរប្រទក្សិណព្រមទាំងការនាតែក្នុងចិត្ត ចំណែកឯភ្នែកមនុស្សជាច្រើនពាន់ ក៏សម្លឹងចំពោះសំគីមើលតែឆោមព្រាហ្មណ៍កម្លោះៗនោះ ក៏កក្រាយចាប់លើកមហាធនូឡើង យិតតម្លោះក្រឹត មកដោយកម្លាំងដ៏មហិមា បណ្ដាអ្នកអង្គុយមើលជុំវិញស្នាម ក៏ទះដៃលាន់ នាំគ្នានិយាយសរសើរផ្សេងៗត្រឹមតែយិតធនូទន់មកចុះប៉ុណ្ណោះ នៅមិនទាន់អស់រឿង នៅមានការដែលសំខាន់ជាងនេះដែលគេត្រូវធ្វើ គឺបាញ់ត្រូវវង់ អ្នកមើលទាំងអស់ឈប់មើលឆោមព្រាហ្មណ៍ នាំគ្នាសម្លឹងឆ្ពោះតែទៅត្រង់វង់ មិនបានដាក់ភ្នែក

---

១- ពាក្យនេះសម្រាប់ហៅព្រាហ្មណ៍ អ្នកសិក្សាក្នុងផ្លូវសាសនាព្រាហ្មណ៍ ។

ព្រោះជាវេលាដ៏សំខាន់ យកឈ្នះយកចាញ់គ្នាក្នុងវេលាប្រមាណមួយមីនុត ទៀតប៉ុណ្ណឹង (១) ។

គ្រានោះព្រាហ្មណ៍ក៏ទម្លាក់ក្រញាំកែក្រោយរំពើន ហើយស្រវេរ នេត្រតម្រង់ លែងតម្មោះធ្នូខ្ទាប់ចេញទៅ ព្រួញក៏ទៅប្រហារភ្នែកត្រី មាសធ្លាក់ចុះដល់ធរណី ខាងអ្នកមើលក៏ទះដៃប្រែសៗលាន់ទាំងស្នាម ធំ អ្នកដែលមានជ័យនោះជាអ្នកណាក៏តាម គេមិនត្រូវការនឹងគិតយក មកជាអារម្មណ៍ គេត្រូវការតែសប្បាយជាការធំ និងត្រូវការឲ្យដឹងផល ជាបំផុតនៃការនោះ ដែលកំពុងតែឃ្លានដឹងរាល់គ្នា គឺបាញ់ត្រូវឬមិន ត្រូវប៉ុណ្ណោះ ។

តែកាលណាពួកក្សត្រិយ៍ អ្នកទ្រង់មាលាសៀតពោមសត្វ ឬ ទ្រង់ ឆត្រ ដើរត្រង់ទៅកាន់ទីធ្នូសិល្បម្តង ១ ទ្រង់នាង ក្រោបង៉ឹ ក៏ជ្រួល ប្រាលឡើងមកកាលនោះ ត្រីមាសដែលព្យួរតែងគោងលើកងចក្រ ជា គ្រឿងសម្គាល់យថាកម្មរបស់នាង ឥឡូវនេះ នាងក៏កាន់តែរំភើយក្នុង ហឫទ័យខ្លះហើយ ចិត្តរបស់នាងទៅជាប់ប្រតិព័ទ្ធនឹងប្រុសកម្លោះ ដែល មានស្បែកខ្លា ជាគ្រឿងដណ្តប់កាយនោះ តាំងតែគេឈានជើងទៅ កណ្តាលស្នាម នាងក៏នឹកស្នេហាជាងក្សត្រិយ៍ទាំងឡាយ ដែលទ្រង់ប្រែ ពណ៌ស្វាយ ពោះបីនាងមិនបានគិតទុកពីដើមថា ប្រុសកម្លោះនោះនឹង

---

១ ប្រាសាទនគរវត្ត នៅព្រះរបៀងទី ១ ជ្រុងពាយ័ព្យមានរូបភាពប្រឡងធ្នូសិល្បដូច្នេះ ខុសគ្នាតែរូបសម្រាប់បាញ់នៅទីនោះ ជារូបសត្វលោក ។

ចូលមកធ្វើការប្រកួតថ្វីដៃនឹងគេក៏ពិត តែខណៈដែលគេឈរកណ្ដាលស្នាមនឹងធ្វើការប្រឡង ចិត្តរបស់នាងរំជួល ដោយចង់ឲ្យគេបានទទួលសេចក្ដីអំណរវេលានេះ ក៏សមដូចមនោរថរបស់នាងហើយ នាងញញឹមដោយអារម្មណ៍ដ៏រីករាយ ទើបបោះយាត្រាទៅរកអ្នកដ៏មានជ័យដោយរួសរាន់ យកកួងមាល័យទៅបំពាក់ក ឲ្យប្រុសកម្លោះ ជាគ្រឿងប្រកាសសិទ្ធិដាច់ខាតថា ប្រុសកម្លោះនេះជាគូកិរម្យរបស់នាង បីដូចជាប្រថាប់ដោយព្រះវលញ្ជករ ។

ការដែលមើលទៅឃើញ ទ្រោបទី យកកួងផ្កាទៅបំពាក់ឲ្យអ្នកមានជ័យនោះ បណ្ដាអ្នកដែលរួមការប្រឡងជាមួយគ្នា តែមិនសម្រេចសមប្រាថ្នា នាំគ្នាមកអង្គុយជូតញើសនោះ ក៏បណ្ដាលឲ្យកើតសេចក្ដីឫស្យា និងសេចក្ដីឈឺចិត្ត ពេលពាលក្នុងចិត្តមហិមា នឹងទប់ទល់អាត្មាពុំបាន ក៏ប្រឹក្សាគ្នាហើយយល់ឃើញព្រមគ្នាថា ត្រូវតែសម្លាប់អ្នកដែលមានជ័យ ដែលមិនប្រាកដនាមនេះមួយរំពេចជាដាច់ខាត នឹងទុកវាឲ្យរស់នៅនិងកើតសេចក្ដីអប្បយសដល់គេឯងរាល់គ្នាទួទៅ ត្បិតវាជាយាចកដើរតែសូមទានគេតាមថ្នល់ ហើយមកបានធីតាក្សត្រិយ៍ ជាបាទបរិចារិកាដូច្នេះ ធ្វើឲ្យអាម៉ាស់មុខ ធ្វើឲ្យអាប់ឱនកិត្តិយស ព្រោះវាមកមើលងាយរាជត្រកូល កំពូលឥស្សូររបស់យើង ត្រូវឃុំខ្លួននាង ទ្រោបទី ទុកព្រោះជាស្រីអត់ខ្មាស ដាក់ខ្លួនបន្ទាបត្រកូលសុខចិត្តយកព្រាហ្មណ៍អនាថាជាកស្ដាមើលងាយបារមីព្រះបិតា និងព្រះរាជាទាំងឡាយ ដ៏ជាពង្សសម្ពន្ធ

មិត្រសឹងទ្រង់នូវកិត្តិយសដ៏ខ្ពង់ខ្ពស់ យើងកល់គ្នានឹងមើលបំណាំតទៅទៀតពុំបានឡើយ ។

ភ្លាមស្រែកគំរាមលាន់ដោយគ្រោធក្តាត់ ពួកក្សត្រិយ៍អ្នកប្រឡងធនូសិល្ប៍ទាំងប៉ុន្មាន ក៏លោតចេញអំពីកន្លែង រាំក្របីចិញ្ចែងចូលទៅរកព្រាហ្មណ៍កម្លោះ ដែលបាននាងជាបំណាច់ថ្វៃដៃ កើតតស៊ូគ្នាឡើងជាកោលាហល គ្មានអ្នកណាអាចនឹងឃាត់បាន ការស្វយម្ពរក្លាយទៅជាការកាប់សម្លាប់គ្នាកណ្តាលស្នាមធំ ក្សត្រិយ៍ទាំងឡាយដែលមកដើម្បីបាននាង ត្រឡប់ជាមកដេករនៀលលើផែនពសុធានាំគ្នាចូលមកក្នុងអន្ទាក់មច្ចុរាជដោយអគ្គីហេតុដ៏គួរសមគេណា៎ ជាអ្នកល្បីនាមបានចូលប្រឡងយុទ្ធនិងពួកព្រាហ្មណ៍អ្នកមានជ័យ តទល់គ្នាល្អុតអស់វេលាជាយូរ មួយចាក់ មួយចាប់ មួយកាប់ មួយកាត់ មួយកែង មួយគេច កែក្រាយការ មួយរុកមួយរុញសន្ធុញចូលជិត សង្ក្រុករពេមតរេពាំខ្ទង់កលប៊ីដូចខ្យល់កំបុតត្បូង ប្រហារត្រូវដៃជើងព្រាហ្មណ៍ដោយព្រួញធនូជាច្រើនអន្លើ រាប់ថាបាញ់ត្រង់គ្រាន់បើ ។

ទ្រៅបទី វេលានោះជាទុក្ខតឹងទ្រូងណាស់ណា នឹកប្រទេចផ្កាសារមតិកនៃសេចក្តីលំអោមរបស់នាងតែក្នុងចិត្ត ដែលជាហេតុឲ្យកើតកាប់សម្លាប់គ្នា លោហិតប្រឡាលពាសស្នាម តែតមកបន្តិច នាងក៏រម្ងាប់ទុក្ខនោះបាន ដោយឃើញថាខ្លួននាងគ្មានមន្ទិលសៅហ្មងប្រការ ១ ទៀត ជីវិតរបស់ប្រុសដែលជាគូរបស់នាងសោត ក៏ប្រាសចាកអន្តរាយ ត្បិត

# អំពីអ្នកតំណាងខេត្តកំពង់ចាម

ដង្ហែគម្ពីរនិងវត្ថុផ្សេងៗជារបស់សម្រាប់ពុទ្ធសាសនា ចូលមកព្រះរាជបណ្ណាល័យកម្ពុជា

កាលពីថ្ងៃ ៨ ខែស្បូយេត ឆ្នាំ ១៩២៩

ក្រុមការ ជុំ-ម៉ៅ ធ្វើរាជការនៅព្រះរាជបណ្ណាល័យ អធិប្បាយ

---

កាលពីថ្ងៃ ៨ ស្បូយេត ឆ្នាំ ១៩២៧ អ្នកតំណាងខេត្តកំពង់ចាម បាន ដង្ហែវត្ថុផ្សេងៗ ដ៏ប្រសើរ មកតម្កល់ទុកក្នុងព្រះរាជបណ្ណាល័យ ដែល ជាមន្ទីរសម្រាប់រក្សាទុកវត្ថុផ្សេងៗ ជារបស់ក្នុងពុទ្ធសាសនា ដើម្បីទុក ជាកេរ្តិ៍ជាតិខ្មែរទាំងអស់គ្នា ឲ្យបានគង់នៅកុំឲ្យអន្តរាយដោយធ្វេសប្រ-ហែសទៅបាន ។

វត្ថុទាំងប៉ុន្មានដែលដង្ហែមកនោះ សុទ្ធតែជារបស់មានតម្លៃរកបាន ដោយកម្រណាស់ គឺក្រៅពីព្រះពុទ្ធរូបមាសប្រាក់តូចឬគ្រែធម្មាសនៈ និង របស់បូរាណផ្សេងៗនោះ យើងបានសម្គាល់ឃើញមានគម្ពីរនិងសាស្ត្រា ចំនួន ២៣៣ មុខ ដែលប្លែកៗមិនដែលមានក្នុងព្រះរាជបណ្ណាល័យកាល ជាន់មុន ។

វេលាម៉ោង ៣ ល្ងាច នៅថ្ងៃដូចមានខាងលើកប៉ាល់ទាំង ៤ ដែល សណ្តោងទូកជាច្រើននាំនូវវត្ថុផ្សេងៗ ជាគ្រឿងអំណោយមកពីកំពង់ចាម ដល់មកកំពង់ផ្សារសួនក្រុងភ្នំពេញ ខាងមុខព្រះរាជបណ្ណាល័យ ក្នុងវេលា នោះអស់លោកកុងស៊ុលសេនាបតី ព្រះរាជវង្សានុវង្ស និងនាម៉ឺនសព្វមុខមន្ត្រី

មានលោក ឡឹ សេុីផ្គ សុប៊ើរយ៉ើរជាប្រធាន នៅចាំទទួលខាងក្នុងព្រះរាជបណ្ណាល័យ លុះជញ្ជូនវត្ថុផ្សេង ៗ ចេញពីទូកអស់ហើយ ទើបតាំងដង្ហែចូលក្នុងព្រះរាជបណ្ណាល័យតាមទ្វារខាងជើង រៀបរៀងជាជួរមានលោកសង្ឃខាងមុខ ទើបឧបាសកកាន់គម្ពីរ និងវត្ថុផ្សេង ៗ ដើរបន្ទាប់ក្រោយបង្អស់ពួកឧបាសកដើរជាជួរគ្នាទៅ តែក្នុងវេលានោះគួរឲ្យមានសេចក្តីស្តាយពន់ពេកណាស់ ព្រោះទីព្រះរាជបណ្ណាល័យនោះតូចពេកមនុស្សចូលមិនអស់សល់នៅខាងក្រៅជាច្រើន លើសចំនួនដែលចូលផុតប្រហែល ៤ ដង លុះអ្នកតំណាងខេត្តបានចូលពេញព្រះរាជបណ្ណាល័យហើយ ព្រះរាជបណ្ណាល័យ បានចាត់ក្រុមការ ជុំ-ម៉ៅ ឲ្យសូត្រសេចក្តីឲ្យពរសព្ទសាធុការដល់អ្នកតំណាងខេត្តកំពង់ចាមទាំងអស់គ្នា និងដល់អ្នកតំណាងខេត្តកំពង់ធំទៀត ដែលបាននាំគម្ពីរខ្លះមកតម្កល់ទុកក្នុងព្រះរាជបណ្ណាល័យ កំណត់ ១ ថ្ងៃមុនកំពង់ចាម ហើយដែលព្រះរាជបណ្ណាល័យឃាត់ឲ្យរង់ចាំរៀបចំទទួលជាមួយនឹងខេត្តកំពង់ចាម ។

ឯសេចក្តីដែលសូត្រនោះ· ដូចមានខាងក្រោយនេះ

ព្រះរាជបណ្ណាល័យកម្ពុជា សូមឲ្យពរសព្ទសាធុការ ដល់អ្នកតំណាងខេត្តកំពង់ចាមទាំងអស់គ្នា ទាំងលោកសង្ឃ ទាំងក្រុមការក្អាក់ង៉ារ និងឧបាសកឧបាសិកា ដែលបានមកជួបជុំក្នុងទីនេះ មានលោក សេុីផ្គ និងលោកចៅហ្វាយខេត្តជាអធិបតីសូមឲ្យបានសេចក្តីសុខ សេចក្តីចម្រើន

កុំឲ្យមានឧបទ្ទវន្តរាយផ្សេងៗមកបៀតបៀនបាន ។

យើងមិនឲ្យពរតែខេត្តកំពង់ចាម ១ ឡើយ គឺយើងថ្វាយសព្ទសាធុការនេះ ចំពោះដល់ខេត្តកំពង់ធំទៀត ដែលបានចាត់មេគណនិងចៅអធិការគ្រប់វត្តនាំគម្ពីរដីកាខ្លះមកផង ដោយមានលោកស៊ុផន្ត នឹងលោកចៅហ្វាយខេត្រជាអគ្គនាយក ។

ព្រះរាជបណ្ណាល័យមានសេចក្តីសោមនស្សដោយពេញទី ដែលបានឃើញខេត្រយ៉ាងធំៗ ដូចជាខេត្រកំពង់ចាម និងខេត្តកំពង់ធំទាំង ២ នេះ នាំនូវអំណោយមកជួយ ដើម្បីសេចក្តីចម្រើនក្នុងសតិបញ្ញារបស់ខេមរៈជាតិ ព្រោះមន្ទីរនេះជាកន្លែងសម្រាប់ថែទាំរក្សាគម្ពីរដីកាឬក្រាំងសៀវភៅផ្សេងៗ ដែលជាគ្រឿងសម្រាប់ផ្តល់វិជ្ជាក្នុងពុទ្ធសាសនា ត្រូវបណ្តាជនទាំងអស់ក្នុងខេត្តទាំង ២ នេះធ្វើទុកក្នុងចិត្តគ្រប់ ១ គ្នា ដោយឥតក្រែងថា អ្នកកាល់គ្នាបានជួយបើកតម្រិះប្រាជ្ញា ដើម្បីសង្គ្រោះដល់ជាតិខ្មែរក្នុងបច្ចុប្បន្នកាលនេះ និងក្នុងអនាគតកាលខាងមុខ ។

អ្នកស្រីគ្រប់គ្រងព្រះរាជបណ្ណាល័យ សូមអរគុណដោយចំណែកផ្សេងដល់ឧបាសិកាទាំងឡាយ ដែលបានជួយដង្ហែវត្ថុដ៏ប្រសើរនេះមកតម្កល់ទុកក្នុងព្រះរាជបណ្ណាល័យ ហើយសូមឲ្យទទួលអនុមោទនាយកផលានិសង្សគ្រប់ៗ គ្នា ក្នុងវេលានេះ ។

លុះឲ្យពររួចហើយ ទើបលោកចាងហ្វាងខេត្តកំពង់ចាម

សូត្រសេចក្តីដូចមានខាងក្រោមនេះ:

សូមព្រះរាជទានក្រាបបង្គំទូល ព្រះករុណាជាអម្ចាស់ជីវិតលើត្បូង ព្រមទាំងព្រះរាជវង្សានុវង្ស ទាំងព្រះតេជព្រះគុណ លោកកុងស៊ុលសេនាបតី ទាំងអ្នកនាងជាចាងហ្វាង ក្រុមព្រះរាជបណ្ណាល័យ ។

ក្នុងវារៈនេះជាទីនាំបីតិឲ្យជ្រះថ្លា ដោយខ្ញុំទទួលព្រះបង្គំជាខ្ញុំតាង នាមអស់អាណាប្រជាជនក្នុងទីរួមខេត្តកំពង់ចាម ដែលទទួលកិច្ចធុរៈចូល មកអនុមោទនាជាកិត្តិយស ដល់ទ្រង់ព្រះករុណា និងអស់លោកដែលបាន តាក់តែង គឺឃោសនាប្រមូលអស់អាណាប្រជានុរាស្ត្រស្មោះត្រង់ឲ្យនាំ វត្ថុមកតម្កល់ទុកក្នុងព្រះរាជបណ្ណាល័យដ៏ប្រសើរនេះ ។

បណ្ដាអ្នកស្រុកទាំងឡាយ ក៏មានបំណងក្នុងការនេះមកជាយូរ ហើយតាមលំអាននៃអ្នកស្រុកទីរួមខេត្តឯទៀត បានធ្វើកន្លងមកពីមុនៗ ។

សេចក្ដីដែលទ្រង់ព្រះមេត្តាប្រោស រាប់អានដល់យើងខ្ញុំប្រមូលឲ្យ មកជួយទំនុកបំរុងព្រះរាជបណ្ណាល័យនោះ ទូលព្រះបង្គំជាខ្ញុំនិងបណ្ដា-ជនទាំងឡាយ ក៏មានចិត្តអំណរនឹងព្រះតេជព្រះគុណ ទ្រង់ ព្រះករុណា ជាអង្វែងពុំឃ្លាត ។

ចំណែកខាងអ្នកនាងជាចាងហ្វាងក្រុមព្រះរាជបណ្ណាល័យ ដែលយក ចិត្តខំសង្វាត ឲ្យបានកើតព្រះរាជបណ្ណាល័យ ដោយឆាប់រួសរាន់ នោះ អស់អាណាប្រជាជនក៏មានសេចក្ដីសរសើរច្រើនដែរ ហើយនៅមានចិត្តត្រេកអរពុំ ភ្លេច ព្រោះបណ្ដារាស្ត្រខ្មែរមានចិត្តត្រេកអរណាស់ ត្រង់ការដែលនាំឲ្យដឹង

ក្នុងពង្សាវតាររបស់ខ្លួន ក៏ឃើញថាអ្នកនាងដឹងអធ្យាស្រ័យរបស់ខ្មែរខិតខំប្រមូលក៏ស្តុកតាំង រឿងរ៉ាវដែលសាបសូន្យទៅនោះឲ្យបានគង់ឡើងវិញ ។

ឯរឿងរ៉ាវទាំងឡាយ ដែលតមកដល់សម័យនេះ ឃើញមានតែសេចក្តីដែលដឹងតៗគ្នានឹងយកជាប្រាកដពុំបាន ព្រោះសេចក្តីដែលពិតអំពីបុរាណនោះស្ទើរតែវិនាសសាបសូន្យអស់ ឯការដែលប្រមូលតម្កល់ទុកពង្សាវតារនឹងក៏ស្តុកតាំងអំពីបុរាណនោះ ត្រូវតែរៀបចំឲ្យមានជាគោលចារិកនៅទីណាដូចរបៀបប្រទេសស្រុកយុរ៉ុបនោះ ឃើញថាព្រះរាជបណ្ណាល័យនេះពិតមែនតែទើបនឹងកើតឡើងថ្មី តែថាបានចម្រើនជឿនលឿនជាប្រាកដជាក់ស្តែងណាស់ ត្បិតការដែលរៀបចំព្រះរាជបណ្ណាល័យនោះ មិនបានដោយងាយទេ ព្រោះសេចក្តីដែលនឹងស្រង់យកតាមពាក្យពេចន៍ ដែលពោលតគ្នានោះជាងាយមែនឯត្រង់ការ ដែលប្រមូលក្បួនច្បាប់ឲ្យជាក់ច្បាស់ជាតឹកតាងនោះ ជាលំបាកណាស់ តាំងពីបង្កើតព្រះរាជបណ្ណាល័យនោះឃើញថា បណ្តាជនមានចិត្តត្រេកអរ ណែនាំគម្ពីរសាស្ត្រា ដ៏ប្រសើរនិងអស់ក្បួនតម្រា ដែលបាក់បែកខ្ចាត់ខ្ចាយសេសសល់ពីកាលមានកពមន្ទិលជាន់មុននោះ យកមកតម្កល់ទុកក្នុងព្រះរាជបណ្ណាល័យជាដំណែលនឹងបានជាប់កន្លែងតទៅមុខ ហើយអំណើសតទៅមុខ បើអស់កូនចៅប្រាថ្នាចង់ចេះដឹងដូចម្តេច ក៏គ្រាន់តែទៅមើលក្នុងព្រះរាជបណ្ណាល័យ ក៏បានដឹងបានយល់ក្តីរឿងរ៉ាវបុរាណតាមចិត្តឥតទើសទាល់អ្វីឡើយ មិនតែប៉ុណ្ណោះ

ឡើយទឹងបានយល់ក្តីពីតម្លៃកិរិយាជូនតាទិងច្បាប់ក្រិត្យក្រមខាងពុទ្ធចក្រ។

ហេតុនេះអស់របស់ដែលប្រជុំមកតម្កល់ទុក ក្នុងព្រះរាជបណ្ណាល័យនេះ ប្រៀបទុកដូចជាឃ្លាំងរឿងពង្សាវតារ ដ៏មានប្រយោជន៍ធំសម្រាប់ជាតិក្នុងការនេះ កិច្ចធុរៈរបស់ទីរួមខេត្តកំពង់ចាមមិនត្រូវនៅជាក្រោយឲ្យចាញ់ទីរួមខេត្តឯទៀត ហេតុនោះបានខំប្រឹងផ្ទៀតរកគម្ពីរសាស្ត្រាដែលព្រះរាជបណ្ណាល័យមិនទាន់មាន បានចំនួន ២៣៣ មុខ ព្រះពុទ្ធរូបមាស ២០ ព្រះពុទ្ធរូបប្រាក់ ២១ និងវត្ថុឯទៀតជាច្រើនមុខ នាំចូលមកតម្កល់ទុកក្នុងព្រះរាជបណ្ណាល័យ ដោយចិត្តយើងប្រាថ្នាគ្រប់គ្នាចង់ឲ្យការដែលកសាងថ្មីនេះបានចម្រើនជឿនទៅជាប្រាកដ ហើយយើងខ្ញុំ ក៏បានមកក្នុងឱកាសនេះ សឹងមានសេចក្តីសោមនស្សត្រេកអរជាងអស់អ្នកដែលគួរស្តាយដោយពុំបានមកជាមួយផង យើងខ្ញុំសូមលើកវត្ថុទាំងនេះថ្វាយព្រមទាំងសេចក្តីគោរពដ៏ប្រសើររបស់យើងខ្ញុំដល់ព្រះរាជបណ្ណាល័យតាងនាមអស់បណ្តាជនក្នុងទីរួមខេត្តនិងព្រះសង្ឃគ្រប់វត្ត ទូលព្រះបង្គំជាខ្ញុំសូមក្រាបបង្គំទូលថ្វាយព្រះពរ ដល់ព្រះករុណាជាអម្ចាស់ជីវិតលើត្បូង សូមចម្រើនព្រះជន្មាទីឃាយុឲ្យបានប្រកបទូវសេចក្តីសុខដ៏ប្រសើរ ឯចំណែកខាងអ្នកនាងជាចាងហ្វាងក្រុមព្រះរាជបណ្ណាល័យ សូមអ្នកទទួលសេចក្តីកតញ្ញូដោយស្មោះត្រង់ពីយើងខ្ញុំ ។

លុះចប់សេចក្តីនេះហើយ ព្រះអង្គម្ចាស់ក្រុមព្រះ [illegible].

ការុណាវង្ស ទ្រង់ក្រោកឡើងថ្លែងសេចក្ដីអរគុណដល់អ្នកតំណាងខេត្ត
ទាំងអស់ ព្រមទាំងពន្យល់អំពីផលប្រយោជន៍ដែលជញ្ជូននូវគម្ពីរនិងវត្ថុ
ផ្សេងៗ មកតម្កល់ទុកក្នុងព្រះរាជបណ្ណាល័យ រួចពីនោះលោកគ្រូព្រះ
មហាវិមលធម្ម រៀងព្នង ថោង ថ្លែងសេចក្ដីអំណរគុណតាមព្រះសង្ឃ
គ្រប់អង្គ អំពីដែលបានឃើញខេត្តកំពង់ចាម បានចូលជួយដល់សេចក្ដី
ចម្រើន ក្នុងសតិបញ្ញារបស់ខ្មែរជាតិ ព្រមទាំងឲ្យពរសព្វសាធុការគ្រប់ៗ
គ្នា ស្រេចហើយទើបសម្ដេចក្រុមព្រះ ភាវហ្យា មុនីវង្ស ថ្លែង
សេចក្ដីពេញព្រះរាជហឫទ័យរបស់លោក អំពីដែលបណ្ដាពស្ត្របាន
ស្គាល់នូវប្រយោជន៍ដែលបានបង្កើតព្រះរាជបណ្ណាល័យនេះ លុះចប់
សេចក្ដីទាំងអស់ហើយ លោកសង្ឃទាំងអស់ក៏តាំងសូត្រធម៌ ជយន្តោ
ចប់ធម៌វេលាណា លោកឡឺរេស៊ីដង់ស៊ុប៉េរីយ៉េរ នូវអស់លោកកុងស៊ីសេ-
នាបតី ព្រះរាជវង្សានុវង្សនិងនាម៉ឺនសព្វមុខមន្ត្រី ក៏ចេញចាកពីទីនោះ
ទីទៃៗទៅ ទើបព្រះរាជបណ្ណាល័យ បង្គាប់ពួកបណ្ដាជនទាំងប៉ុន្មាន
ដែលបានចូលក្នុងព្រះរាជបណ្ណាល័យ ដែលបានទទួលទឹកតែនិងបារីហើយ
ឲ្យចេញទៅខាងក្រៅ ឯជនដែលនៅខាងក្រៅ ឲ្យចូលទៅក្នុងព្រះរាជ
បណ្ណាល័យ ដរាបដល់បានចូលគ្រប់គ្នា ក៏ល្មមពេលប្រលប់បែកគ្នាទៅ
ទីទៃៗរៀងខ្លួន ។

ក្នុងវេលាម៉ោង ៧ យប់នោះ មានលេងល្ខោនព្រះរាជទ្រព្យនៅក្នុងព្រះទីនាំងគោជនី ដើម្បីទទួលអ្នកតំណាងខេត្តកំពង់ចាម ដល់ពេលព្រឹកឡើងគឺថ្ងៃ ៦ សូរយេគ៍ នោះអ្នកតំណាងខេត្តបានដើរមើលមន្ទីរផ្សេង ៗ ក្នុងក្រុងភ្នំពេញ ហើយវេលាថ្ងៃរសៀលម៉ោង ៣ បានប្រជុំទាំងអស់គ្នាថតនៅទីព្រះរាជបណ្ណាល័យជ្រុងខាងត្បូង ក្នុងថ្ងៃដដែលវេលាម៉ោង ៦ កន្ទះល្ងាច មានចាក់កុនស្រមោល អំពីប្រាសាទបុរាណនៅអង្គរវត្ត ដើម្បីជាទីកំសាន្តដល់លោកសង្ឃ និងឧបាសិកាទាំងអស់ ក្នុងខេត្តកំពង់ចាម តែដោយក្នុងវេលានោះមនុស្សដែលចូលទៅមើល មានចំនួនជាច្រើនណាស់ ព្រះរាជបណ្ណាល័យ តម្រូវឲ្យចាក់ពីរលើក ដើម្បីឲ្យបានឃើញដល់អ្នកដែលមិនទាន់បានចូលមើល ក្នុងលើកមុននោះផង ។

វេលាព្រឹកឡើងថ្ងៃ ៧ សូរយេគ៍ អ្នកតំណាងខេត្តកំពង់ចាមទាំងអស់គ្នា ក៏បានទៅជួបជុំនៅកំពង់វេលាម៉ោង ៨ ព្រឹកបានរៀបចំទូកទាំងឡាយជាជួរ ៗ ហើយកប៉ាល់ទាញសណ្តោងច្រាសទឹកឡើងត្រៀង ៗ ទៅគួរជាទីសប្បាយ ដល់សាធារណជនទាំងអស់គ្នាដែលបានឃើញទូកទាំងនោះរេចុះឡើងក្នុងទន្លេជាទីធ្វើឲ្យអ្នកទាំងឡាយមិនភ្លេចនៃបុណ្យនេះឡើយ ។

-ចប់-

